# គោលធម៌សំខាន់ ៗ
# នៅក្នុងសិក្ខាលកសូត្រ



## កម្មកិលេស ៤ យ៉ាង

១. បាណាតិបាតោ ការធ្វើសត្វមានជីវិត ឲ្យធ្លាក់ចុះកន្លង (គឺសម្លាប់សត្វ) ។

២. អទិន្នាទានំ ការកាន់យកទ្រព្យ ដែលម្ចាស់គេមិនបានឲ្យ ។

៣. កាមេសុ មិច្ឆាចារោ ការប្រព្រឹត្តិខុសក្នុងកាមទាំងឡាយ ។

៤. មុសាវាទោ ការនិយាយពាក្យកុហក ។

សូមមើលសេចក្ដីពិស្ដារនៅត្រង់ទំព័រទី ៣៨ ។

## អគតិធម៌ ៤ យ៉ាង

១. ឆន្ទាគតិ ការលំអៀងព្រោះស្រឡាញ់ ។

២. ទោសាគតិ ការលំអៀងព្រោះស្អប់ ។

៣. មោហាគតិ ការលំអៀងព្រោះល្ងង់ ។

៤. ភយាគតិ ការលំអៀងព្រោះខ្លាច ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ៤៤ ។

## អបាយមុខ ៦ យ៉ាង

១. សុរាមេរយមជ្ជប្បមាទដ្ឋានានុយោគោ កិរិយាប្រកបរឿយ ៗ នូវការផឹកទឹកស្រវឹង គឺ សុរានិងមេរ័យ ដែលជាហេតុជាទីតាំងនៃសេចក្តីប្រមាទ ។

២. វិកាលវិសិខាចរិយានុយោគោ បានប្រកបរឿយ ៗ នូវការត្រាច់ទៅតាមច្រកល្ហកខុសកាល ។

៣. សមជ្ជាភិចរណំ ការដើរមើលមហោស្រព ។

៤. ជូតប្បមាទដ្ឋានានុយោគោ ការប្រកបរឿយ ៗ នូវហេតុជាទីតាំងនៃសេចក្តីប្រមាទ គឺលេងនូវល្បែងភ្នាល់ ។

៥. បាបមិត្តានុយោគោ ការសេពគប់នូវបាបមិត្ត ។

៦. អាលស្សានុយោគោ ការប្រកបរឿយ ៗ នូវសេចក្តីខ្ជិលច្រអូស ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ៥០ ។

## ទោសនៃការផឹកទឹកស្រវឹង ៦ យ៉ាង

១. សន្ទិដ្ឋិកា ធនជានិ វិនាសទ្រព្យដែលឃើញជាក់ស្តែងខ្លួនឯង ។

២. កលហប្បវឌ្ឍនី ការកឲ្យកើតជម្លោះ ។

៣. រោគានំ អាយតនំ ជាហេតុនាំឲ្យកើតរោគទាំងឡាយ ។

៤. អកិត្តិសញ្ជននី ការនាំឲ្យខូចឈ្មោះ ។

៥. ហិរិកោបិននិទ្ទំសនី ការបង្ហាញកេរ្តិ៍ខ្មាស ។

៦. បញ្ញាយ ទុព្វលីករណី ធ្វើបញ្ញាឲ្យមានកម្លាំងថយ ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ៥៣ ។

# ទោសនៃការដើរទៅតាមច្រកល្ហកខុសកាល ៦ យ៉ាង

*១. អត្តាបិស្ស អគុត្តោ អរក្ខិតោ ហោតិ អ្នកនោះឈ្មោះថា មិនគ្រប់គ្រងមិនរក្សាខ្លួន ។*

*២. បុត្តទារោបិស្ស អគុត្តោ អរក្ខិតោ ហោតិ អ្នកនោះឈ្មោះថា មិនគ្រប់គ្រងមិនរក្សាកូនប្រពន្ធ ។*

*៣. សាបតេយ្យំបិស្ស អគុត្តំ អរក្ខិតំ ហោតិ អ្នកនោះឈ្មោះថា មិនគ្រប់គ្រងមិនរក្សាទ្រព្យសម្បត្តិ ។*

*៤. សង្កិយោ តេសុ តេសុ ឋានេសុ ហោតិ សេចក្តីរង្កៀសតែងកើតមាន ក្នុងកន្លែងដែលខ្លួនទៅដល់នោះ ៗ ។*

*៥. អភូតវចនំ តស្មឹ រូហតិ ពាក្យមិនពិត តែងធ្លាក់មកត្រូវលើបុគ្គលនោះ ។*

*៦. ពហូនំ ទុក្ខធម្មានំ បុរក្ខិតោ ហោតិ បុគ្គលនោះឈ្មោះថា បំពេញនូវធម៌ជាទុក្ខច្រើន ។*

*សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ៥៧ ។*

## ទោសនៃការដើរមើលល្បែងមហោស្រព ៦ យ៉ាង

១. ក្វ នច្ចំ    របាំក្នុងទីណា ក៏ទៅក្នុងទីនោះ ។

២. ក្វ គីតំ    ចម្រៀងក្នុងទីណា ក៏ទៅក្នុងទីនោះ ។

៣. ក្វ វាទិតំ    ការប្រគំក្នុងទីណា ក៏ទៅក្នុងទីនោះ ។

៤. ក្វ អក្ខាតំ    គេប្រជុំនិយាយរឿងព្រេង ដែលឥតប្រយោជន៍ក្នុងទីណា ក៏ទៅក្នុងទីនោះ ។

៥. ក្វ បាណិស្សរំ    ល្បែងវាយគងក្នុងទីណា ក៏ទៅក្នុងទីនោះ ។

៦. ក្វ កុម្ភថូនំ    ល្បែងវាយរនាតក្នុងទីណា ក៏ទៅក្នុងទីនោះ ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ៦០ ។

## ទោសនៃការលេងល្បែងភ្នាល់ ៦ យ៉ាង

១. ជយំ វេរំ បសវតិ    កាលបើឈ្នះគេ រមែងបានពៀរ ។

២. ជិនោ វិត្តមនុសោចតិ  កាលបើចាញ់គេ តែងតែសោកស្តាយទ្រព្យសម្បត្តិ ។

៣. សន្និធិកា ធនជានិ វិនាសទ្រព្យសម្បត្តិ ដែលឃើញ
ជាក់ស្ដែងទាន់ភ្នែក ។

៤. សភាគតស្ស វចនំ ន រូហតិ កាលបើទៅសាលា
វិនិច្ឆ័យ គេមិនជឿស្ដាប់ពាក្យ ។

៥. មិត្តាមច្ចានំ បរិភូតោ ហោតិ ពួកមិត្តអាមាត្យ តែង
បោះបង់ចោល ។

៦. អាវាហវិវាហកានំ អប្បត្ថិតោ ហោតិ ជាបុគ្គលដែលគេ
មិនត្រូវការដណ្ដឹង ឬឲ្យកូនស្រី ។

សូមមើលសេចក្ដីពិស្ដារនៅត្រង់ទំព័រទី ៦៣ ។

## ទោសនៃការសេពគប់បាបមិត្ត ៦ យ៉ាង

១. យេ ធុត្តា ពួកជនដែលជាអ្នកលេងល្បែងភ្នាល់ ។

២. យេ សោណ្ឌា ជនដែលជាអ្នកលេងស្រី ។

៣. យេ បិបាសា ជនដែលជាអ្នកលេងផឹកសុរា ។

៤. យេ នេកតិកា ជនដែលជាអ្នកបោកប្រាសបញ្ឆោត
អ្នកដទៃដោយរបស់ក្លែង ។

៥. យេ វញ្ចនិកា ជនដែលជាអ្នកបំបាត់ ប្រវញ្ចន៍អ្នកដទៃ ក្នុងទីចំពោះមុខ ។

៦. យេ សាហសិកា ជនដែលជាអ្នកឆក់ដណ្ដើមទ្រព្យអ្នកដទៃ ។

សូមមើលសេចក្ដីពិស្ដារនៅត្រង់ទំព័រទី ៦៧ ។

## ទោសនៃសេចក្ដីខ្ជិលច្រអូស ៦ យ៉ាង

១. អតិសីតន្តិ កម្មំ ន ករោតិ មិនធ្វើការងារ ដោយអាងថា ត្រជាក់ណាស់ ។

២. អតិឧណ្ហន្តិ កម្មំ ន ករោតិ មិនធ្វើការងារ ដោយអាងថា ក្ដៅណាស់ ។

៣. អតិសាយន្តិ កម្មំ ន ករោតិ មិនធ្វើការងារ ដោយអាងថា ល្ងាចណាស់ ។

៤. អតិបាតោតិ កម្មំ ន ករោតិ មិនធ្វើការងារ ដោយអាងថា ព្រឹកណាស់ ។

៥. អតិច្ឆាតោស្មីតិ កម្មំ ន ករោតិ មិនធ្វើការងារ ដោយ

អាងថា ឃ្លានណាស់ ។

៦. អតិបិបាសិតោស្មីតិ កម្មំ ន ករោតិ មិនធ្វើការងារ

ដោយអាងថា ស្រេកណាស់ ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ៦៩ ។

## បុគ្គលជាអមិត្តគ្រាន់តែជាមិត្តប្លម ៤ ពួក

១. អញ្ញទត្ថុហរោ មនុស្ស ដែលគិតយកតែប្រយោជន៍ខ្លួន ។

២. វចីបរមោ មនុស្សល្អតែសំដី ។

៣. អនុប្បិយភាណី មនុស្ស ដែលនិយាយចាក់បណ្តោយឲ្យគាប់ចិត្ត ។

៤. អបាយសហាយោ មនុស្សជាសម្លាញ់ ក្នុងការវិនាសភោគៈទាំងឡាយ ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ៧៩ ។

# មិត្តគិតតែប្រយោជន៍ខ្លួន ៤ យ៉ាង

១. អញ្ញទត្ថុហរោ ហោតិ មិត្តគិតយកតែប្រយោជន៍ខ្លួន ។

២. អប្បេន ពហុមិច្ឆតិ មិត្តប្រាថ្នាយករបស់ច្រើន ដោយ (ឲ្យ) របស់តិចតួច ។

៣. ភយស្ស កិច្ចំ ករោតិ ទាល់តែមានភ័យ ទើបជួយធ្វើកិច្ចរបស់មិត្ត ។

៤. សេវតិ អត្ថការណា សេពគប់មិត្ត ព្រោះហេតុតែប្រយោជន៍ ។

សូមមើលសេចក្ដីពិស្ដារនៅត្រង់ទំព័រទី ៨២ ។

# មិត្តល្អតែសំដី ៤ យ៉ាង

១. អតីតេន បដិសន្ថរតិ មិត្តទទួលរាក់ទាក់ ដោយរបស់ដែលកន្លងទៅហើយ ។

២. អនាគតេន បដិសន្ថរតិ មិត្តទទួលរាក់ទាក់ ដោយរបស់មិនទាន់មានមក ។

៣. និរត្ថកេន សន្តិណ្ហាតិ មិត្តសង្គ្រោះ ដោយអំពើឥត ប្រយោជន៍ ។

៤. បច្ចុប្បន្នេសុ កិច្ចេសុ ព្យសនំ ទស្សេតិ កាលកិច្ច ទាំងឡាយកើតឡើងភ្លាម ៗ ក៏ សម្តែងអាងរបស់ខូចខាត ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ៨៤ ។

## មិត្តនិយាយចាក់បណ្តោយ ៤ យ៉ាង

១. បាបកម្មំបិស្ស អនុជានាតិ បើមិត្តធ្វើអំពើអាក្រក់ ក៏ យល់ព្រមតាម ។

២. កល្យាណំបិស្ស អនុជានាតិ បើមិត្តធ្វើអំពើល្អ ក៏ យល់ព្រមតាម ។

៣. សម្មុខស្ស វណ្ណំ ភាសតិ ពណ៌នាគុណមិត្ត តែក្នុងទី ចំពោះមុខ ។

៤. បរម្មុខស្ស អវណ្ណំ ភាសតិ ពោលទោសមិត្ត ក្នុងទី កំបាំងមុខ ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ៨៧ ។

# មិត្តក្នុងផ្លូវវិនាស ៤ យ៉ាង

១. សុរាមេរយមជ្ជប្បមាទដ្ឋានានុយោគេ សហាយោ ហោតិ
ជាសម្លាញ់ ក្នុងកិរិយាប្រកបរឿយ ៗ
នូវការផឹកទឹកស្រវឹង គឺសុរានិងមេរ័យ
ដែលជាទីតាំងនៃសេចក្តីប្រមាទ ។

២. វិកាលវិសិខាចរិយានុយោគេ សហាយោ ហោតិ
ជាសម្លាញ់ ក្នុងកិរិយាប្រកបរឿយ ៗ
នូវការត្រាច់ទៅតាម ច្រកល្ហកខុស
កាល ។

៣. សមជ្ជាភិចរណេ សហាយោ ហោតិ ជាសម្លាញ់ ក្នុង
កិរិយាដើរមើលល្បែងមហោស្រព ។

៤. ជូតប្បមាទដ្ឋានានុយោគេ សហាយោ ហោតិ ជា
សម្លាញ់ ក្នុងកិរិយាប្រកបរឿយ ៗ
នូវល្បែងភ្នាល់ ដែលជាហេតុជាទី
តាំងនៃសេចក្តីប្រមាទ ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ៨៨ ។

## មិត្តមានសន្តានល្អ ៤ ពួក

១. ឧបការកោ មិត្តោ  មិត្តមានឧបការៈ ។

២. សមានសុខទុក្ខោ មិត្តោ មិត្តរួមសុខរួមទុក្ខ ។

៣. អត្ថក្ខាយី មិត្តោ  មិត្តប្រាប់ប្រយោជន៍ ។

៤. អនុកម្បកោ មិត្តោ  មិត្តមានសេចក្តីឈឺឆ្អាល ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ៩២ ។

## មិត្តមានឧបការៈ ៤ យ៉ាង

១. បមត្តំ រក្ខតិ  រក្សាមិត្តដែលធ្វេសប្រហែស ។

២. បមត្តស្ស សាបតេយ្យំ រក្ខតិ រក្សាសម្បត្តិរបស់មិត្ត
ដែលធ្វេសប្រហែស ។

៣. ភីតស្ស បដិសរណំ ហោតិ ជាទីពឹងពំនាក់របស់មិត្ត
ដែលមានសេចក្តីភិតភ័យ ។

៤. ឧប្បន្នេសុ កិច្ចេសុករណីយេសុ តទ្ទិគុណំ ភោគំ
អនុប្បទេតិ កាលបើកិច្ចដែលត្រូវ

ធ្វើកើតឡើងហើយ តែងជួយផ្តល់

ភោគៈជាទ្វិគុណជាងទ្រព្យ ដែល

មិត្តត្រូវការនោះ ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ៩៣ ។

## មិត្តរួមសុខរួមទុក្ខ ៤ យ៉ាង

១. គុយ្ហមស្ស អាចិក្ខតិ ប្រាប់នូវអាថ៌កំបាំង របស់ខ្លួន ដល់មិត្ត ។

២. គុយ្ហមស្ស បរិគុយ្ហតិ ជួយបិទបាំងនូវអាថ៌កំបាំងរបស់ មិត្ត ។

៣. អាបទាសុ ន វិជហតិ មិនលះបង់គ្នា ក្នុងគ្រាដែល មានវិបត្តិ ។

៤. ជីវិតំបិស្ស អត្ថាយ បរិច្ចត្តំ ហោតិ សូម្បីជីវិតក៏ហ៊ាន លះបង់ ដើម្បីប្រយោជន៍ដល់ មិត្ត (គឺស៊ូប្តូរជីវិត) ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ៩៦ ។

## មិត្តប្រាប់ប្រយោជន៍ ៤ យ៉ាង

១. *បាបា និវារេតិ* ហាមមិត្តឲ្យឃ្លាតចាកអំពើអាក្រក់ ។

២. *កល្យាណេ និវេសេតិ* ដឹកនាំមិត្ត ឲ្យតម្កល់នៅតែក្នុងអំពើល្អ ។

៣. *អស្សុតំ សាវេតិ* ឲ្យបានឮពាក្យ ដែលមិនធ្លាប់បានឮ ។

៤. *សគ្គស្ស មគ្គំ អាចិក្ខតិ* ប្រាប់ផ្លូវស្ថានសួគ៌ ។

សូមមើលសេចក្ដីពិស្ដារនៅត្រង់ទំព័រទី ៩៨ ។

## មិត្តមានសេចក្ដីឈឺឆ្អាល ៤ យ៉ាង

១. *អភវេនស្ស ន នន្ទតិ* ជួយព្រួយចិត្ត ពីព្រោះមិត្តដែលបានសេចក្ដីវិនាស ។

២. *ភវេនស្ស នន្ទតិ* ជួយត្រេកអរ ព្រោះមិត្តបាននូវសេចក្ដីចម្រើន ។

៣. *អវណ្ណំ ភណមានំ និវារេតិ* ទទឹងទាស់នឹងមនុស្សដែលពោលទោសមិត្ត ។

៤. វណ្ណំ ភណាមានំ បសំសតិ សរសើរតែមនុស្សដែលពណ៌នាគុណមិត្ត ។

សូមមើលសេចក្ដីពិស្ដារនៅត្រង់ទំព័រទី ១០០ ។

## ទិស ៦ យ៉ាង

១. បុរត្ថិមា ទិសា មាតាបិតរោ មាតាបិតា ជាទិសខាងកើត ។

២. ទក្ខិណា ទិសា អាចរិយា គ្រូអាចារ្យ ជាទិសខាងត្បូង ។

៣. បច្ឆិមា ទិសា បុត្តទារា កូននិងប្រពន្ធ ជាទិសខាងលិច ។

៤. ឧត្តរា ទិសា មិត្តាមច្ចា មិត្តអាមាត្យ ជាទិសខាងជើង ។

៥. ហេដ្ឋា ទិសា ទាសកម្មករា ទាសៈនិងកម្មករ ជាទិសខាងក្រោម ។

៦. ឧបរិមា ទិសា សមណព្រាហ្មណា សមណព្រាហ្មណ៍ ជាទិសខាងលើ ។

សូមមើលសេចក្ដីពិស្ដារនៅត្រង់ទំព័រទី ១១០ ។

## កូនទំនុកបម្រុងមាតាបិតាដោយស្ថាន ៥ យ៉ាង

១. ភតោ នេសំ ភរិស្សាមិ អាត្មាអញ មាតាបិតាបាន ចិញ្ចឹមរក្សាមកហើយ នឹងចិញ្ចឹមមាតាបិតាវិញ ។

២. កិច្ចំ នេសំ ករិស្សាមិ នឹងជួយធ្វើការងារ របស់មាតាបិតា ។

៣. កុលវំសំ ឋបេស្សាមិ តម្កល់វង្សត្រកូលឲ្យល្អ ។

៤. ទាយជ្ជំ បដិបជ្ជាមិ ប្រតិបត្តិ ឲ្យជាអ្នកសមគួរទទួលទ្រព្យមត៌កបាន ។

៥. បេតានំ កាលកតានំ ទក្ខិណំ អនុប្បទស្សាមិ ឧទ្ទិសទក្ខិណាទាន ដល់មាតាបិតាដែលធ្វើកាលកិរិយា ទៅកាន់បរលោកហើយ ។

សូមមើលសេចក្ដីពិស្ដារនៅត្រង់ទំព័រទី ១១២ ។

## មាតាបិតាអនុគ្រោះកូនដោយស្ថាន ៥ យ៉ាង

១. បាបា និវារេន្តិ ហាមឃាត់កូនចាកអំពើអាក្រក់ ។

២. កល្យាណេ និវេសេន្តិ ឲ្យកូនតាំងនៅតែក្នុងអំពើល្អ ។

៣. សិប្បំ សិក្ខាបេន្តិ ឲ្យកូនរៀនសូត្រសិល្បសាស្ត្រ ។

៤. បដិរូបេន ទារេន សញ្ញោជេន្តិ ដណ្ដឹងកិរិយា ឬស្វាមី សមគួរឲ្យ ។

៥. សមយេ ទាយជ្ជំ និយ្យាទេន្តិ ចែកទ្រព្យឲ្យកូន ក្នុងសម័យសមគួរ ។

សូមមើលសេចក្ដីពិស្ដារនៅត្រង់ទំព័រទី ១១៥ ។

## សិស្សត្រូវប្រតិបត្តិគ្រូដោយស្ថាន ៥ យ៉ាង

១. ឧដ្ឋានេន ដោយការក្រោកឡើងទទួល ។

២. ឧបដ្ឋានេន ដោយការគាល់បម្រើ ។

៣. សុស្សូសាយ ដោយការជឿស្ដាប់ឱវាទ ។

៤. បារិចរិយាយ ដោយការបម្រើតូច ៗ ។

៥. សក្កច្ចំ សិប្បំ បដិគ្គហណេន ដោយការរៀនសិល្ប-សាស្ត្រដោយគោរព ។

សូមមើលសេចក្ដីពិស្ដារនៅត្រង់ទំព័រទី ១១៩ ។

## គ្រូអាចារ្យអនុគ្រោះសិស្សដោយស្ថាន ៥ យ៉ាង

១. សុវិនីតំ វិនេន្តិ ដឹកនាំសិស្សដោយល្អ ។

២. សុគ្គហិតំ គាហាបេន្តិ ឲ្យសិស្សរៀនដោយល្អ ។

៣. សព្វសិប្បេសុ តំ សមក្ខាយិនោ ភវន្តិ ប្រៀនប្រដៅសិស្សឲ្យចេះត្រឹមត្រូវ ក្នុងសិល្បសាស្ត្រសព្វគ្រប់ ។

៤. មិត្តាមច្ចេសុ បដិវេទេន្តិ តែងលើកតម្កើង ក្នុងទីប្រជុំមិត្តអាមាត្យ ។

៥. ទិសាសុ បរិត្តាណំ ករោន្តិ ធ្វើសេចក្តីការពារសិស្សក្នុងទិសទាំងឡាយ ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ១២២ ។

## ស្វាមីទំនុកបម្រុងភរិយាដោយស្ថាន ៥ យ៉ាង

១. សម្មាននាយ ដោយការរាប់អាន ជាភរិយាពេញទី ។

២. អវិមាននាយ ដោយការមិនមើលងាយ ។

៣. អនតិចរិយាយ ដោយការមិនប្រព្រឹត្តក្បត់ចិត្ត ។

៤. ឥស្សរិយវោស្សគ្គេន ដោយប្រគល់ឲ្យជាធំក្នុងការផ្ទះ ។

៥. អលង្ការានុប្បទានេន ដោយការឲ្យគ្រឿងតែងខ្លួន ។

សូមមើលសេចក្ដីពិស្ដារនៅត្រង់ទំព័រទី ១២៦ ។

## ភរិយាអនុគ្រោះស្វាមីដោយស្ថាន ៥ យ៉ាង

១. សុសំវិហិតកម្មន្តា ហោតិ ចាត់ចែងការងារដោយល្អ ។

២. សុសង្គហិតបរិជនា ហោតិ សង្គ្រោះជនជាញាតិ ទាំងពីរខាងដោយល្អ ។

៣. អនតិចារិនី ហោតិ មិនប្រព្រឹត្តក្បត់ចិត្ត ។

៤. សម្ភតញ្ច អនុរក្ខតិ ថែទាំទ្រព្យសម្បត្តិ ដែលស្វាមីរកបានមក ។

៥. ទក្ខា ហោតិ អនលសា សព្វកិច្ចេសុ ឈ្លាសមិនខ្ជិលច្រអូសក្នុងកិច្ចការសព្វគ្រប់ ។

សូមមើលសេចក្ដីពិស្ដារនៅត្រង់ទំព័រទី ១២៨ ។

## កុលបុត្តប្រតិបត្តិមិត្តអាមាត្យដោយស្ថាន ៥ យ៉ាង

១. ទានេន ដោយការឲ្យរបស់ ។

២. បិយវជ្ជេន ដោយការនិយាយតែពាក្យគាប់ចិត្ត ។

៣. អត្ថចរិយាយ ដោយការប្រព្រឹត្តិ ឲ្យជាប្រយោជន៍ ។

៤. សមានត្តតាយ ដោយការប្រព្រឹត្តិខ្លួនស្មើ ។

៥. អវិសំវាទនតាយ ដោយការមិនកុហកបញ្ឆោត ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ១៣១ ។

## មិត្តអាមាត្យអនុគ្រោះកុលបុត្តដោយស្ថាន ៥ យ៉ាង

១. បមត្តំ រក្ខន្តិ រក្សាមិត្តដែលធ្វេសប្រហែស ។

២. បមត្តស្ស សាបតេយ្យំ រក្ខន្តិ ជួយថែទាំទ្រព្យសម្បត្តិ របស់មិត្តដែលធ្វេសប្រហែស ។

៣. ភីតស្ស សរណំ ហោន្តិ ជាទីពឹងរបស់មិត្តដែលមានភ័យ ។

៤. អាបទាសុ ន វិជហន្តិ មិនបោះបង់គ្នាក្នុងគ្រាមានវិបត្តិ ។

៥. អបរបជំបិស្ស បដិបូជេន្តិ រាប់អានរហូតដល់ ផៅពង្ស របស់មិត្ត ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ១៣២ ។

# ចៅហ្វាយនាយទំនុកបម្រុងទាសៈនិងកម្មករ

# ដោយស្ថាន ៥ យ៉ាង

១. យថាពលំ កម្មន្តំ សំវិធានេន ដោយការចាត់ចែងការងារសមគួរតាមកម្លាំង ។

២. ភត្តវេត្តនានុប្បទានេន ដោយការឲ្យនូវភត្តាហារ និងថ្លៃឈ្នួល ។

៣. គិលានុប្បដ្ឋានេន ដោយការព្យាបាល ក្នុងវេលាឈឺថ្កាត់ ។

៤. អច្ឆរិយានំ រសានំ សំវិភាគេន ដោយការចែករំលែកនូវរបស់ មានរសជាតិត្រកាលចំឡែក ។

៥. សមយេ វោស្សគ្គេន ដោយការឲ្យឈប់សម្រាក ក្នុងសម័យគួរ ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ១៣៤ ។

# ទាសៈនិងកម្មករអនុគ្រោះចៅហ្វាយនាយ

## ដោយស្ថាន ៥ យ៉ាង

១. បុព្វុដ្ឋាយិនោ ហោន្តិ ក្រោកឡើងធ្វើការងារ មុនចៅហ្វាយនាយ ។

២. បច្ឆានិបាតិនោ ហោន្តិ ឈប់ធ្វើការងារ ក្រោយចៅហ្វាយនាយ ។

៣. ទិន្នាទាយិនោ ហោន្តិ កាន់យកតែរបស់ ដែលចៅហ្វាយនាយឲ្យ ។

៤. សុកតកម្មករា ហោន្តិ ធ្វើការងារ របស់ចៅហ្វាយនាយដោយយកចិត្តទុកដាក់ ។

៥. កិត្តិវណ្ណហរា ហោន្តិ នាំកិត្តិគុណ របស់ចៅហ្វាយនាយទៅថ្លែងក្នុងទីនោះ ៗ ។

សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ១៣៧ ។

# កុលបុត្តផ្គត់ផ្គង់សមណព្រាហ្មណ៍ដោយស្ថាន ៥ យ៉ាង

១. មេត្តេន កាយកម្មេន ដោយកាយកម្ម ប្រកបដោយមេត្តា ។

២. មេត្តេន វចីកម្មេន ដោយវចីកម្ម ប្រកបដោយមេត្តា ។

៣. មេត្តេន មនោកម្មេន ដោយមនោកម្ម ប្រកបដោយមេត្តា ។

៤. អនាវដទ្វារតាយ ដោយភាពជាអ្នក មិនបិទទ្វារផ្ទះ ។

៥. អាមិសានុប្បទានេន ដោយកិរិយាឲ្យអាមិសទាន ។

សូមមើលសេចក្ដីពិស្ដារនៅត្រង់ទំព័រទី ១៤០ ។

# សមណព្រាហ្មណ៍អនុគ្រោះកុលបុត្ត
# ដោយស្ថាន ៦ យ៉ាង

១. *បាបា និវារេន្តិ* — *ហាមឃាត់កុលបុត្ត ចាក អំពើអាក្រក់ ។*

២. *កល្យាណេ និវេសេន្តិ* — *ឲ្យតាំងនៅតែក្នុងអំពើល្អ ។*

៣. *កល្យាណេន មនសា អនុកម្បន្តិ* — *អនុគ្រោះដោយ ចិត្តដ៏ល្អ ។*

៤. *អស្សុតំ សាវេន្តិ* — *ឲ្យបានស្តាប់ពាក្យ ដែលមិន ធ្លាប់ស្តាប់ ។*

៥. *សុតំ បរិយោទបេន្តិ* — *បំភ្លឺសេចក្តី ដែលធ្លាប់ស្តាប់ ហើយ ។*

៦. *សគ្គស្ស មគ្គំ អាចិក្ខន្តិ* — *ប្រាប់ផ្លូវសួគ៌ ។*

*សូមមើលសេចក្តីពិស្តារនៅត្រង់ទំព័រទី ១៤២ ។*



# សិង្គាលកសូត្រ



## សុត្តន្តបិដក ទីឃនិកាយ បាដិកវគ្គ

## និងអដ្ឋកថា ឈ្មោះ សុមង្គលវិលាសិនី

### ទីកន្លែងនិទាន

### បិដក

*ឯវម្មេ សុតំ ខ្ញុំបានស្តាប់មកយ៉ាងនេះ ។*

*ឯកំ សមយំ ភគវា រាជគហេ វិហរតិ វេឡុវនេ កលន្ទកនិវាបេ សម័យមួយ ព្រះមានព្រះភាគ ទ្រង់គង់ក្នុងវត្តវេឡុវ័ន ជាកលន្ទកនិវាបស្ថាន ជិតក្រុងរាជគ្រឹះ ។*

# អដ្ឋកថា

ក្នុងសិង្គាលកសូត្រ មានបទផ្ដើមថា **ឯវម្មេ សុតំ** ។ លំដាប់តទៅនឹងពណ៌នានូវបទដែលលំបាក នៅក្នុងសិង្គាលកសូត្រនោះ ។

បទថា **វេឡុវនេ កលន្ទកនិវាបេ** (ក្នុងវត្តវេឡុវ័ន) គឺជាទីព្រះរាជទាននូវអភ័យដល់សត្វកង្ហែន ជាឈ្មោះរបស់ឧទ្យាននោះ ។

បានឮមកថា ឧទ្យាននោះ ត្រូវបានព័ទ្ធព័ន្ធទៅដោយដើមឫស្សី ប្រកបដោយស៊ុមទ្វារនិងប៉មយាម ដោយមានកំពែងកំពស់ ១៨ ហត្ថ មានពណ៌ខៀវស្រងាត់ ជាទីមនោរម្យ ដោយហេតុនេះទើបហៅថា វេឡុវ័ន ។ ម្យ៉ាងទៀត ជនទាំងឡាយតែងឲ្យនូវចំណីដល់សត្វកង្ហែន ក្នុងឧទ្យានវេឡុវ័ននេះ ដោយហេតុនេះ ទើបហៅថា កលន្ទកនិវាបៈ ដែលជាទីព្រះរាជទានចំណីដល់សត្វកង្ហែន ។

មានរឿងដំណាលថា ក្នុងកាលដែលកន្លងទៅហើយ មានព្រះរាជាមួយអង្គ ទ្រង់យាងប្រពាតសួនក្នុងទីនោះ

សោយស្រាថ្នាំប៉ូវរហូតទ្រង់ស្រវឹង ហើយផ្ទុំលក់ក្នុងវេលាថ្ងៃត្រង់ ។ ពួកជនជាបរិវាររបស់ព្រះអង្គគិតគ្នាថា ព្រះរាជាផ្ទុំលក់ហើយ បានកាន់យកនូវផ្កាឈើ និងផ្លែឈើជាដើមក៏ជៀសចេញអំពីទីនោះ ៗ ទៅ ។ គ្រានោះ ពស់អសិរពិសមួយ ដោយធុំក្លិនស្រាប៉ូវ ក៏បានលូនចេញអំពីប្រហោងឈើមកកាន់ទីចំពោះព្រះភ័ក្ត្រព្រះរាជា ។ រុក្ខទេវតា បានឃើញពស់នោះហើយក៏គិតថា យើងនឹងឲ្យនូវជីវិតដល់ព្រះរាជាដូច្នេះ ទើបនិមិត្តខ្លួនជាសត្វកង្អែន ហើយបានធ្វើសម្លេងក្នុងទីជិតព្រះកាណ៌របស់ព្រះរាជា ។ ព្រះរាជាក៏ទ្រង់តើនឡើងឯពស់អសិរពិស ក៏លូនគេចខ្លួនបាត់ទៅ ។ ព្រះរាជាទ្រង់ទតឃើញសត្វកង្អែននោះហើយ ទ្រង់ក៏មានព្រះតម្រិះថាសត្វកង្អែននេះបានឲ្យជីវិតដល់យើង ទើបឲ្យគេបាត់បែងរកចំណីមកតាំងទុកក្នុងទីនោះ ទ្រង់បង្គាប់ឲ្យគេប្រកាសឲ្យអភ័យដល់សត្វកង្អែនទាំងឡាយ ។ ព្រោះហេតុនោះចាប់តាំងពីពេលនោះមក ទីនោះមានឈ្មោះថា ជាទីព្រះរាជទាននូវចំណីដល់សត្វកង្អែន ។ ឯបទថា **កលន្ទកា** នេះជាឈ្មោះរបស់សត្វកង្អែន ។

# បុព្វហេតុនិទាន

## បិដក

*តេន ខោ បន សមយេន សិង្គាលកោ គហបតិបុត្តោ កាលស្សេវ វុដ្ឋាយ រាជគហា និក្ខមិត្វា អល្លវត្ថោ អល្លកេសោ បញ្ជលិកោ បុថុទ្ទិសា នមស្សតិ បុរត្ថិមំ ទិសំ ទក្ខិណំ ទិសំ បច្ឆិមំ ទិសំ ឧត្តរំ ទិសំ ហេដ្ឋិមំ ទិសំ ឧបរិមំ ទិសំ សម័យនោះឯង កូនគហបតីឈ្មោះ សិង្គាលកៈ ក្រោកឡើងអំពីព្រឹក មានសម្ពត់ ស្លៀកជណ្តប់ទទឹកនិងសក់ទទឹក ចេញពីក្រុងរាជគ្រឹះ ប្រណម្យអញ្ជលីថ្វាយបង្គំទិសទាំងឡាយច្រើន គឺទិសខាងកើត ខាងត្បូង ខាងលិច ខាងជើង ខាងក្រោម និងទិសខាងលើ ។*

## អដ្ឋកថា

*បទថា **តេន ខោ បន សមយេន** ( សម័យនោះឯង ) មានសេចក្តីថា ជាសម័យដែលព្រះមានព្រះភាគ ទ្រង់ធ្វើក្រុងរាជគ្រឹះឲ្យជាទីគោចរហើយ ទ្រង់គង់ប្រថាប់នៅក្នុងវត្ត*

វេឡុវ័ន ដែលជាទីព្រះរាជទាននូវចំណីដល់សត្វកង្កែន ។

បទថា **សិង្គាលកោ គហបតិបុត្តោ** ជាឈ្មោះរបស់គហបតិបុត្តនោះ ។

បទថា **គហបតិបុត្តោ** គឺបុត្តរបស់គហបតី ។

បានឮមកថា បិតារបស់គហបតិបុត្តនោះ ជាគហបតីមហាសាល ។ ក្នុងផ្ទះរបស់គហបតីនោះ មានទ្រព្យប្រមាណ ៤០ កោដិ គាត់មានសទ្ធាជឿជាក់ក្នុងព្រះមានព្រះភាគ ជាឧបាសកថ្នាក់សោតាបន្ន ហើយភរិយារបស់គាត់ ក៏បានជាសោតាបន្នដូចគ្នាដែរ តែបុត្តរបស់គាត់ជាអ្នកមិនមានសទ្ធា មិនមានសេចក្តីជ្រះថ្លាឡើយ ។

គ្រានោះ មាតានិងបិតា តែងប្រៀនប្រដៅបុត្តនោះថា នែកូន! ចូរកូនចូលទៅគាល់ព្រះសាស្តា ចូលទៅរកព្រះធម្មសេនាបតីសារីបុត្ត ព្រះមហាមោគ្គល្លាន ព្រះមហា-កស្សបៈ ព្រះមហាសាវ័ក ៨០ ។ បុត្តនោះពោលយ៉ាងនេះថា ការចូលទៅរកសមណៈទាំងឡាយរបស់ពុកនិងម៉ែ រមែងមិនមានដល់ខ្ញុំឡើយ ព្រោះថា ការចូលទៅរកសមណៈទាំងឡាយ តែងត្រូវថ្វាយបង្គំ ពេលកំពុងថ្វាយ

បង្គំ ខ្នងក៏ឈឺ ជង្គង់ក៏ក្រិន ហើយត្រូវអង្គុយលើដី ពេលអង្គុយលើដីនោះ សំពត់ក៏ប្រឡាក់ធាប់ចាស់ ចាប់តាំងពីពេលបានអង្គុយជិត រមែងមានការសន្ទនា កាលបើមានការសន្ទនា រមែងកើតសេចក្ដីស្និទ្ធស្នាល បន្ទាប់មកតែងត្រូវនិមន្ត ហើយថ្វាយចីវរនិងបិណ្ឌបាតជាដើម កាលបើយ៉ាងនោះ ប្រយោជន៍រមែងវិនាស ការចូលទៅរកសមណៈទាំងឡាយរបស់ពុកនិងម៉ែ រមែងមិនមានដល់ខ្ញុំ ដោយប្រការដូច្នេះឯង ។ សូម្បីមាតាបិតាប្រៀនប្រដៅបុត្ររបស់ខ្លួនដោយប្រការដូច្នេះ រហូតអស់ជីវិត ក៏នៅតែមិនអាចនាំបុត្រចូលទៅកាន់ព្រះសាសនាបាន ។ គ្រាកាលជាខាងក្រោយ ពេលដែលបិតារបស់សិង្គាលកៈនោះសម្រាន្តលើគ្រែជិតនឹងមរណៈ បានគិតថា គួរតែឲ្យនូវឱវាទដល់ បុត្ររបស់យើង ហើយគិតតទៅទៀតថា យើងនឹងឲ្យនូវឱវាទយ៉ាងនេះថា នែកូន! ចូរកូនថ្វាយបង្គំទិសទាំងឡាយ តែកូននេះមិនយល់នូវអត្ថន័យនៃការថ្វាយបង្គំទិសទាំងឡាយ លុះដល់ពេលក្រោយ ព្រះសាស្ដាក្ដី ឬថា

ព្រះសាវ័កទាំងឡាយក្តី បានឃើញគេហើយ ប្រាកដជាសួរថា តើអ្នកធ្វើអ្វីហ្នឹង? គេនឹងឆ្លើយថា បិតារបស់ខ្ញុំបានប្រៀនប្រដៅទុកថា នែកូន! ចូរកូនថ្វាយបង្គំទិសទាំងឡាយ ។ លំដាប់នោះ ព្រះសាស្តាឬព្រះសាវ័កទាំងឡាយ នឹងសម្តែងធម៌ដល់កូននេះថា បិតារបស់អ្នកមិនមែនឲ្យអ្នកថ្វាយបង្គំទិសទាំងឡាយនោះទេ តែឲ្យថ្វាយបង្គំទិសដូច្នេះ កូននេះនឹងដឹងគុណព្រះពុទ្ធសាសនា ហើយធ្វើបុណ្យកុសលមិនខាន ។

លំដាប់នោះ លោកគហបតីបានឲ្យគេហៅបុត្តមកហើយប្រាប់ថា នែបា! ចូរបាក្រោកឡើងអំពីព្រលឹម ហើយថ្វាយបង្គំទិសទាំងឡាយ ដូច្នេះ ។

ធម្មតាពាក្យសំដីដែលបិតាផ្តែផ្តាំនៅពេលជិតនឹងស្លាប់គឺជាសំដីដែលកូនគប្បីទឹករលឹកអស់មួយជីវិត ។ ព្រោះហេតុដូច្នោះ គហបតិបុត្តនោះ ពេលដែលនឹករលឹកដល់ពាក្យសំដីរបស់បិតា ក៏បានធ្វើយ៉ាងនោះ ។ ព្រោះហេតុដូច្នោះហើយ ទើបលោកពោលថា គហបតិបុត្ត ក្រោកឡើងអំពីព្រឹក ចេញពីក្រុងរាជគ្រឹះ ជាដើម ។

បទថា **បុប្ទុិសា** ប្រែថា ទិសទាំងឡាយច្រើន មាន សេចក្តីថា ឥឡូវនេះ កាលដែលគហបតិបុត្តសម្តែងអំពី ទិសទាំងឡាយនោះ ទើបពោលពាក្យជាអាទិថា **បុរត្ថិមំ ទិសំ** ទិសខាងកើត ។

## ការបានជួបព្រះសាស្តា

## បិដក

អថខោ ភគវា បុព្វណ្ហសមយំ និវាសេត្វា បត្តចីវរមាទាយ រាជគហំ បិណ្ឌាយ បាវិសិ លំដាប់ នោះឯង ព្រះមានព្រះភាគ ស្តេចទ្រង់ស្បង់និងបាត្រចីវរក្នុង បុព្វណ្ហសម័យ ហើយស្តេចចូលទៅកាន់ក្រុងរាជគ្រឹះ ដើម្បី បិណ្ឌបាត ។

អទ្ទសា ខោ ភគវា សិង្គាលកំ គហបតិបុត្តំ កាលសេ្សវ វុដ្ឋាយ រាជគហា និក្ខមិត្វា អល្លវត្ថំ អល្លកេសំ បញ្ជលិកំ បុថុទ្ទិសា នមស្សន្តំ បុរត្ថិមំ ទិសំ ទក្ខិណំ ទិសំ បច្ឆិមំ ទិសំ ឧត្តរំ ទិសំ ហេដ្ឋិមំ ទិសំ ឧបរិមំ ទិសំ ទិស្វាន សិង្គាលកំ គហបតិបុត្តំ ឯតទវោច កិន្នុ ត្វំ គហបតិបុត្ត

កាលសេវ្វ វុដ្ឋាយ រាជគហា និក្ខមិត្វា អល្លវត្ថោ អល្លកេសោ បញ្ជលិកោ បុថុទ្ទិសា នមស្សសិ បុរត្ថិមំ ទិសំ ។ បេ ។ ឧបរិមំ ទិសន្តិ ព្រះមានព្រះភាគ ទ្រង់ទតឃើញសិង្គាលកគហបតិបុត្ត ក្រោកឡើងអំពីព្រឹក មានសម្ពត់ស្មៀកជណ្តប់ទទឹក និងសក់ទទឹក ចេញពីក្រុងរាជគ្រឹះ កំពុងផ្គងអញ្ជលីថ្វាយបង្គំទិសទាំងឡាយច្រើន គឺទិសខាងកើត ខាងត្បូង ខាងលិច ខាងជើង ខាងក្រោម និងទិសខាងលើ លុះទ្រង់ឃើញហើយ ទើបទ្រង់ត្រាស់សួរសិង្គាលកគហបតិបុត្តដូច្នេះថា នែគហបតិបុត្ត ហេតុអ្វីទើបអ្នកក្រោកអំពីព្រឹក មានសម្ពត់ស្មៀកជណ្តប់ទទឹក និងសក់ទទឹក ចេញពីក្រុងរាជគ្រឹះ ផ្គងអញ្ជលីថ្វាយបង្គំទិសទាំងឡាយច្រើន គឺទិសខាងកើត ។ បេ ។ ទិសខាងលើ ។

បិតា មម ភន្តេ កាលំ ករោន្តោ ឯវំ អវច ទិសា តាត នមស្សេយ្យាសីតិ សោ ខោ អហំ ភន្តេ បិតុ វចនំ សក្ករោន្តោ គរុករោន្តោ មានេន្តោ បូជេន្តោ កាលសេវ្វ វុដ្ឋាយ រាជគហា និក្ខមិត្វា អល្លវត្ថោ អល្លកេសោ បញ្ជលិកោ បុថុទ្ទិសា នមស្សាមិ បុរត្ថិមំ ទិសំ ។ បេ ។

**ឧបរិមំ ទិសន្តិ** សិង្គាលកគហបតិបុត្តក្រាបបង្គំទូលថា បពិត្រព្រះអង្គដ៏ចម្រើន កាលបិតារបស់ខ្ញុំជិតនឹងធ្វើមរណកាល បានផ្ដាំនឹងខ្ញុំព្រះអង្គយ៉ាងនេះថា ហៃបា ! អ្នកត្រូវតែថ្វាយបង្គំទិសទាំងឡាយ បពិត្រព្រះអង្គដ៏ចម្រើន ខ្ញុំព្រះអង្គនោះធ្វើសក្ការៈគោរពរាប់អាន បូជានូវពាក្យរបស់បិតា បានជាក្រោកឡើងអំពីព្រឹក មានសម្ពត់ស្លៀកជណ្ដប់ទទឹក និងសក់ទទឹក ចេញពីក្រុងរាជគ្រឹះ ផ្គងអញ្ជលីថ្វាយបង្គំទិសទាំងឡាយដ៏ច្រើន គឺទិសខាងកើត ។ បេ ។ ទិសខាងលើ ។

**ន ខោ គហបតិបុត្ត អរិយស្ស វិនយេ ឯវំ ឆ ទិសា នមស្សិតព្វាតិ** ព្រះមានព្រះភាគ ទ្រង់ត្រាស់ថា នៃគហបតិបុត្ត ក្នុងវិន័យរបស់ព្រះអរិយៈគេមិនត្រូវថ្វាយបង្គំទិសទាំង ៦ យ៉ាងដូច្នេះទេ ។

**យថាកថំ បន ភន្តេ អរិយស្ស វិនយេ ឆ ទិសា នមស្សិតព្វា សាធុ មេ ភន្តេ ភគវា តថា ធម្មំ ទេសេតុ យថា អរិយស្ស វិនយេ ឆ ទិសា នមស្សិតព្វាតិ** សិង្គាលកគហបតិបុត្តក្រាបបង្គំទូលសួរថា បពិត្រព្រះអង្គដ៏ចម្រើន ចំណែកក្នុងអរិយវិន័យគេគប្បីថ្វាយបង្គំទិស

ទាំង ៦ ដូចម្ដេច បពិត្រព្រះអង្គដ៏ចម្រើន បើក្នុងវិន័យរបស់ព្រះអរិយៈគេគប្បីថ្វាយបង្គំចំពោះទិសទាំង ៦ យ៉ាងណា សូមព្រះមានព្រះភាគទ្រង់សម្ដែងធម៌ ដល់ខ្ញុំព្រះអង្គដូច្នោះចុះ ។

# អដ្ឋកថា

បទថា **បាវិសិ** (ស្ដេចចូលទៅហើយ) មានសេចក្ដីថា ព្រះមានព្រះភាគជាម្ចាស់ ទ្រង់មិនយាងចូលទៅមុនទេ ព្រោះព្រះអង្គទ្រង់ព្រះតម្រិះថា តថាគតនឹងចូលទៅហើយ ស្ដេចចេញទៅ សូម្បីប្រព្រឹត្តទៅក្នុងរវាងផ្លូវ ទើបត្រាស់យ៉ាងនេះ ។

បទថា **អទ្ទសា ខោ ភគវា** (ព្រះមានព្រះភាគទ្រង់ទតឃើញហើយ) មានសេចក្ដីថា មិនមែនទើបតែបានទតឃើញដោយព្រះនេត្រក្នុងពេលនោះទេ គឺព្រះអង្គទ្រង់ប្រមើលមើលសត្វលោកដោយពុទ្ធចក្ខុ តាំងពីពេលទៀបភ្លឺទ្រង់ទតឃើញនូវសិង្គាលកគហបតិបុត្តនោះ កំពុងថ្វាយបង្គំទិសទាំងឡាយ ទ្រង់ព្រះតម្រិះថា ថ្ងៃនេះតថាគតនឹងសម្ដែង

សិង្គាលកសូត្រដែលជាវិន័យរបស់គ្រហស្ថ ដល់សិង្គា-លកគហបតិបុត្ត ព្រះសូត្រនោះ នឹងមានផលច្រើនដល់មហាជន (ដូច្នេះ) គប្បីគតគួរតែទៅក្នុងទីនោះ ។ ព្រោះហេតុនោះ ព្រះអង្គទ្រង់យាងចេញអំពីព្រលឹម ស្តេចចូលទៅកាន់ក្រុងរាជគ្រឹះដើម្បីបិណ្ឌបាត ហើយក្នុងពេលដែលព្រះអង្គទ្រង់យាងទៅ ក៏បានទតឃើញសិង្គាលកគហបតិបុត្តពិតដូច្នោះមែន ។ ដោយហេតុនោះ ទើបលោកពោលថា ព្រះមានព្រះភាគទ្រង់ទតឃើញហើយ ។

បទថា **ឯតទវោច** (ព្រះមានព្រះភាគ បានត្រាស់នឹងសិង្គាលកគហបតិបុត្ត) ដោយន័យថា សិង្គាលកគបតិបុត្តនោះ មិនបានឃើញព្រះសាស្តាឡើយ សូម្បីតែព្រះអង្គទ្រង់ប្រថាប់ឈរនៅក្នុងទីជិតនោះក៏ដោយ ព្រោះខ្លួនរវល់តែថ្វាយបង្គំទិសទាំងឡាយនោះឯង ។ លំដាប់នោះ ព្រះមានព្រះភាគជាម្ចាស់ ទ្រង់បង្ហើបព្រះឱស្ឋដូចមហាបទុម ដែលកំពុងរីកដោយសម្ផស្សព្រះរស្មីព្រះអាទិត្យ បានត្រាស់នូវព្រះវាចានេះថា ម្នាលគហបតិបុត្ត! អ្នកកំពុងធ្វើអ្វីហ្នឹ! ដូច្នេះ ជាដើម ។

បទថា **យថាកថំ បន ភន្តេ** (បពិត្រព្រះអង្គដ៏ចម្រើន ចំណែកក្នុងអរិយវិន័យគេគប្បីថ្វាយបង្គំទិសទាំង ៦ ដូចម្តេច) មានសេចក្តីថា សិង្គាលកគហបតិបុត្តបានស្តាប់នូវព្រះតម្រាស់របស់ព្រះមានព្រះភាគហើយ ក៏គិតថា បានឮថាការដែលបិតារបស់អញឲ្យថ្វាយបង្គំទិសទាំង ៦ នោះមិនមែនទិសនេះទេ ព្រោះអរិយសាវកថ្វាយបង្គំទិសផ្សេងពីនេះ អញនឹងទូលសួរអំពីទិស ដែលអរិយសាវកថ្វាយបង្គំហើយ ទើបថ្វាយបង្គំ (ទៀត) ដូច្នេះ ។ កាលដែលសិង្គាលកគហបតិបុត្ត ទូលសួរអំពីទិសទាំងឡាយនោះ ទើបក្រាបទូលថា បពិត្រព្រះអង្គដ៏ចម្រើន ចំណែកក្នុងអរិយ-វិន័យគេគប្បីថ្វាយបង្គំទិសទាំង ៦ ដូចម្តេច ជាដើម ។

ក្នុងបទទាំងឡាយនោះ បទថា **យថា** ត្រឹមតែជានិបាត ។

បទថា **កថំ បន** នេះជាបទ (សម្រាប់) សួរ ។

# កម្មក្កិលេស ៤

## បិកដ

*តេនហិ គហបតិបុត្ត សុណាហិ សាធុកំ មនសិករោហិ ភាសិស្សាមីតិ* ព្រះមានព្រះភាគ ទ្រង់ត្រាស់ថា នែគហបតិបុត្ត បើដូច្នោះអ្នកចូរស្តាប់ចុះ ចូរកំណត់ទុកក្នុងចិត្តឲ្យប្រពៃចុះ តថាគតនឹងសម្តែងប្រាប់ ។

*ឯវំ ភន្តេតិ ខោ សិង្គាលកោ គហបតិបុត្តោ ភគវតោ បច្ចស្សោសិ* សិង្គាលកគហបតិបុត្ត ក៏ទទួលស្តាប់ព្រះពុទ្ធដីកាព្រះមានព្រះភាគថា បពិត្រព្រះអង្គដ៏ចម្រើន យ៉ាងហ្នឹងហើយ ។

*ភគវា ឯតទវោច យតោ ខោ គហបតិបុត្ត អរិយសាវកស្ស ចត្តារោ កម្មក្កិលេសា បហីនា ហោន្តិ ចតូហិ ឋានេហិ បាបកម្មំ ន ករោតិ ឆ ច ភោគានំ អបាយមុខានិ ន សេវតិ សោ ឯវំ ចុទ្ទសបាបកាបគតោ ឆទិសាបដិច្ឆាទី ហោតិ ឧភោលោកវិជយាយ បដិបន្នោ ហោតិ តស្ស អយញ្ចេវ លោកោ អារទ្ធោ ហោតិ បរោ ច*

លោកោ ព្រះមានព្រះភាគ ទ្រង់ត្រាស់ដូច្នេះថា ម្នាលគហបតិបុត្ត អរិយសាវកលះបង់នូវកម្មក្កិលេស (អំពើដ៏សៅហ្មង) ៤ ប្រការផង មិនធ្វើនូវបាបកម្ម (អំពើអាក្រក់) ព្រោះហេតុ ៤ យ៉ាងផង មិនសេពនូវអបាយមុខ (គឺប្រធាននៃសេចក្ដីវិនាស) នៃភោគៈ ៦ យ៉ាងផង អរិយសាវកនោះ លោកវៀរចាកបាបធម៌ទាំង ១៤ យ៉ាងនេះ ឈ្មោះថា ជាអ្នកបិទបាំងទិសទាំង ៦ ប្រតិបត្តិដើម្បីជម្នះក្នុងលោកទាំងពីរ គឺលោកនេះ ក៏អរិយសាវកនោះបានប្រារព្ធ គឺថាបានពេញចិត្តហើយ លោកខាងមុខក៏ពេញចិត្តទៀត ។

**សោ កាយស្ស ភេទា បរំ មរណា សុគតឹ សគ្គំ លោកំ ឧបបជ្ជតិ** លុះអរិយសាវកនោះ ទម្លាយរាងកាយទៅ រមែងកើតក្នុងមនុស្សសុគតិសួគ៌ទេវលោក ។

**កតមស្ស ចត្តារោ កម្មក្កិលេសា បហីនា ហោន្តិ** កម្មក្កិលេស ៤ ប្រការ ដែលអរិយសាវកនោះលះបង់ហើយ ដូចម្ដេច ។

បាណាតិបាតោ ខោ គហបតិបុត្ត កម្មកិលេសោ អទិន្នាទានំ កម្មកិលេសោ កាមេសុ មិច្ឆាចារោ កម្មកិលេសោ មុសាវាទោ កម្មកិលេសោ ឥមស្ស ចត្តារោ កម្មកិលេសា បហីនា ហោន្តីតិ ម្នាលគហបតិបុត្ត ការធ្វើសត្វមានជីវិតឲ្យធ្លាក់ចុះកន្លង (សម្លាប់សត្វ) ជាកម្មកិលេស ១ ការកាន់យកទ្រព្យដែលម្ចាស់គេមិនឲ្យ ជាកម្មកិលេស ១ ការប្រព្រឹត្តិខុសក្នុងកាមទាំងឡាយ ជាកម្មកិលេស ១ ការនិយាយពាក្យកុហក ជាកម្មកិលេស ១ កម្មកិលេស ៤ ប្រការនេះ ដែលអរិយសាវកនោះបានលះបង់ហើយ ។

## អដ្ឋកថា

បទថា **កម្មកិលេសា** (កម្មកិលេសទាំងឡាយ) មានសេចក្តីថា សត្វទាំងឡាយ នឹងសៅហ្មងដោយកម្មទាំងឡាយនោះ ព្រោះហេតុដូច្នោះទើបលោកពោលថា កម្មកិលេសទាំងឡាយ ។

បទថា **ឋានេហិ** ប្រែថា ដោយហេតុទាំងឡាយ ។

បទថា **អបាយមុខានិ** ប្រែថា ប្រធាននៃសេចក្ដីវិនាស ។

បទថា **សោ** (អ្នកនោះ) គឺអរិយសាវក ជាព្រះសោតាបន្នបុគ្គល ។

បទថា **ចុទ្ទសបាបកាបគតោ** ប្រែថា ប្រាសចាកបាប គឺសេចក្ដីលាមកទាំង ១៤ យ៉ាងនេះ ។

បទថា **ឆទិសាបដិច្ឆាទី** ប្រែថា បិទបាំងទិស ៦ ។

បទថា **ឧភោលោកវិជយាយ** ប្រែថា ដើម្បីជម្នះក្នុងលោកទាំងពីរ ។

បទថា **អយញ្ចេវ លោកោ អារទ្ធោ ហោតិ** (លោកនេះ ក៏អរិយសាវកនោះបានប្រារព្ធហើយ) មានសេចក្ដីថា ពិតណាស់ វេរាទាំង ៥ នៅក្នុងលោកនេះ រមែងមិនមានដល់អរិយសាវកអ្នកមានសភាពបែបនេះទេ ។ ព្រោះហេតុនោះ លោកនេះ ជាលោកដែលព្រះអរិយសាវកនោះបានប្រារព្ធហើយ គឺថា បានពេញចិត្តហើយ និងសម្រេចហើយ ពៀរទាំងឡាយ ៥ រមែងមិនមានសូម្បីក្នុងលោកខាងមុខ ព្រោះហេតុដូច្នោះ លោកខាងមុខ ជាលោកដែលព្រះ

អរិយសាវកបានពេញចិត្តហើយ ។ ដូច្នេះហើយ ព្រះអរិយ-សាវកនោះ ពេលបែកធ្លាយរាងកាយស្លាប់អំពីលោកនេះទៅ រមែងកើតក្នុងសុគតិសួគ៌ទេវលោក ។ ដោយហេតុនេះឯង ទើបព្រះមានព្រះភាគ ទ្រង់តាំងមាតិកាទុកដោយសង្ខេប ដើម្បីធ្វើមាតិកានោះឲ្យពិស្តារ ទើបត្រាស់ថា កម្មក្កិលេស ៤ ដែលព្រះអរិយសាវកលះបានហើយដូចម្តេច ជាដើម ។

បទថា **កម្មក្កិលេសោ** មានសេចក្តីថា ធម្មជាតដែលឈ្មោះថា កម្មក្កិលេស ព្រោះកម្មនោះ ជាកិលេស គឺ សម្បយុត្តដោយកិលេស ។ ជាការពិតណាស់ បុគ្គលមានកិលេស រមែងសម្លាប់សត្វ ឯបុគ្គលមិនមានកិលេស រមែងមិនសម្លាប់សត្វ ព្រោះហេតុដូច្នោះ បាណាតិបាត លោកពោលថា ជាកម្មក្កិលេស ។ សូម្បីក្នុងកម្មក្កិលេសដទៃទៀត មានអទិន្នាទានជាដើម ក៏មានន័យដូចគ្នានេះដែរ ។

# និគមគាថា

## បិដក

ឥទមវោច ភគវា ឥទំ វត្វាន សុគតោ អថាបរំ ឯតទវោច សត្ថា ព្រះមានព្រះភាគ បានសម្ដែងពាក្យនេះ ហើយ ព្រះសុគតជាសាស្ដា លុះទ្រង់សម្ដែងពាក្យនេះ ហើយ ទើបសម្ដែងគាថាព័ន្ធនេះតទៅទៀតថា

បាណាតិបាតោ អទិន្នាទានំ
មុសាវាទោ បវុច្ចតិ
បរទារគមនញ្ចេវ
ន បសំសន្តិ បណ្ឌិតាតិ

ការសម្លាប់សត្វ ១ លួចទ្រព្យគេ ១ និយាយកុហក ១ សេពគរិយាបុគ្គលដទៃ ១ ហៅថា (កម្មក្កិលេស) បណ្ឌិតទាំងឡាយ មិនសរសើរឡើយ ។

## អដ្ឋកថា

បទថា **អថាបរំ** (តទៅទៀត) មានសេចក្តីថា ព្រះ-មានព្រះភាគ បានត្រាស់ព្រះគាថាព័ន្ធសម្តែងនូវសេចក្តីនោះតទៅទៀត ។

## អគតិធម៌ ៤

## បិដក

កតមេហិ ចតូហិ ឋានេហិ បាបកម្មំ ន ករោតិ ឆន្ទាគតឹ គច្ឆន្តោ បាបកម្មំ ករោតិ ទោសាគតឹ គច្ឆន្តោ បាបកម្មំ ករោតិ មោហាគតឹ គច្ឆន្តោ បាបកម្មំ ករោតិ ភយាគតឹ គច្ឆន្តោ បាបកម្មំ ករោតិ អរិយសាវកមិនធ្វើនូវបាបកម្មព្រោះហេតុ ៤ យ៉ាង ដូចម្តេចខ្លះ បុថុជ្ជនលុះអគតិព្រោះស្រឡាញ់ ក៏ធ្វើបាបកម្ម លុះអគតិព្រោះស្អប់ក៏ធ្វើបាបកម្ម លុះអគតិព្រោះល្ងង់ក៏ធ្វើបាបកម្ម លុះអគតិព្រោះខ្លាច ក៏ធ្វើបាបកម្ម ។

យតោ ខោ គហបតិបុត្ត អរិយសាវកោ នេវ ឆន្ទាគតឹ គច្ឆតិ ន ទោសាគតឹ គច្ឆតិ ន មោហាគតឹ គច្ឆតិ ន ភយាគតឹ គច្ឆតិ ម្នាលគហបតិបុត្ត អរិយសាវក មិនលុះអគតិព្រោះស្រឡាញ់ មិនលុះអគតិ ព្រោះស្អប់ មិនលុះអគតិព្រោះល្ងង់ មិនលុះអគតិព្រោះខ្លាច ព្រោះហេតុទាំង ៤ ណា ។

ឥមេហិ ចតូហិ ឋានេហិ បាបកម្មំ ន ករោតីតិ អរិយសាវកនោះ ឈ្មោះថា មិនធ្វើបាបកម្មព្រោះហេតុ ៤ យ៉ាងនេះ ។

## អដ្ឋកថា

បទថា **បាបកម្មំ ករោតិ** (រមែងធ្វើបាបកម្ម) មានសេចក្ដីថា កាលដែលព្រះមានព្រះភាគទ្រង់ត្រាស់សម្ដែងអំពីបុគ្គលអ្នកធ្វើហើយ អ្នកមិនធ្វើក៏រមែងប្រាកដដូច្នេះ សូម្បីទ្រង់តាំងមាតិកាថា ព្រះអរិយសាវករមែងមិនធ្វើបាបកម្ម ព្រោះព្រះអង្គទ្រង់ឈ្លាសក្នុងទេសនា ។ ព្រះអង្គត្រូវសម្ដែងអំពីបុគ្គលអ្នកធ្វើមុន ទើបត្រាស់បទនេះថា បុគ្គលរមែងធ្វើកម្មលាមក ។

ក្នុងបទទាំងឡាយនោះ បទថា **ឆន្ទាគតឹ គច្ឆន្តោ** (លុះអគតិ ព្រោះស្រឡាញ់) គឺដោយសារតែសេចក្តីស្រឡាញ់ ក៏ធ្វើនូវអំពើដែលមិនគួរធ្វើ ។ សូម្បីក្នុងបទដទៃទៀត ក៏មានទំនងដូចគ្នានេះដែរ ។

ក្នុងបទទាំងឡាយនោះ ជនណាធ្វើអ្នកដែលមិនមែនជាម្ចាស់ទ្រព្យ ឲ្យជាម្ចាស់ទ្រព្យ ដោយអំណាចនៃសេចក្តីគាប់ចិត្តថា អ្នកនេះជាមិត្តរបស់អញ ជាអ្នកគាប់ចិត្តនឹងអញ ជាអ្នកគប់រកអញ ជាញាតិជិតស្និទ្ធរបស់អញ ឬឲ្យនូវរបស់ជាទីពេញចិត្តដល់អញ ដូច្នេះ ជននោះឯង ជាអ្នកលុះដោយអំណាចឆន្ទាគតិ ឈ្មោះថា រមែងធ្វើនូវបាបកម្ម ។

ជនណា ធ្វើអ្នកដែលមិនមែនជាម្ចាស់ទ្រព្យ ឲ្យជាម្ចាស់ទ្រព្យ ដោយអំណាចនៃការមានពៀរនឹងគ្នាជាប្រក្រតីថា អ្នកនេះ ជាអ្នកមានពៀរជាមួយនឹងអញ ដូច្នេះ ឬ ដោយអំណាចនៃសេចក្តីក្រោធដែលកើតឡើងក្នុងខណៈនោះ ជននោះឯង ជាអ្នកលុះដោយអំណាចទោសាគតិ ឈ្មោះថា រមែងធ្វើនូវបាបកម្ម ។

ម្យ៉ាងទៀត ជនណា ព្រោះភាពជាអ្នកមានបញ្ញាទន់ខ្សោយ ជាអ្នកល្ងង់ខ្លៅ ពោលពាក្យមិនសមហេតុ ធ្វើបុគ្គលដែលមិនមែនជាម្ចាស់ទ្រព្យ ឲ្យជាម្ចាស់ទ្រព្យ ជននោះឯងជាអ្នកលុះដោយអំណាចមោហាគតិ ឈ្មោះថា រមែងធ្វើនូវបាបកម្ម ។

មួយទៀត ជនណា មានសេចក្តីភ័យខ្លាចថា អ្នកនេះជាបរិវារព្រះរាជា ឬជាគ្នីគ្នារបស់សត្រូវ អាចនឹងធ្វើនូវសេចក្តីវិនាសដល់អញ ដូច្នេះ ហើយធ្វើបុគ្គលដែលមិនមែនជាម្ចាស់ទ្រព្យ ឲ្យជាម្ចាស់ទ្រព្យ ជននោះឯង ជាអ្នកលុះដោយអំណាចភយាគតិ ឈ្មោះថា រមែងធ្វើនូវបាបកម្ម ។

ន័យម្យ៉ាងទៀត ជនណា កាលបើបែងចែកនូវរបស់ឯណានីមួយ រមែងឲ្យរបស់លើស របស់ពិសេស ដោយអំណាចនៃសេចក្តីស្រឡាញ់ថា បុគ្គលនេះជាសម្លាញ់របស់អញ ឬស៊ីរួម ដេករួមជាមួយនឹងអញ ។ រមែងឲ្យរបស់បន្ទាប់បន្សំ (អន់ ឬតិច) ដោយអំណាចនៃសេចក្តីក្រោធថា អ្នកនេះ ជាសត្រូវរបស់អញ ដូច្នេះ, ព្រោះតែភាពល្ងង់ខ្លៅមិនដឹងនូវរបស់ដែលឲ្យហើយ និងមិនទាន់ឲ្យ រមែងឲ្យ

របស់តិចដល់បុគ្គលខ្លះ ឲ្យរបស់ច្រើនដល់អ្នកខ្លះទៀត, មានសេចក្តីភ័យខ្លាចថា បុគ្គលនេះ កាលបើអញមិនឲ្យរបស់នេះ នឹងធ្វើនូវសេចក្តីវិនាសដល់អញ រមែងឲ្យរបស់លើសរបស់ពិសេសដល់បុគ្គលពួកខ្លះ ជននោះ ជាអ្នកមានអគតិធម៌ ៤ យ៉ាងនេះ ក៏រមែងលុះដោយអំណាចអគតិធម៌មានឆន្ទាគតិជាដើមតាមលំដាប់ ឈ្មោះថា រមែងធ្វើនូវបាបកម្ម ។ ប៉ុន្តែ ព្រះអរិយសាវក សូម្បីត្រូវអស់ជីវិតក៏មិនលុះក្នុងអគតិធម៌ទាំងឡាយ មានឆន្ទាគតិជាដើមឡើយ ព្រោះហេតុដូច្នោះ ទើបលោកពោល ថា **ព្រះអរិយសាវកមិនធ្វើនូវបាបកម្មដោយឋានៈ ៤ យ៉ាងនេះ** ។

បទថា **និហីយតិ យសោ តស្ស** (យសរបស់អ្នកនោះ រមែងសាបសូន្យទៅ) ដោយសេចក្តីថា ទាំងកិត្តិយសនិងបរិវារយសរបស់អ្នកដែលមានអគតិធម៌នោះ រមែងវិនាស គឺថា រមែងសាបសូន្យ ។

# និគមគាថា

## បិដក

ឥទមវោច ភគវា ឥទំ វត្វាន សុគតោ អថាបរំ ឯតទវោច សត្ថា ព្រះមានព្រះភាគបានសម្ដែងពាក្យនេះ ហើយ ព្រះសុគតជាសាស្ដាលុះទ្រង់សម្ដែងពាក្យនេះហើយ ទើបសម្ដែងគាថាព័ន្ធនេះតទៅទៀតថា

ឆន្ទា ទោសា ភយា មោហា
យោ ធម្មំ អតិវត្តតិ
និហីយតិ តស្ស យសោ
កាឡបក្ខេវ ចន្ទិមា ។

អ្នកណា ប្រព្រឹត្តកន្លងធម៌ ព្រោះសេចក្ដីស្រឡាញ់ ព្រោះសេចក្ដីស្អប់ ព្រោះសេចក្ដីខ្លាច ព្រោះសេចក្ដីវង្វេង យសរបស់អ្នកនោះ រមែងសាបសូន្យទៅ ដូចព្រះចន្ទខាងរនោច ។

ឆន្ទា ទោសា ភយា មោហា
យោ ធម្មំ នាតិវត្តតិ
អាបូរតិ តស្ស យសោ
សុក្កបក្ខេវ ចន្ទិមាតិ ។

អ្នកណា មិនប្រព្រឹត្តកន្លងធម៌ ព្រោះសេចក្ដីស្រឡាញ់ ព្រោះសេចក្ដីស្អប់ ព្រោះសេចក្ដីខ្លាច ព្រោះសេចក្ដីវង្វេង យសរបស់អ្នកនោះ រមែងពេញបរិបូណ៌ ដូចព្រះចន្ទខាងខ្នើត ។

# អបាយមុខ ៦
## បិដក

កតមានិ ឆ គោគានំ អបាយមុខានិ ន សេវតិ អរិយសាវក មិនសេពនូវធម៌ ជាប្រធាននៃសេចក្ដីវិនាសភោគៈ ៦ យ៉ាង ដូចម្ដេចខ្លះ ។

សុរាមេរយមជ្ជប្បមាទដ្ឋានានុយោគោ ខោ គហបតិបុត្ត ភោគានំ អបាយមុខំ វិកាលវិសិខាចរិយានុយោគោ ភោគានំ អបាយមុខំ សមជ្ជាភិចរណំ ភោគានំ អបាយមុខំ

ជូតប្បមាទដ្ឋានានុយោគោ ភោគានំ អបាយមុខំ បាបមិត្តា-នុយោគោ ភោគានំ អបាយមុខំ អាលស្សានុយោគោ ភោគានំ អបាយមុខំ ម្នាលគហបតិបុត្ត កិរិយាប្រកបរឿយ ៗ នូវការផឹកទឹកស្រវឹង គឺសុរានិងមេរ័យ ដែលជាហេតុជាទីតាំងនៃសេចក្ដីប្រមាទ ជាប្រធាននៃសេចក្ដីវិនាសភោគៈ ១ បានប្រកបរឿយ ៗ នូវការត្រាច់ទៅតាមច្រកល្ហកខុសកាល ជាប្រធាននៃសេចក្ដីវិនាសភោគៈ ១ ការដើរមើលមហោស្រព ជាប្រធាននៃសេចក្ដីវិនាសភោគៈ ១ ការប្រកបរឿយ ៗ នូវហេតុជាទីតាំងនៃសេចក្ដីប្រមាទ គឺលេងល្បែងភ្នាល់ ជាប្រធាននៃសេចក្ដីវិនាសភោគៈ ១ ការសេពគប់នូវបាបមិត្ត ជាប្រធាននៃសេចក្ដីវិនាសភោគៈ ១ ការប្រកបរឿយ ៗ នូវសេចក្ដីខ្ជិល ជាប្រធាននៃសេចក្ដីវិនាសភោគៈ ១ ។

## អដ្ឋកថា

សុរា ៥ ប្រភេទ គឺ **បូវសុរា** សុរាធ្វើដោយនំ **បិដ្ឋសុរា** សុរាធ្វើដោយម្សៅ **ឱទនសុរា** សុរាធ្វើដោយបាយ

**កិណ្ណប្បក្ខិត្តា** សុរាដែលគេដាក់ពូជសុរា **សម្ភារសំយុត្តា** សុរាដែលគេប្រកបផ្សំដោយគ្រឿងផ្សំផ្សេងៗ ឈ្មោះថា សុរា ចុះក្នុងបទនេះថា **សុរាមេរយមជ្ជប្បមាទដ្ឋានានុយោគោ** ។

របស់ត្រាំ ៥ ប្រភេទ គឺ **បុប្ផាសវោ** ទឹកត្រាំដែលគេធ្វើដោយផ្កាឈើ **ផលាសវោ** ទឹកត្រាំដែលគេធ្វើដោយផ្លែឈើ **មធ្វាសវោ** ទឹកត្រាំដែលគេធ្វើដោយផ្លែចន្ទន៍ ឬគេធ្វើដោយទឹកឃ្មុំ **គុឡាសវោ** ទឹកត្រាំដែលគេធ្វើដោយទឹកអំពៅ **សម្ភារសំយុត្តា** ទឹកត្រាំដែលគេប្រកបព្រមដោយគ្រឿងផ្សំផ្សេង ៗ ឈ្មោះថា **មេរ័យ** ។ ទាំងសុរាទាំងមេរ័យ ឈ្មោះថា **មជ្ជៈ** ព្រោះជារបស់ធ្វើឲ្យស្រវឹង ។

បទថា **បមាទដ្ឋានំ** ប្រែថា ជាហេតុ ជាទីតាំងនៃសេចក្ដីប្រមាទ ។ បទនេះ ជាឈ្មោះរបស់ចេតនា នៃអ្នកផឹកទឹកស្រវឹង ។

បទថា **អនុយោគោ** (ប្រកបរឿយ ៗ) អធិប្បាយថា ប្រកបរឿយ ៗ គឺធ្វើញយ ៗ នូវការផឹកទឹកស្រវឹង គឺ សុរានិងមេរ័យដែលជាហេតុជាទីតាំងនៃសេចក្ដីប្រមាទ ។ ក៏ព្រោះថា កាលបើជននោះអ្នកប្រកបរឿយ ៗ នូវការផឹកនូវទឹក

ស្រវឹងនេះ ភោគៈទាំងឡាយដែលកើតឡើងហើយ រមែងវិនាសទៅវិញ ទាំងភោគៈដែលមិនទាន់កើតឡើង ក៏មិនអាចកើតឡើងបាន ដូច្នោះ ទើបលោកពោលថា ជាប្រធាននៃសេចក្តីវិនាសនូវភោគៈទាំងឡាយ ។

បទថា **វិកាលវិសិខាចរិយានុយោគោ** មានសេចក្តីថា ភាពជាអ្នកត្រាច់ទៅតាមច្រកល្ហកខុសកាល ។

បទថា **សមជ្ជាភិចរណំ** (ការដើរមើលមហោស្រព) គឺទៅមើលមហោស្រព ដោយអំណាចនៃការមើល ការរាំរែកជាដើម ។

បទថា **អាលស្សានុយោគោ** (ការប្រកបរឿយ ៗ នូវសេចក្តីខ្ជិលច្រអូស) អធិប្បាយថា ព្រោះភាវៈជាអ្នកប្រកបដោយសេចក្តីខ្ជិលច្រអូសតាមផ្លូវកាយ ។

## ទោសនៃការផឹកទឹកស្រវឹង ៦ យ៉ាង

## បិដក

ឆ ខោមេ គហបតិបុត្ត អាទីនវា សុរាមេរយមជ្ជប្បមាទដ្ឋានានុយោគេ សន្ទិដ្ឋិកា ធនជានិ កលហប្ប-

វឌ្ឍនី រោគានំ អាយតនំ អកិត្តិសញ្ជននី ហិរិកោបិននិទុំសនី បញ្ញាយ ទុព្វលីករណី ត្វេវ ឆដ្ឋំ បទំ ភវតិ ម្នាល គហបតិបុត្ត ទោសក្នុងកិរិយាប្រកបរឿយ ៗ នូវការផឹកទឹកស្រវឹង គឺសុរានិងមេរ័យ ដែលជាហេតុជាទីតាំងនៃសេចក្ដីប្រមាទនេះ មាន ៦ យ៉ាង គឺ វិនាសទ្រព្យដែលឃើញជាក់ស្តែងខ្លួនឯង ១ ការកឲ្យកើតជម្លោះ ១ ហេតុនាំឲ្យកើតរោគទាំងឡាយ ១ ការនាំឲ្យខូចឈ្មោះ ១ ការបង្ហាញកេរ្តិ៍ខ្មាស ១ ហេតុជាគម្រប់ ៦ គឺ ធ្វើបញ្ញាឲ្យមានកម្លាំងថយ ១ ។

**ឆមេ ខោ គហបតិបុត្ត ឆ អាទីនវា សុរាមេរយមជ្ជប្បមាទដ្ឋានានុយោគេ** ម្នាលគហបតិបុត្ត ទោសក្នុងការប្រកបរឿយ ៗ នូវការផឹកទឹកស្រវឹង គឺសុរានិងមេរ័យ ដែលជាហេតុជាទីតាំងនៃសេចក្ដីប្រមាទមាន ៦ យ៉ាងនេះឯង ។

# អដ្ឋកថា

ព្រះមានព្រះភាគជាម្ចាស់ ទ្រង់តាំងមាតិការបស់ហេតុនៃសេចក្ដីវិនាសទាំង ៦ ប្រការយ៉ាងនេះហើយ ពេលចែកមាតិកាទាំងនោះ ទើបទ្រង់ត្រាស់ថា ម្នាលគហបតិបុត្តទោសទាំង ៦ ប្រការនេះឯង ដូច្នេះជាដើម ។

ក្នុងបទទាំងឡាយនោះ បទថា **សន្ទិដ្ឋិកា** (ដែលឃើញជាក់ស្ដែងខ្លួនឯង) គឺ ការៈជាអ្នកនៅក្នុងលោកនេះដែលខ្លួនឃើញដោយផ្ទាល់ ។

បទថា **ធនជានិ** ប្រែថា វិនាសទ្រព្យ ។

បទថា **កលហប្បវឌ្ឍនី** (ការកឲ្យកើតជម្លោះ) ដោយសេចក្ដីថា បង្កវិវាទដោយវាចានិងជម្លោះដោយការប្រើដៃជាដើម ។

បទថា **រោគានំ អាយតនំ** (ជាហេតុនាំឲ្យកើតរោគទាំងឡាយ) មានសេចក្ដីថា ទឹកស្រវឹង ជាទីតាំងនៃរោគទាំងឡាយ មានរោគភ្នែកជាដើម ។

បទថា **អកិត្តិសញ្ជននី** (ការនាំឲ្យខូចឈ្មោះ) ដោយសេចក្ដីថា បុគ្គលដែលផឹកទឹកស្រវឹងហើយ រមែង

ប្រហារ សូម្បីមាតា ឬបិតាបាន រមែងពោលពាក្យដែលមិនគួរពោលដោយច្រើន រមែងធ្វើរឿងដែលមិនគួរធ្វើ ដោយហេតុនេះ ជនទាំងឡាយតែងតិះដៀលខ្លះ ថ្កោលទោសខ្លះ កាត់អវយវៈមានដៃនិងជើងជាដើមខ្លះ នាំឲ្យខូចឈ្មោះក្នុងលោកនេះខ្លះ ក្នុងលោកខាងមុខខ្លះ ។ ព្រោះហេតុនោះទើបទឹកស្រវឹងនោះ ឈ្មោះថា ជាហេតុនាំឲ្យខូចឈ្មោះរបស់ជនទាំងនោះ ។

បទថា ***ហិរិកោបិននិទុំសនី*** (ការបង្ហាញកេរ្តិ៍ខ្មាស) ដោយសេចក្តីថា ទឹកស្រវឹង តែងញុំាងសេចក្តីអៀនខ្មាសដែលគួរបិទបាំងឲ្យកម្រើកឲ្យវិនាស ព្រោះហេតុនោះ ទើបលោកពោលថា ***ញុំាងហិរិឲ្យកម្រើក*** ដូច្នេះ ។ ម្យ៉ាងទៀត ជនអ្នកស្រវឹងស្រា អាចបើកអវយវៈនោះ ៗ ហើយដើរទៅបាន ព្រោះហេតុនោះទើបលោកពោលថា ទឹកស្រវឹង ជាហេតុមិនឲ្យដឹងនូវការអៀនខ្មាស ***ព្រោះធ្វើហិរិឲ្យកម្រើក*** ។

បទថា ***បញ្ញាយ ទុព្វលីករណី*** (ធ្វើឲ្យបញ្ញាមានកម្លាំងថយ) ដោយសេចក្តីថា ទឹកស្រវឹង រមែងធ្វើនូវសេចក្តីដឹងថា សត្វមានកម្មជារបស់ខ្លួនឲ្យទន់ខ្សោយ ដូចបញ្ញា

របស់ព្រះសាគតត្ថេរជួប្នោះ ។ ព្រោះហេតុនោះ ទើបលោកពោលថា ទឹកស្រវឹង ជាហេតុធ្វើឲ្យបញ្ញាមានកម្លាំងថយ ។ ប៉ុន្តែ ទឹកស្រវឹង មិនអាចធ្វើអ្នកដែលបានមគ្គប្បញ្ញាឲ្យទន់ខ្សោយបានទេ ព្រោះទឹកស្រវឹង រមែងមិនចូលទៅក្នុងមាត់របស់អ្នកដែលបានបន្ទះមគ្គហើយទេ ។

បទថា ឆដ្ឋំ បទំ ប្រែថា ហេតុជាគម្រប់ ៦ ។

## ទោសនៃការដើរលេងខុសកាល ៦ យ៉ាង

## បិដក

ឆ ខោមេ គហបតិបុត្ត អាទីនវា វិកាលវិសិខាចរិយានុយោគេ អត្តាបិស្ស អគុត្តោ អរក្ខិតោ ហោតិ បុត្តទារោបិស្ស អគុត្តោ អរក្ខិតោ ហោតិ សាបតេយ្យំបិស្ស អគុត្តំ អរក្ខិតំ ហោតិ សង្កិយោ ច ហោតិ តេសុ តេសុ ឋានេសុ អភូតវចនញ្ច តស្មឹ រូហតិ ពហូនញ្ច ទុក្ខធម្មានំ បុរក្ខិតោ ហោតិ ម្នាលគហបតិបុត្ត ទោសក្នុងការប្រកបរឿយ ៗ នូវការដើរទៅតាមច្រកល្ហកខុសកាលនេះមាន ៦ យ៉ាង គឺអ្នកនោះឈ្មោះថា មិនគ្រប់គ្រងមិនរក្សាខ្លួន ១

អ្នកនោះឈ្មោះថា មិនគ្រប់គ្រងមិនរក្សាកូនប្រពន្ធ ១ អ្នកនោះឈ្មោះថា មិនគ្រប់គ្រងមិនរក្សាទ្រព្យសម្បត្តិ ១ សេចក្តីរង្កៀសតែងកើតមានក្នុងកន្លែង (ដែលខ្លួនទៅដល់) នោះ ៗ ១ ពាក្យមិនពិតតែងធ្លាក់មកត្រូវលើបុគ្គលនោះ ១ បុគ្គលនោះឈ្មោះថា បំពេញនូវធម៌ជាទុក្ខច្រើន ១ ។

**ឆមេ ខោ គហបតិបុត្ត ឆ អាទីនវា វិកាល-វិសិខាចរិយានុយោគេ** ម្នាលគហបតិបុត្ត ទោសក្នុងការប្រកបរឿយ ៗ នូវកិរិយាត្រាច់ទៅតាមច្រកល្ហកខុសកាល មាន ៦ យ៉ាងនេះឯង ។

## អដ្ឋកថា

បទថា **អត្តាបិស្ស អគុត្តោ អរក្ខិតោ ហោតិ** (មិនគ្រប់គ្រងមិនរក្សាខ្លួន) អធិប្បាយថា ព្រោះបុគ្គលដែលត្រាច់ទៅខុសកាល រមែងជាន់ដង្គត់ឈើនិងបន្លាជាដើមខ្លះ ជួបពស់ខ្លះ យក្សជាដើមខ្លះ សូម្បីសត្រូវក៏អាចនឹងទៅកាន់ទីនោះ ៗ ដើម្បីលបចាប់ខ្លួន ឬសម្លាប់បាន ។ ហេតុនេះហើយទើបឈ្មោះថា មិនគ្រប់គ្រង មិនរក្សាខ្លួន ។ សូម្បីបុត្រនិង

ភរិយាក៏គិតថា បិតារបស់អញ ស្វាមីរបស់អញ ដើរលេង ក្នុងវាលាយប់ទៅហើយ ចាំបាច់និយាយថ្វីដល់អាត្មាអញ ដូច្នេះ ។ ម៉្លោះហើយ សូម្បីបុត្រធីតា និងភរិយារបស់គេ ក៏ធ្វើកិច្ចធុរៈអាក្រក់នៅខាងក្រៅផ្ទះ ដើរទៅក្នុងវាលាយប់ដែរ ហើយក៏ដល់នូវសេចក្តីវិនាស ។ សូម្បីបុត្រនិងភរិយារបស់ គេក៏មាន ឈ្មោះថា ជាអ្នកមិនគ្រប់គ្រង មិនរក្សាខ្លួន ដោយអាការយ៉ាងនេះ ។

បទថា **សាបតេយ្យំ** (ទ្រព្យសម្បត្តិ) មានសេចក្តីថា ពួកចោរបានដឹងថា ជនជាបរិវារ ព្រមទាំងបុត្តនិងភរិយា ដើរលេងក្នុងវាលាយប់អស់ហើយ ក៏ចូលទៅកាន់ផ្ទះដែល គ្មានមនុស្ស រួចនាំយករបស់ដែលខ្លួនចង់បានទៅ ។ ដោយ ហេតុនេះឯងទើបឈ្មោះថា មិនគ្រប់គ្រង មិនរក្សាទ្រព្យ សម្បត្តិ ។

បទថា **សង្កិយោ ច ហោតិ** (សេចក្តីរង្កៀស) មាន សេចក្តីថា ជាអ្នកដែលគេគួរមានសេចក្តីរង្កៀសថា ជននេះ ជាអ្នកធ្វើនូវអំពើអាក្រក់ សូម្បីអំពើនោះ ជាអំពើដែលអ្នក ដទៃធ្វើក៏ដោយ ។ ការដែលបុគ្គលនោះត្រាច់ទៅកាន់ទ្វារផ្ទះ

របស់ជនដទៃ ប្រសិនបើចោរកម្ម ឬបរទារិកកម្ម ការរំលោភបំពាន ដែលមនុស្សដទៃបានធ្វើហើយ អំពើនោះនឹងធ្លាក់មកលើបុគ្គលនោះ សូម្បីមិនមាន ឬមិនពិត ក៏រមែងប្រាកដ គឺរមែងធ្លាក់ទៅលើបុគ្គលនោះឯង ។

បទថា **ពហូនញ្ច ទុក្ខធម្មានំ** (បំពេញនូវធម៌ជាទុក្ខច្រើន) មានសេចក្ដីថា បុគ្គលណាម្នាក់ មិនអាចពណ៌នាថា សេចក្ដីទុក្ខមានប្រមាណប៉ុណ្ណោះ ទោមនស្សមានប្រមាណប៉ុណ្ណោះ របស់អ្នកដែលត្រូវគេស្អប់ខ្ពើមបានឡើយ ។ ព្រោះហេតុនោះហើយ ទើបអ្នកដែលប្រកបរឿយ ៗ នូវកិរិយាត្រាច់ទៅតាមច្រកល្ហកខុសកាលនោះ ជាអ្នកជួបប្រសព្វនូវហេតុនៃសេចក្ដីទុក្ខច្រើន គឺបានទទួលនូវសេចក្ដីលំបាកច្រើន ។

## ទោសនៃការដើរមើលល្បែងមហោស្រព ៦ យ៉ាង

## បិដក

ឆ ខោមេ គហបតិបុត្ត អាទីនវា សមជ្ជាភិចរណេ ក្វ នច្ចំ ក្វ គីតំ ក្វ វាទិតំ ក្វ អក្ខាតំ ក្វ បាណិស្សរំ ក្វ កុម្ភថូនន្តិ

ម្នាលគហបតិបុត្ត ទោសក្នុងការដើរមើលល្បែងមហោស្រព នេះ មាន ៦ យ៉ាង គឺរបាំក្នុងទីណា ក៏ទៅក្នុងទីនោះ ១ ចម្រៀងក្នុងទីណា ក៏ទៅក្នុងទីនោះ ១ ការប្រគំក្នុងទីណា ក៏ទៅក្នុងទីនោះ ១ គេប្រជុំនិយាយរឿងព្រេងឥតប្រយោជន៍ (មានរឿងចម្បាំងនៃមហាភារតៈ និងរឿងនាងសិតាជាដើម) ក្នុងទីណា ក៏ទៅក្នុងទីនោះ ១ ល្បែងវាយគង (ច្រៀងប្របកៃ) ក្នុងទីណា ក៏ទៅក្នុងទីនោះ ១ ល្បែងវាយរនាត ក្នុងទីណា ក៏ទៅក្នុងទីនោះ ១ ។

**ឥមេ ខោ គហបតិបុត្ត ឆ អាទីនវា សមជ្ជាភិចរណេ** ម្នាលគហបតិបុត្ត ទោសក្នុងកិរិយាដើរមើលល្បែងមហោស្រពមាន ៦ យ៉ាង នេះឯង ។

## អដ្ឋកថា

បទថា ក្វ នច្ចំ (របាំក្នុងទីណា ក៏ទៅក្នុងទីនោះ) ដោយសេចក្ដីថា របាំទាំងឡាយ មានការរាំរែក និងល្ខោនជាដើម មាននៅក្នុងទីណាហើយ ក៏ចូលទៅកាន់ស្រុកឬនិគមដែលមានរបាំនោះ ។ ពេលអ្នកដែលត្រៀមសម្ពត់ គ្រឿង

ក្រអូបនិងផ្កាឈើជាដើម ក្នុងថ្ងៃនេះដោយគិតថា ព្រឹកនេះ អញនឹងទៅមើលរបាំរបស់គេ ត្រូវបោលការងារពេញមួយ ថ្ងៃ ។ រមែងប្រាកដក្នុងទីនោះពេញមួយថ្ងៃខ្លះ ពីរថ្ងៃខ្លះ បីថ្ងៃខ្លះ ដោយការមើលរបាំ ។ អ្នកដែលដើរលេងយប់ សូម្បីក្នុងរដូវភ្លៀងធ្លាក់ជាដើម ក៏មិនធ្វើការសោបព្រោះ កាលបើដូច្នោះ ភោគៈទាំងឡាយដែលមិនទាន់កើតឡើង ក៏ មិនអាចកើតឡើងបាន ។ កាលបើផ្ទះមិនមានអ្នកចាំមើល ពួកចោរបានដឹងច្បាស់ថា ម្ចាស់ផ្ទះចេញទៅខាងក្រៅហើយ រមែងលួចយករបស់ដែល ខ្លួនចង់បានទៅ ។ ព្រោះហេតុ ដូច្នោះ សូម្បីភោគៈដែលកើតឡើងដល់បុគ្គលនោះហើយ ក៏រមែងវិនាសបាត់បង់ទៅវិញ ។

សូម្បីបទថា **ក្វ គីតំ** (ចម្រៀងក្នុងទីណា ក៏ទៅ ក្នុងទីនោះ) ជាដើម ក៏មានន័យដូចគ្នានេះដែរ ។ ការធ្វើ ផ្សេង ៗ របស់ជនទាំងនោះ លោកបានពោលហើយ ក្នុង ព្រហ្មជាលសូត្រ ។

# ទោសនៃការលេងល្បែងភ្នាល់ ៦ យ៉ាង

## បិដក

*ឆ ខោមេ គហបតិបុត្ត អាទីនវា ជូតប្បមាទដ្ឋានានុយោគេ ជយំ វេរំ បសវតិ ជិនោ វិត្តមនុសោចតិ សន្ទិដ្ឋិកា ធនជានិ សភាគតស្ស វចនំ ន រូហតិ មិត្តាមច្ចានំ បរិភូតោ ហោតិ អាវាហវិវាហកានំ អប្បត្ថិតោ ហោតិ អក្ខធុត្តោ បុរិសបុគ្គលោ នាលំ ទារភរណាយាតិ ម្នាលគហបតិបុត្ត ទោសក្នុងការប្រកបរឿយ ៗ នូវការលេងល្បែងភ្នាល់ ដែលជាហេតុជាទីតាំងនៃសេចក្តីប្រមាទនេះមាន ៦ យ៉ាង គឺ បុគ្គលនោះ បើឈ្នះគេតែងបានពៀរ ១ បើចាញ់គេតែងសោកស្តាយទ្រព្យសម្បត្តិ ១ វិនាសទ្រព្យសម្បត្តិដែលឃើញជាក់ស្តែងទាន់ភ្នែក ១ កាលបើទៅសាលាវិនិច្ឆ័យ គេមិនជឿស្តាប់ពាក្យ ១ ពួកមិត្តអាមាត្យតែងបោះបង់ចោល ១ ជាបុគ្គលដែលគេមិនត្រូវការដណ្តឹង ឬឲ្យកូនស្រី ព្រោះគេគិតថា បុរសបុគ្គលអ្នកលេងល្បែងភ្នាល់ មិនអាចចិញ្ចឹមប្រពន្ធបានទេ ១ ។*

ឥមេ ខោ គហបតិបុត្ត ឆ អាទីនវា ជូតប្បមាទដ្ឋានានុយោគេ ម្នាលគហបតិបុត្ត ទោសក្នុងការប្រកបរឿយ ៗ នូវការលេងល្បែងភ្នាល់ ដែលជាហេតុជាទីតាំងនៃសេចក្តីប្រមាទមាន ៦ យ៉ាងនេះឯង ។

## អដ្ឋកថា

បទថា **ជយំ វេរំ** (បុគ្គលអ្នកឈ្នះគេតែងបានពៀរ) មានសេចក្តីថា អ្នកឈ្នះរមែងកាន់យកនូវសំពត់សាដក ឬសំពត់ជួតក្បាលរបស់អ្នកដទៃ ត្រង់កណ្តាលជំនុំជន ដោយគិតថា យើងឈ្នះហើយដូច្នេះ ។ អ្នកឈ្នះរមែងបាននូវពៀរក្នុងបុគ្គលដទៃនោះថា អ្នកឯងមើលងាយអាត្មាអញត្រង់កណ្តាលជំនុំជន មិនអីទេ (ថ្ងៃក្រោយ) អញនឹងផ្តល់នូវមេរៀនខ្លះដល់ឯងមិនខាន... អ្នកឈ្នះរមែងជួបប្រសព្វនូវពៀរដូច្នេះ ។

បទថា **ជិនោ** (អ្នកចាញ់គេតែងសោកស្តាយទ្រព្យសម្បត្តិ) មានសេចក្តីថា អ្នកចាញ់រមែងសោកស្តាយចំពោះសំពត់ជួតក្បាល សំពត់សាដក ឬទ្រព្យសម្បត្តិ

មានមាសនិងប្រាក់ជាដើម ដែលអ្នកដទៃបានឈ្នះយកទៅ បុគ្គលនោះរមែងសោយសោក ព្រោះទ្រព្យនោះជាហេតុថា ទ្រព្យនោះបានមកដល់ដៃអញហើយ ស្រាប់តែរបូតពីដៃអញទៅវិញ....... ដោយអាការយ៉ាងនេះ ទើបអ្នកចាញ់គេតែងសោកស្តាយទ្រព្យសម្បត្តិ ។

បទថា **សភាគតស្ស វចនំ ន រូហតិ** (កាលបើទៅសាលាវិនិច្ឆ័យ គេមិនជឿស្តាប់ពាក្យ) មានសេចក្តីថា កាលធ្វើជាសាក្សីក្នុងសាលាវិនិច្ឆ័យ គេមិនជឿស្តាប់ពាក្យឡើយ ។ ជនទាំងឡាយនាំគ្នានិយាយថា អ្នកនេះជាអ្នកលេងបាស្កាជាអ្នកលេងល្បែងភ្នាល់ សូមអស់លោកកុំជឿពាក្យរបស់គេឲ្យសោះ ។

បទថា **មិត្តាមច្ចានំ បរិភូតោ ហោតិ** (ពួកមិត្តអាមាត្យ តែងបោះបង់ចោល) មានសេចក្តីថា ពួកមិត្តអាមាត្យនឹងនិយាយជាមួយនឹងបុគ្គលនោះយ៉ាងនេះថា ម្នាលសម្លាញ់ អ្នកឯងក៏ជាបុត្តរបស់អ្នកមានត្រកូលល្អ តែអ្នកបែរជាលេងល្បែងភ្នាល់ ជាអ្នកកាត់ទីត ជាអ្នកទម្លាយទ្វារផ្ទះអ្នកដទៃយ៉ាងនេះ មិនសមគួរដល់ជាតិនិងត្រកូល

របស់អ្នកទេ ពីពេលនេះតទៅ អ្នកមិនគប្បីធ្វើយ៉ាងនេះទៀតឡើយ ។ អ្នកលេងល្បែងភ្នាល់នោះ សូម្បីត្រូវពួកមិត្តអាមាត្យជាស់តឿនយ៉ាងនេះ ក៏មិនព្រមស្តាប់ ម៉្លោះហើយពួកមិត្តអាមាត្យទាំងនោះរមែងមិនឈរ មិនអង្គុយរួមជាមួយបុគ្គលនោះទៀតឡើយ ដោយហេតុនេះឯង ទើបអ្នកលេងល្បែងភ្នាល់ ត្រូវបានពួកមិត្តអាមាត្យបោះបង់ ។

បទថា **អាវាហវិវាហកានំ** (អាវាហៈវិវាហៈ) មានសេចក្តីថា អ្នកមានបំណងចង់នាំកូនក្រមុំចេញទៅអំពីផ្ទះរបស់គេ ឈ្មោះថា អាវាហៈ, អ្នកមានបំណងចង់ឲ្យកូនក្រមុំនៅក្នុងផ្ទះរបស់គេ ឈ្មោះថា វិវាហៈ ។

បទថា **អប្បត្ថិតោ ហោតិ** ប្រែថា មិនមានអ្នកណាប្រាថ្នា ។

បទថា **នាលំ ទារភរណាយ** មានសេចក្តីថា អ្នកលេងល្បែងភ្នាល់ មិនអាចនឹងចិញ្ចឹមភរិយាបាន ។

# ទោសនៃការសេពគប់បាបមិត្ត ៦ យ៉ាង

## បិដក

*ឆ ខោមេ គហបតិបុត្ត អាទីនវា បាបមិត្តានុយោគេ យេ ធុត្តា យេ សោណ្ឌា យេ បិបាសា យេ នេកតិកា យេ វញ្ចនិកា យេ សាហសិកា ត្យាស្ស មិត្តា ហោន្តិ តេ សហាយា ម្នាលគហបតិបុត្ត ទោសក្នុងការសេពគប់នូវបាបមិត្តនេះមាន ៦ យ៉ាង គឺពួកជនដែលជាអ្នកលេងល្បែងភ្នាល់ ១ ជនដែលជាអ្នកលេងស្រី ១ ជនដែលជាអ្នកលេងផឹកសុរា ១ ជនដែលជាអ្នកបោកប្រាសបញ្ឆោតអ្នកដទៃដោយរបស់ក្លែង ១ ជនដែលជាអ្នកបំបាត់ប្រវញ្ចន៍អ្នកដទៃក្នុងទីចំពោះមុខ ១ ជនដែលជាអ្នកចក់ដណ្តើមទ្រព្យអ្នកដទៃ ១ ជនទាំងនោះជាមិត្តជាសម្លាញ់របស់ជននោះ ។*

*ឥមេ ខោ គហបតិបុត្ត ឆ អាទីនវា បាបមិត្តានុយោគេ ម្នាលគហបតិបុត្ត ទោសក្នុងការសេពគប់នូវបាបមិត្តមាន ៦ យ៉ាងនេះឯង ។*

# អដ្ឋកថា

បទថា **ធុត្តា** ប្រែថា អ្នកលេងល្បែងភ្នាល់ ។

បទថា **សោណ្ឌា** (ជនដែលជាអ្នកលេងស្រី) មានសេចក្តីថា នាំឲ្យជាអ្នកលេងស្រី នាំឲ្យជាអ្នកលេងកត្តនាំឲ្យជាអ្នកលេងផឹកស្រា នាំឲ្យជាអ្នកលេងមើមឈើ មានស៊ីមើមជំទ្បូងជាដើម ។

បទថា **បិបាសា** ប្រែថា អ្នកលេងផឹកស្រា ។

បទថា **នេកតិកា** គឺ ជនដែលជាអ្នកបោកប្រាសបញ្ឆោតអ្នកដទៃដោយរបស់ក្លែង ។

បទថា **វញ្ចនិកា** គឺ ជនដែលជាអ្នកបំបាត់ ប្រវញ្ចន៍អ្នកដទៃក្នុងទីចំពោះមុខ ។

បទថា **សាហសិកា** ( ជនដែលជាអ្នកឆក់ដណ្តើមទ្រព្យអ្នកដទៃ) មានសេចក្តីថា ជាអ្នកធ្វើការឆោររួមជាមួយនឹងអ្នកដែលនៅក្នុងអាគារជាមួយគ្នាជាដើម ។

បទថា **ត្យាស្ស មិត្តា ហោន្តិ** (ជនទាំងនោះជាមិត្តជាសម្លាញ់របស់ជននោះ) គឺ គេមិនត្រេកអរនឹងជនដទៃ

ដែលជាមនុស្សល្អទេ ហើយរមែងចូលទៅរកមិត្តលាមក ទាំងឡាយនោះតែម្យ៉ាង ដូចជាសត្វជ្រូកដែលគេតាក់តែង ដោយគ្រឿងក្រអូប និងផ្កាឈើជាដើម ហើយឲ្យដេកលើ ទីដ៏ល្អ ក៏នៅតែចូលទៅកាន់រណ្ដៅលាមកដូច្នោះ, ព្រោះហេតុ នោះ អ្នកសេពគប់បាបមិត្ត រមែងចូលដល់សេចក្ដីសាប សូន្យដ៏ច្រើន ទាំងក្នុងលោកនេះ ទាំងក្នុងលោកខាងមុខ ។

## ទោសនៃសេចក្ដីខ្ជិលច្រអូស ៦ យ៉ាង

## បិដក

ឆ ខោមេ គហបតិបុត្ត អាទីនវា អាលស្សា-នុយោគេ អតិសីតន្តិ កម្មំ ន ករោតិ អតិឧណ្ហន្តិ កម្មំ ន ករោតិ អតិសាយន្តិ កម្មំ ន ករោតិ អតិបាតោតិ កម្មំ ន ករោតិ អតិច្ឆាតោស្មីតិ កម្មំ ន ករោតិ អតិបិបាសិតោស្មីតិ កម្មំ ន ករោតិ តស្ស ឯវំ កិច្ចាបទេសពហុលស្ស វិហរតោ អនុប្បន្នា ចេវ ភោគា នុប្បជ្ជន្តិ ឧប្បន្នា ច ភោគា បរិក្ខយំ គច្ឆន្តិ ម្នាលគហបតិបុត្ត ទោសក្នុងការប្រកបរឿយ ៗ នូវសេចក្ដីខ្ជិលនេះមាន ៦ យ៉ាង គឺមិនធ្វើការងារ ដោយ

អាងថា ត្រជាក់ណាស់ ១ មិនធ្វើការងារ ដោយអាងថា ក្តៅណាស់ ១ មិនធ្វើការងារ ដោយអាងថា ល្ងាចណាស់ ១ មិនធ្វើការងារ ដោយអាងថា ព្រឹកណាស់ ១ មិនធ្វើការងារ ដោយអាងថា ឃ្លានណាស់ ១ មិនធ្វើការងារ ដោយអាងថា ស្រេកណាស់ ១ កាលបើជនអ្នកខ្ជិលច្រអូសនោះ ច្រើនដោយការពោលអាងកិច្ចយ៉ាងនេះ ភោគៈទាំងឡាយដែលមិនទាន់កើត ក៏ខានកើតឡើងផង ភោគៈទាំងឡាយដែលកើតឡើងហើយ ក៏ដល់នូវសេចក្តីវេចរឹលទៅវិញផង ។

**ឥមេ ខោ គហបតិបុត្ត ឆ អាទីនវា អាលស្សានុយោគេ** ម្នាលគហបតិបុត្ត ទោសក្នុងការប្រកបរឿយ ៗ នូវសេចក្តីខ្ជិលមាន ៦ យ៉ាងនេះឯង ។

## អដ្ឋកថា

បទថា **អតិសីតន្តិ កម្មំ ន ករោតិ** (មិនធ្វើការងារ ដោយអាងថា ត្រជាក់ណាស់) ដោយសេចក្តីថា ពួកមនុស្សក្រោកឡើងអំពីព្រឹកព្រលឹមនិយាយថា ម្នាលអ្នកដ៏ចម្រើន

មកយើងទៅធ្វើការជាមួយនឹងគ្នា មនុស្សក្រមិលតែងពោលថា នៅត្រជាក់ពេក ធ្ងន់នឹងបែកមិនខាន ពួកអ្នកទៅមុនចុះ ខ្ញុំនឹងទៅតាមក្រោយ ហើយក៏អង្គុយអាំងភ្លើង ។ មនុស្សទាំងនោះ ក៏ទៅធ្វើការងារបានសម្រេច ឯការងាររបស់អ្នកខ្ជិលប្រអូសរមែងវិនាស ។ សូម្បីក្នុងបទទាំងឡាយថា **អតិឧណ្ហំ** (ក្តៅណាស់) ជាដើម ក៏មានន័យដូចគ្នានេះដែរ ។

## និគមគាថា

## បិដក

ឥទមវោច ភគវា ឥទំ វត្វាន សុគតោ អថាបរំ ឯតទវោច សត្ថា ព្រះមានព្រះភាគ ទ្រង់បានសម្តែងធម៌នេះហើយ ព្រះសុគតជាសាស្តា លុះសម្តែងធម៌នេះហើយ ទ្រង់សម្តែងគាថាព័ន្ធនេះ តទៅទៀតថា

ហោតិ បានសខា នាម
ហោតិ សម្មិយសម្មិយោ
យោ ច អត្ថេសុ ជាតេសុ
សហាយោ ហោតិ សោ សខា ។

បុគ្គលខ្លះ ជាមិត្តសម្លាញ់បានតែក្នុងពេលសុរាក៏មាន បុគ្គលខ្លះថា សម្លាញ់ ៗ តែនៅចំពោះមុខក៏មាន បុគ្គលណា កាលបើប្រយោជន៍ (ខ្លួន) កើតឡើង ទើបធ្វើជាសម្លាញ់ បុគ្គលនោះមកជាសម្លាញ់នឹងខ្លួនក៏មាន ។

ឧស្សូរសេយ្យា បរទារសេវនា
វេរប្បសង្គោ ច អនត្ថតា ច
បាបា ច មិត្តា សុកទរិយតា ច
ឯតេ ឆ ឋានា បុរិសំ ធំសយន្តិ ។

កិរិយាដេកដល់ថ្ងៃ ១ ធ្វើសេវនកិច្ចនឹងប្រពន្ធអ្នកដទៃ ១ ភាវៈជាអ្នកមានពៀរច្រើន ១ ភាវៈជាអ្នកធ្វើអំពើឥតប្រយោជន៍ ១ បាបមិត្ត ១ ភាវៈជាអ្នកកំណាញ់ស្វិតស្វាញ ១ ហេតុទាំង ៦ នុ៎ះ រមែងបំផ្លាញបុរស (ឲ្យវិនាស) ។

បាបមិត្តោ បាបសខោ
បាបអាចារគោចរោ
អស្មា លោកា បរម្ហា ច
ឧភយា ធំសតេ នរោ ។

នរជនដែលមានមិត្តអាក្រក់ មានសម្លាញ់អាក្រក់ មានមារយាទនិងគោចរអាក្រក់ តែងវិនាសចាកលោកទាំងពីរ គឺ លោកនេះនិងលោកខាងមុខ ។

អក្ខិត្ថិយោ វារុណី នច្ចគីតំ
ទិវាសោប្បំ បារិចរិយា អកាលេ
បាបា ច មិត្តា សុកទរិយតា ច
ឯតេ ឆ ឋានា បុរិសំ ធំសយន្តិ ។

ល្បែងភ្នាល់ ល្បែងស្រី និងល្បែងសុរា ១ របាំនិងចម្រៀង ១ ការដេកថ្ងៃ ១ ការឲ្យគេបម្រើខ្លួនក្នុងកាលមិនគួរ ១ ពួកមិត្តអាក្រក់ ១ ការៈជាអ្នកមានសេចក្តីកំណាញ់ស្វិតស្វាញ ១ ហេតុទាំង ៦ នេះ តែងបំផ្លាញបុរសឲ្យវិនាស ។

អក្ខេហិ ទិព្វន្តិ សុរំ បិវន្តិ
យន្តិត្ថិយោ បាណសមា បរេសំ
និហីនសេវី ន ច វុឌ្ឍិសេវី
និហីយតិ កាឡបក្ខេវ ចន្ទិមា ។

ពួកជនដែលលេងល្បែងភ្នាល់ ផឹកសុរា ធ្វើសេវនកិច្ចនឹងស្រី ដែលស្មើដោយជីវិតរបស់បុរសដទៃ សេពគប់នឹងបុគ្គលថោកទាប (ខាតលក្ខណ៍) មិនសេពគប់នឹងបុគ្គលដែលមានសេចក្តីចម្រើន (គ្រប់លក្ខណ៍) យសរបស់ពួកជននោះ តែងសាបសូន្យដូចព្រះចន្ទខាងរនោច ។

យោ វារុណិ អធនោ អកិច្ចនោ
បិបាសោសិ អត្ថបាគតោ
ឧទកមិវ ឥណំ វិគាហតិ
អាកុលំ កាហតិ ខិប្បមត្តនោ ។

ជនដែលជាអ្នកផឹកសុរា ជាអ្នកខ្សត់ទ្រព្យ ជាអ្នកឥតមានកង្វល់ ដោយការងារចិញ្ចឹម

ជីវិត មានតែស្រវឹងជានិច្ច ប្រាសចាក សេចក្ដីចម្រើន លិចចុះក្នុងបំណុល ដូច ដុំថ្មលិចចុះទៅក្នុងទឹក បុគ្គលនោះ តែង ធ្វើការផោរឲ្យវិកវរដល់ខ្លួនដោយឆាប់ ។

ន ទិវាសុប្បសីលេន
រត្តិនុដ្ឋានទេស្សិនា
និច្ចំ មត្តេន សោណ្ឌេន
សក្កា អាវសិតុំ ឃរំ ។

បុគ្គលដេកក្នុងវេលាថ្ងៃជាប្រក្រតី មិន ក្រោកឡើងពីយប់ជាប្រក្រតី ជាអ្នកស្រវឹង ជានិច្ច ជាអ្នកលេងល្បែង មិនអាចនឹង គ្រប់គ្រងផ្ទះសម្បែងបាន ។

អតិសីតំ អតិឧណ្ហំ
អតិសាយមិទំ អហុ
ឥតិ វិស្សដ្ឋកម្មន្តេ
អត្ថា អច្ចេន្តិ មាណវេ ។

ប្រយោជន៍ទាំងឡាយ តែងកន្លងហួស មនុស្ស ដែលលះបង់ចោលនូវការងារ ដោយពោលអាងថា វេលានេះ ត្រជាក់ណាស់ ក្តៅណាស់ ល្ងាចណាស់ ។

*យោ ច សីតញ្ច ឧណ្ហញ្ច*
*តិណា ភិយ្យោ ន មញ្ញតិ*
*ករំ បុរិសកិច្ចានិ*
*សោ សុខា ន វិហាយតីតិ ។*

ជនណាមួយ ធ្វើនូវកិច្ចការរបស់បុរស មិនអើពើនូវត្រជាក់និងក្តៅ ក្រៃលែងជាងស្មៅ (ទៅទៀត) ជននោះ រមែងមិនសាបសូន្យចាកសេចក្តីសុខឡើយ ។

## អដ្ឋកថា

បទថា *ហោតិ បានសខា នាម* (បុគ្គលខ្លះ ជាមិត្តសម្លាញ់តែក្នុងពេលស្រាក៏មាន) មានសេចក្តីថា មនុស្សខ្លះជាមិត្តសម្លាញ់នឹងគ្នាក្នុងពេលស្រាជាទីផឹកនោះឯង ។

បទថា **សម្មិយសម្មិយោ** (បុគ្គលខ្លះថា សម្លាញ់ ៗ តែនៅចំពោះមុខក៏មាន) មានសេចក្ដីថា បុគ្គលខ្លះនិយាយថា សម្លាញ់ ៗ តែនៅចំពោះមុខប៉ុណ្ណោះ តែក្នុងទីកំបាំងមុខក្លាយជាសត្រូវ រមែងស្វែងរកតែកំហុស ។

បទថា **អត្ថេសុ ជាតេសុ** (កាលបើប្រយោជន៍ខ្លួនកើតឡើង) មានសេចក្ដីថា កាលបើកិច្ចដែលខ្លួនឃើញថា នឹងបានសម្រេចកើតឡើងហើយ ។

បទថា **វេរប្បសង្គោ** ប្រែថា ភាវៈជាអ្នកមានពៀរច្រើន ។

បទថា **អនត្ថតា** ប្រែថា ភាវៈជាអ្នកធ្វើអំពើឥតប្រយោជន៍ ។

បទថា **សុកទរិយតា** ប្រែថា ភាវៈជាអ្នកកំណាញ់ស្វិតស្វាញ ។

បទថា **ឧទកមិវ ឥណាំ វិគាហតិ** (លិចចុះក្នុងបំណុល ដូចដុំថ្មលិចចុះទៅក្នុងទឹក) មានសេចក្ដីថា បុគ្គលនោះរមែងលិចចុះក្នុងបំណុល ដូចដុំថ្មលិចចុះទៅក្នុងទឹកដូច្នោះឯង ។

បទថា **វត្តិន្ទុដ្ឋានទេសរុ្សិនា** គឺ មិនក្រោកឡើងពីយប់ជាប្រក្រតី ។

បទថា **អតិសាយមិទំ អហុ** (វេលានេះល្ងាចណាស់) គឺបុគ្គលពោលយ៉ាងនេះថា វេលានេះល្ងាចណាស់ មិនធ្វើការងារទេ ។

បទថា **ឥតិ វិស្សដ្ឋកម្មន្តេ** (លះបង់ចោលនូវការងារ) គឺ ពោលយ៉ាងនេះហើយ មិនធ្វើការងារ ។

បទថា **អត្ថា អច្ចេន្តិ មាណវេ** (ប្រយោជន៍រមែងកន្លងហួសមាណពទាំងឡាយ) មានសេចក្តីថា ប្រយោជន៍ទាំងឡាយ រមែងកន្លងហួសបុគ្គលដែលមានសភាពបែបនេះ គឺ មិនតាំងនៅក្នុងបុគ្គលទាំងឡាយនោះ ។

បទថា **តិណា ភិយ្យោ** ប្រែថា ក្រៃលែងជាងស្មៅ ។

បទថា **សោ សុខា ន វិហាយតិ** (ជននោះ រមែងមិនសាបសូន្យចាកសេចក្តីសុខឡើយ) មានសេចក្តីថា បុរសនោះ មិនខ្វះខាតសេចក្តីសុខឡើយ រមែងជាអ្នកសម្បូណ៌ដោយសេចក្តីសុខតែម្យ៉ាង ។

ព្រះមានព្រះភាគជាម្ចាស់ ទ្រង់សម្ដែងនូវសេចក្ដីនេះដោយយកថាមគ្គនេះ ។ អ្នកគ្រប់គ្រងផ្ទះ មិនគួរធ្វើអំពើនេះឈ្មោះនៃសេចក្ដីចម្រើន រមែងមិនមានដល់បុគ្គលអ្នកធ្វើទេ ផ្ទុយទៅវិញតែងទទួលបាននូវការតិះដៀលតែម្យ៉ាង ទាំងក្នុងលោកនេះ ទាំងក្នុងលោកខាងមុខ ។

# លក្ខណៈរបស់អមិត្ត ៤ យ៉ាង

## បិដក

ចត្តារោមេ គហបតិបុត្ត អមិត្តា មិត្តប្បដិរូបកា វេទិតព្វា អញ្ញទត្ថុហរោ អមិត្តោ មិត្តប្បដិរូបកោ វេទិតព្វោ វចីបរមោ អមិត្តោ មិត្តប្បដិរូបកោ វេទិតព្វោ អនុប្បិយភាណី អមិត្តោ មិត្តប្បដិរូបកោ វេទិតព្វោ អបាយសហាយោ អមិត្តោ មិត្តប្បដិរូបកោ វេទិតព្វោ ម្នាលគហបតិបុត្ត អ្នកត្រូវស្គាល់ពួកមនុស្សដែលមិនមែនជាមិត្ត គ្រាន់តែជាមិត្តប្លម ៤ ពួកនេះ គឺអ្នកត្រូវស្គាល់មនុស្សដែលគិតយកតែប្រយោជន៍ខ្លួនថា មិនមែនជាមិត្ត គ្រាន់តែជាមិត្តប្លម ១ អ្នកត្រូវស្គាល់មនុស្សល្អតែសម្ដីថា មិនមែនជាមិត្ត គ្រាន់តែ

ជាមិត្តប្ញម ១ អ្នកត្រូវស្គាល់មនុស្សដែលនិយាយចាក់បណ្តោយឲ្យគាប់ចិត្តថាមិនមែនជាមិត្ត គ្រាន់តែជាមិត្តប្ញម ១ អ្នកត្រូវស្គាល់មនុស្សជាសម្លាញ់ ក្នុងការវិនាសភោគៈទាំងឡាយថា មិនមែនជាមិត្ត គ្រាន់តែជាមិត្តប្ញម ១ ។

# អដ្ឋកថា

ឥឡូវនេះ ព្រះមានព្រះភាគ ដើម្បីសម្តែងអំពីមនុស្សដែលមិនមែនជាមិត្ត គ្រាន់តែជាមិត្តប្ញម ជាបុគ្គលពាលថា បុគ្គលណាធ្វើយ៉ាងនេះ សេចក្តីវិនាសរមែងកើតមានដល់បុគ្គលនោះ ឬថាភ័យផ្សេងៗ អន្តរាយទាំងឡាយ និងឧបសគ្គណានីមួយ រមែងកើតឡើងព្រោះតែអាស្រ័យបុគ្គលពាល ព្រោះហេតុដូច្នោះ មិនគួរសេពគប់បុគ្គលពាលដែលមានសភាពបែបនេះ ។ ដូច្នេះ ទើបទ្រង់ត្រាស់នូវព្រះតម្រាស់ជាដើមថា ម្នាលគហបតិបុត្ត មនុស្សដែលមិនមែនជាមិត្ត គ្រាន់តែជាមិត្តប្ញម មាន ៤ ពួកនេះ ដូច្នេះ ។

បទថា **អញ្ញទត្ថុហរោ** (និយាយរកប្រយោជន៍) មានសេចក្ដីថា ខ្លួនឯងមកហើយដោយដៃទទេ នាំយករបស់ណាទីមួយទៅដោយចំណែកម្យ៉ាង ។

បទថា **វចីបរមោ** (ល្អតែសំដី) មានសេចក្ដីថា ល្អបានត្រឹមតែសំដី ប៉ុន្តែគ្មានបានធ្វើអ្វីទាំងអស់ ។

បទថា **អនុប្បិយភាណី** (និយាយចាក់បណ្ដោយឲ្យគាប់ចិត្ត) គឺនិយាយចាក់បណ្ដោយតាម ។

បទថា **អបាយសហាយោ** (សម្លាញ់ក្នុងផ្លូវវិនាស) គឺសម្លាញ់ក្នុងផ្លូវវិនាសនៃភោគៈទាំងឡាយ ។

ព្រះមានព្រះភាគ ទ្រង់ត្រាស់សម្ដែងអំពីមនុស្សដែលមិនមែនជាមិត្ត ៤ ពួកយ៉ាងនេះហើយ គ្រាដែលទ្រង់បែងចែកនូវហេតុនីមួយ ៗ ក្នុងមនុស្សដែលមិនមែនជាមិត្តនោះដោយហេតុ ៤ យ៉ាង ទើបត្រាស់នូវពាក្យជាដើមថា ម្នាលគហបតិបុត្ត ស្ថាន ៤ យ៉ាង ដូច្នេះ ។

# លក្ខណៈមិត្តគិតតែប្រយោជន៍ខ្លួន ៤ យ៉ាង

## បិដក

*ចត្តូហិ ខោ គហបតិបុត្ត ឋានេហិ អញ្ញទត្ថុហរោ អមិត្តោ មិត្តប្បដិរូបកោ វេទិតព្វោ អញ្ញទត្ថុហរោ ហោតិ អប្បេន ពហុមិច្ឆតិ ភយស្ស កិច្ចំ ករោតិ សេវតិ អត្ថការណា ម្នាលគហបតិបុត្ត មនុស្សគិតយកតែប្រយោជន៍ខ្លួន មិនមែនជាមិត្ត គ្រាន់តែជាមិត្តប្ញម (នោះ) អ្នកត្រូវស្គាល់ដោយស្ថាន ៤ យ៉ាងគឺ មិត្តគិតយកតែប្រយោជន៍ខ្លួន ១ មិត្តប្រាថ្នាយករបស់ច្រើនដោយ (ឲ្យ) របស់តិចតួច ១ ទាល់តែមានភ័យទើបជួយធ្វើកិច្ចរបស់មិត្ត ១ សេពគប់មិត្តព្រោះហេតុតែប្រយោជន៍ ១ ។*

*ឥមេហិ ខោ គហបតិបុត្ត ចតូហិ ខោ ឋានេហិ អញ្ញទត្ថុហរោ អមិត្តោ មិត្តប្បដិរូបកោ វេទិតព្វោ ម្នាលគហបតិបុត្ត មិត្តគិតយកតែប្រយោជន៍ខ្លួន មិនមែនជាមិត្តទេ គ្រាន់តែជាមិត្តប្ញម អ្នកត្រូវស្គាល់ដោយស្ថាន ៤ យ៉ាងនេះឯង ។*

# អដ្ឋកថា

បទថា **អញ្ញទត្ថុហរោ ហោតិ** (មិត្តគិតយកតែប្រយោជន៍ខ្លួន) មានសេចក្ដីថា ជាអ្នកនាំយកទៅដោយចំណែកម្យ៉ាងប៉ុណ្ណោះ គឺជាអ្នកមានដៃទទេមកកាន់ផ្ទះរបស់មិត្ត ហើយនិយាយដល់គុណរបស់សំពត់សាដកដែលខ្លួនស្លៀក ។ បុគ្គលអ្នកនិយាយរកប្រយោជន៍ពោលថា ម្នាលសម្លាញ់ អ្នកឯណោះរមែងពោលអំពីគុណនៃផ្ទាំងសំពត់នេះនឹងអ្នកយ៉ាងក្រៃលែងដូច្នេះហើយ ខ្លួនឯងស្លៀកសំពត់ថ្មី រួចឲ្យសំពត់ដែលខ្លួនស្លៀកនោះទៅមិត្ត ។

បទថា **អប្បេន ពហុមិច្ឆតិ** (ចង់បានរបស់ច្រើនដោយឲ្យរបស់តិច) គឺ ឲ្យរបស់ឯណានីមួយដែលមានប្រមាណតិចតួច ហើយប្រាថ្នារបស់ច្រើនអំពីគេវិញ ។

បទថា **ភយស្ស កិច្ចំ ករោតិ** (ទាល់តែមានភ័យទើបជួយធ្វើកិច្ច) មានសេចក្ដីថា កាលបើភ័យកើតឡើងដល់ខ្លួន រមែងធ្វើកិច្ចនោះ ៗ ប្រៀបដូចជាទាសៈរបស់គេ អ្នកនិយាយចាក់បណ្ដោយនេះ មិនធ្វើក្នុងកាលទាំងពួងទេ

ពេលដែលមានភ័យទើបធ្វើ មិនធ្វើដោយសេចក្ដីស្រឡាញ់ឡើយ ព្រោះហេតុដូច្នោះហើយ ទើបឈ្មោះថា ជាបុគ្គលមិនមែនមិត្ត ។

បទថា *សេវតិ អត្ថការណា* (សេពគប់មិត្តព្រោះហេតុតែប្រយោជន៍) មានសេចក្ដីថា មិនសេពគប់ដោយសេចក្ដីស្រឡាញ់ស្និទ្ធស្នាលទេ គឺទាល់តែសម្លឹងឃើញនូវប្រយោជន៍ដល់ខ្លួនទើបសេពគប់ ។

## លក្ខណៈមិត្តល្អតែសំដី ៤ យ៉ាង

## បិដក

*ចតូហិ ខោ គហបតិបុត្ត ឋានេហិ វចីបរមោ អមិត្តោ មិត្តប្បដិរូបកោ វេទិតព្វោ អតីតេន បដិសន្ថរតិ អនាគតេន បដិសន្ថរតិ និរត្ថកេន សង្គណ្ហាតិ បច្ចុប្បន្នេសុ កិច្ចេសុ ព្យសនំ ទស្សេតិ* ម្នាលគហបតិបុត្ត មិត្តល្អតែសម្ដីមិនមែនជាមិត្តទេ គ្រាន់តែជាមិត្តប្លម អ្នកត្រូវស្គាល់ដោយស្ថាន ៤ យ៉ាងគឺ មិត្តទទួលរាក់ទាក់ដោយរបស់ដែលកន្លងហើយ ១ ទទួលរាក់ទាក់ដោយរបស់ដែលមិនទាន់មានមក

១ សង្គ្រោះដោយអំពើឥតប្រយោជន៍ ១ កាលកិច្ចទាំងឡាយកើតឡើងភ្លាម ៗ ក៏សម្ដែងអាងរបស់ខូចខាត ១ ។

**ឥមេហិ ខោ គហបតិបុត្ត ចតូហិ ឋានេហិ វចីបរមោ អមិត្តោ មិត្តប្បដិរូបកោ វេទិតព្វោ** ម្នាលគហបតិបុត្ត មិត្តល្អតែសម្ដី មិនមែនជាមិត្តទេ គ្រាន់តែជាមិត្តប្លម អ្នកត្រូវស្គាល់ដោយស្ថាន ៤ យ៉ាងនេះឯង ។

# អដ្ឋកថា

បទថា **អតីតេន បដិសន្ថរតិ** (ទទួលរាក់ទាក់ដោយរបស់ដែលកន្លងហើយ) មានសេចក្ដីថា មនុស្សល្អតែសម្ដី កាលបើមិត្តមកដល់ រមែងសង្គ្រោះដោយរបស់ដែលកន្លងទៅហើយយ៉ាងនេះថា ថ្ងៃមុនអ្នកមិនមក ព្រោះថ្ងៃមុន ស្រូវសន្ទូងរបស់យើងបានសម្រេចផលដ៏ច្រើនលើសលប់ ពួកខ្ញុំបានសម្រាំងទុកស្រូវសាលី ស្រូវជំណើបនិងធញ្ញជាតិជាដើមដោយច្រើន ហើយអង្គុយមើលតែផ្លូវអ្នក តែថ្ងៃនេះអស់រលីងទៅហើយ ដូច្នេះ ។

បទថា **អនាគតេន** (ទទួលរាក់ទាក់ដោយរបស់ដែលមិនទាន់មកដល់) មានសេចក្តីថា មនុស្សល្អតែសំដីនោះ រមែងសង្គ្រោះដោយរបស់ដែលមិនទាន់មកដល់យ៉ាងនេះថា ក្នុងថ្ងៃនេះ ស្រូវសន្ទូងរបស់ខ្ញុំលូតលាស់ល្អគួរឲ្យពេញចិត្ត ពេលប្រូតរួចហើយ បើបានផលពេញបរិបូណ៌ ខ្ញុំនឹងអាចសង្គ្រោះពួកអ្នកដោយស្រូវ មានស្រូវសាលីជាដើម ដូច្នេះ ។

បទថា **និរត្ថកេន** (សង្គ្រោះដោយអំពើឥតប្រយោជន៍) មានសេចក្តីថា មនុស្សល្អតែសំដី អង្គុយលើដំរី ឬលើខ្នងសេះ ពេលបានឃើញមិត្តហើយ ពោលថា ម្នាលសម្លាញ់! ចូរសម្លាញ់មកអង្គុយក្នុងទីនេះមក ។ មនុស្សល្អតែសំដីនុ៎ះ ស្លៀកសំពត់សាដកមួយផ្ទាំងដ៏ល្អ ហើយពោលថា សំពត់សាដកនេះសមនឹងសម្លាញ់ឯងណាស់ ទាស់តែខ្ញុំមិនមានសំពត់ដទៃទៀត ។ យ៉ាងនេះ ឈ្មោះថា សង្គ្រោះដោយអំពើឥតប្រយោជន៍ ។

បទថា **បច្ចុប្បន្នេសុ កិច្ចេសុ ព្យសនំ ទស្សេតិ** (កាលកិច្ចទាំងឡាយកើតឡើងភ្លាម ៗ ក៏សម្តែងអាងរបស់ខូចខាត) មានសេចក្តីថា កាលបើមានអ្នកពោលថា ខ្ញុំ

ត្រូវការរទេះ មនុស្សល្អតែសំដីពោលពាក្យជាដើមថា សោកស្តាយណាស់ កង់រទេះរបស់ខ្ញុំបាក់ទ្រុឌទ្រោមហើយ ។

## លក្ខណៈមិត្តនិយាយចាក់បណ្តោយ ៤ យ៉ាង

## បិដក

ចតូហិ ខោ គហបតិបុត្ត ឋានេហិ អនុប្បិយភាណី អមិត្តោ មិត្តប្បដិរូបកោ វេទិតព្វោ បាបកម្មំបិស្ស អនុជានាតិ កល្យាណំបិស្ស អនុជានាតិ សម្មុខស្ស វណ្ណំ ភាសតិ បរម្មុខស្ស អវណ្ណំភាសតិ ម្នាលគហបតិបុត្ត មិត្តនិយាយចាក់បណ្តោយឲ្យគាប់ចិត្ត មិនមែនជាមិត្តទេ គ្រាន់តែជាមិត្តប្លម អ្នកត្រូវស្គាល់ដោយស្ថាន ៤ យ៉ាង គឺ បើមិត្តធ្វើអំពើអាក្រក់ ក៏យល់ព្រមតាម ១ មិត្តធ្វើអំពើល្អ ក៏យល់ព្រមតាម ១ ពណ៌នាគុណមិត្តតែក្នុងទីចំពោះមុខ ១ ពោលទោសមិត្តក្នុងទីកំបាំងមុខ ១ ។

ឥមេហិ ខោ គហបតិបុត្ត ចតូហិ ឋានេហិ អនុប្បិយភាណី អមិត្តោ មិត្តប្បដិរូបកោ វេទិតព្វោ ម្នាលគហបតិបុត្ត មិត្តនិយាយចាក់បណ្តោយឲ្យគាប់ចិត្ត មិនមែន

ជាមិត្តទេ គ្រាន់តែជាមិត្តប្ញម អ្នកត្រូវស្គាល់ដោយស្ថាន ៤ យ៉ាងនេះឯង ។

## អដ្ឋកថា

បទថា **បាបកម្មំបិស្ស អនុជានាតិ** (បើមិត្តធ្វើអំពើអាក្រក់ ក៏យល់ព្រមតាម) មានសេចក្តីថា កាលបើមិត្តនិយាយថា ពួកយើងនឹងធ្វើបាណាតិបាត (គឺសម្លាប់សត្វ) ជាដើម យ៉ាងណានីមួយ ក៏និយាយចាក់បណ្តោយឲ្យគាប់ចិត្តថា ល្អហើយសម្លាញ់ ចូរធ្វើទៅ ។ សូម្បីក្នុងការធ្វើអំពើល្អ ក៏មានន័យដូចគ្នានេះដែរ ។

## លក្ខណៈមិត្តក្នុងផ្លូវវិនាស ៤ យ៉ាង

## បិដក

ចតូហិ ខោ គហបតិបុត្ត ឋានេហិ អបាយសហាយោ អមិត្តោ មិត្តប្បដិរូបកោ វេទិតព្វោ សុរាមេរយមជ្ជប្បមា-ទដ្ឋានានុយោគេ សហាយោ ហោតិ វិកាលវិសិខាចរិយា-នុយោគេ សហាយោ ហោតិ សមជ្ជាភិចរណេ សហាយោ

ហោតិ ជូតប្បមាទដ្ឋានានុយោគោ សហាយោ ហោតិ ម្នាល គហបតិបុត្ត មនុស្សជាសម្លាញ់ក្នុងផ្លូវវិនាស មិនមែនជាមិត្តទេ គ្រាន់តែជាមិត្តប្លម អ្នកត្រូវស្គាល់ដោយស្ថាន ៤ យ៉ាង គឺ ជាសម្លាញ់ក្នុងកិរិយាប្រកបរឿយ ៗ នូវការផឹកទឹកស្រវឹងគឺសុរាមេរ័យ ដែលជាទីតាំងនៃសេចក្ដីប្រមាទ ១ ជាសម្លាញ់ក្នុងការប្រកបរឿយ ៗ នូវការត្រាច់ទៅតាមច្រកល្ហកខុសកាល ១ ជាសម្លាញ់ក្នុងកិរិយាដើរមើលល្បែងមហោស្រព ១ ជាសម្លាញ់ក្នុងកិរិយាប្រកបរឿយ ៗ នូវល្បែងភ្នាល់ដែលជាហេតុជាទីតាំងនៃសេចក្ដីប្រមាទ ១ ។

ឥមេហិ ខោ គហបតិបុត្ត ចតូហិ ឋានេហិ អបាយសហាយោ អមិត្តោ មិត្តប្បដិរូបកោ វេទិតព្វោ ម្នាលគហបតិបុត្ត មនុស្សជាសម្លាញ់ក្នុងផ្លូវវិនាស មិនមែនជាមិត្តទេ គ្រាន់តែជាមិត្តប្លម អ្នកត្រូវស្គាល់ដោយស្ថាន ៤ យ៉ាងនេះឯង ។

## អដ្ឋកថា

បទថា *សហាយោ ហោតិ* (ជាសម្លាញ់) មានសេចក្ដីថា កាលមិត្តពោលថា ជនទាំងឡាយនាំគ្នាផឹកសុរាក្នុងទីនោះ អ្នកចូរមក យើងនឹងទៅក្នុងទីនោះ មនុស្សជាសម្លាញ់ក្នុងផ្លូវវិនាសឆ្លើយតបថា ល្អហើយ ហើយក៏ទៅ ។ ក្នុងបទទាំងឡាយដទៃ ក៏មានន័យដូច្នេះដែរ ។

## និគមគាថា

## បិដក

*ឥទមវោច ភគវា ឥទំ វត្វាន សុគតោ អថាបរំ ឯតទវោច សត្ថា* ព្រះមានព្រះភាគទ្រង់បានសម្ដែងសេចក្ដីនេះ លុះព្រះសុគតជាសាស្ដាសម្ដែងសេចក្ដីនេះហើយ ទើបទ្រង់សម្ដែងនូវគាថាព័ន្ធតទៅទៀតថា :

*អញ្ញទត្ថុហរោ មិត្តោ*
*យោ ច មិត្តោ វចីបរមោ*
*អនុប្បិយញ្ច យោ អាហុ*

*អបាយេសុ ច យោ សខា*

*ឯតេ អមិត្តេ ចត្តារោ*

*ឥតិ វិញ្ញាយ បណ្ឌិតោ*

*អារកា បរិវជ្ជេយ្យ*

*មគ្គំ បដិភយំ យថាតិ ។*

*បុគ្គលជាមិត្ត គិតយកតែប្រយោជន៍ខ្លួន ១ បុគ្គលជាមិត្តល្អតែសម្តី ១ បុគ្គលដែលនិយាយចាក់បណ្តោយឲ្យគាប់ចិត្ត ១ បុគ្គលដែលជាសម្លាញ់ក្នុងផ្លូវវិនាស ១ បណ្ឌិតដឹងថាបុគ្គលទាំង ៤ ពួកនុ៎ះមិនមែនជាមិត្តហើយ គប្បីចៀសវាងឲ្យឆ្ងាយ ដូចជាអ្នកដំណើរចៀសវាងផ្លូវដែលប្រកបដោយភ័យដូច្នោះ ។*

## អដ្ឋកថា

*បទថា ឥតិ វិញ្ញាយ (បណ្ឌិតដឹងច្បាស់យ៉ាងនេះហើយ) គឺដឹងយ៉ាងនេះថា ជាពួកមិត្តក្លែងក្លាយ ដូច្នេះ ។*

# លក្ខណៈរបស់មិត្តមានសន្តានល្អ ៤ យ៉ាង

## បិដក

*ចត្តារោមេ គហបតិបុត្ត មិត្តា សុហទា វេទិតព្វា ឧបការកោ មិត្តោ សុហទោ វេទិតព្វោ សមានសុខទុក្ខោ មិត្តោ សុហទោ វេទិតព្វោ អត្ថក្ខាយី មិត្តោ សុហទោ វេទិតព្វោ អនុកម្បកោ មិត្តោ សុហទោ វេទិតព្វោ ម្នាល គហបតិបុត្ត មនុស្ស ៤ ពួកនេះ អ្នកត្រូវដឹងថា ជាមិត្តមានសន្តានល្អ គឺមិត្តមានឧបការៈ អ្នកត្រូវដឹងថាជា មិត្តមានសន្តានល្អ ១ មិត្តរួមសុខទុក្ខ អ្នកត្រូវដឹងថាជាមិត្ត មានសន្តានល្អ ១ មិត្តប្រាប់ប្រយោជន៍ អ្នកត្រូវដឹងថាជា មិត្តមានសន្តានល្អ ១ មិត្តមានសេចក្តីឈឺឆ្អាល អ្នកត្រូវ ដឹងថាជាមិត្តមានសន្តានល្អ ១ ។*

## អដ្ឋកថា

*កាលព្រះមានព្រះភាគ ទ្រង់សម្តែងអំពីមិត្តអាក្រក់ ដែលមិនគួរសេពគប់យ៉ាងនេះហើយ ឥឡូវនេះទើបត្រាស់*

សម្ដែងអំពីមិត្តល្អដែលគួរសេពគប់ ដោយព្រះតម្រាស់ជាដើមថា ម្នាលគហបតិបុត្ត មនុស្ស ៤ ពួកនេះ អ្នកត្រូវដឹងថា ជាមិត្តមានសន្ដានល្អតទៅទៀត ។

ក្នុងបទទាំងឡាយនោះ បទថា សុហទា ប្រែថា មិត្តមានសន្ដានល្អ ។

# មិត្តមានឧបការៈ ៤ យ៉ាង

# បិដក

ចតូហិ ខោ គហបតិបុត្ត ឋានេហិ ឧបការកោ មិត្តោ សុហទោ វេទិតព្វោ បមត្តំ រក្ខតិ បមត្តស្ស សាបតេយ្យំ រក្ខតិ ភីតស្ស បដិសរណំ ហោតិ ឧប្បន្នេសុ កិច្ចេសុ ករណីយេសុ តទ្ទិគុណំ ភោគំ អនុប្បទេតិ ម្នាលគហបតិបុត្ត មិត្តមានឧបការៈ ជាមិត្តមានសន្ដានល្អ អ្នកត្រូវដឹងដោយស្ថាន ៤ យ៉ាងគឺ រក្សាមិត្តដែលធ្វេសប្រហែស ១ រក្សាសម្បត្តិរបស់មិត្ត ដែលធ្វេសប្រហែស ១ ជាទីពឹងពំនាក់នៃមិត្តដែលមានសេចក្ដីភិតភ័យ ១ កាលបើកិច្ចដែលត្រូវធ្វើកើតឡើងហើយ តែងជួយផ្ដល់ភោគៈជាទ្វិគុណជាងទ្រព្យដែលមិត្តត្រូវការនោះ ១ ។

ឥមេហិ ខោ គហបតិបុត្ត ចតូហិ ឋានេហិ ឧបការកោ មិត្តោ សុហទោ វេទិតព្វោ ម្នាលគហបតិបុត្ត មិត្តមានឧបការៈ ជាមិត្តមានសន្តានល្អ អ្នកត្រូវដឹងដោយស្ថាន ៤ យ៉ាងនេះឯង ។

## អដ្ឋកថា

បទថា **បមត្តំ រក្ខតិ** (រក្សាមិត្តដែលធ្វេសប្រហែស) មានសេចក្តីថា មិត្តមានឧបការៈ កាលបើឃើញមិត្តផឹកទឹកស្រវឹង ហើយដេកត្រង់កណ្តាលផ្ទះ ត្រង់ទីជិតទ្វារ ឬដេកនៅតាមផ្លូវក៏គិតថា បើមិត្តរបស់អញដេកលក់យ៉ាងនេះ អាចថានឹងមានអ្នកណាម្នាក់មកលួចយកសំពត់សម្រាប់ស្លៀក និងសំពត់សម្រាប់ដណ្តប់យកទៅបាន ដូច្នេះ ហើយក៏អង្គុយជិតមិត្តនោះ ពេលមិត្តក្រោកឡើង ក៏នាំយកទៅ ។

បទថា **បមត្តស្ស សាបតេយ្យំ** (រក្សាសម្បត្តិរបស់មិត្តដែលធ្វេសប្រហែស) មានសេចក្តីថា មិត្តមានឧបការៈគិតថា សម្ភារៈរបស់អញបានចេញទៅខាងក្រៅ

ឬផឹកទឹកស្រវឹង វេលផ្ទះមិនមានអ្នកនៅចាំ អាចជានឹងមាន អ្នកដទៃចូលមក លួចរបស់ណានីមួយយកទៅ ដូច្នេះ ក៏ចូលទៅកាន់ផ្ទះមិត្ត ហើយជួយថែទ្រព្យសម្បត្តិ ។

បទថា **ភីតស្ស** (ជាទីពឹងពំនាក់នៃមិត្ត ដែលមាន សេចក្តីភិតភ័យ) មានសេចក្តីថា កាលបើភ័យណាមួយ កើតឡើង មិត្តមានឧបការៈនិយាយថា កុំភ័យអី មានខ្ញុំ នៅហើយ អ្នកខ្លាចធ្វើអ្វី ហើយក៏កម្ចាត់បង់នូវភ័យ នោះចេញ ទៅជាទីពឹងពំនាក់បាន ។

បទថា **តទ្ធិគុណំ ភោគំ** (កាលបើកិច្ចដែលត្រូវ ធ្វើកើតឡើងហើយ តែងជួយផ្តល់ភោគៈជាទ្វិគុណជាងទ្រព្យ ដែលមិត្តត្រូវការនោះ) មានសេចក្តីថា កាលបើកិច្ចដែលគួរ ធ្វើកើតឡើងហើយ មិត្តមានឧបការៈបានឃើញមិត្តមករក ខ្លួនហើយសួរថា មានរឿងអ្វីបានជាអ្នកមក?

មិត្តរបស់ខ្លួនប្រាប់ថា មានការងារក្នុងរាជត្រកូល ។

មិត្តមានឧបការៈសួរថា តើអ្នកត្រូវការអ្វី?

មិត្តរបស់ខ្លួនប្រាប់ថា ខ្ញុំត្រូវការ ១ កហាបណៈ ។

មិត្តមានឧបការៈនិយាយថា ធម្មតាការងារក្នុងនគរនឹងមិនអាចសម្រេចដោយកហាបណៈ ១ ទេ អ្នកចូរយក ២ កហាបណៈចុះ រួចក៏បានឲ្យ ២ កហាបណៈដូចដែលបាននិយាយមែន ។

## មិត្តរួមសុខរួមទុក្ខ ៤ យ៉ាង

## បិដក

ចតូហិ ខោ គហបតិបុត្ត ឋានេហិ សមានសុខទុក្ខោ មិត្តោ សុហទោ វេទិតព្វោ គុយ្ហមស្ស អាចិក្ខតិ គុយ្ហមស្ស បរិគុយ្ហតិ អាបទាសុ ន វិជហាតិ ជីវិតំបិស្ស អត្ថាយ បរិច្ចត្តំ ហោតិ ម្នាលគហបតិបុត្ត មិត្តរួមសុខរួមទុក្ខ ជាមិត្តមានសន្តានល្អ អ្នកត្រូវដឹងដោយស្ថាន ៤ យ៉ាងគឺ ប្រាប់នូវអាថ៌កំបាំងរបស់ខ្លួនដល់មិត្ត ១ ជួយបិទបាំងនូវអាថ៌កំបាំងរបស់មិត្ត ១ មិនបោះបង់គ្នាក្នុងគ្រាមានវិបត្តិ ១ សូម្បីជីវិតក៏ហ៊ានលះបង់ដើម្បីប្រយោជន៍ដល់មិត្ត (ស៊ូប្តូរជីវិត) ១ ។

ឥមេហិ ខោ គហបតិបុត្ត ចតូហិ ឋានេហិ សមានសុខទុក្ខោ មិត្តោ សុហទោ វេទិតព្វោ ម្នាល

គហបតិបុត្ត មិត្តរមស់ខ្លួរមទុក្ខ ជាមិត្តមានសន្តានល្អ អ្នកត្រូវដឹងដោយស្ថាន ៤ យ៉ាងនេះឯង ។

## អដ្ឋកថា

បទថា **គុយ្ហមស្ស អាចិក្ខតិ** (ប្រាប់នូវអាថ៌កំបាំងរបស់ខ្លួនដល់មិត្ត) មានសេចក្តីថា មិនប្រាប់រឿងអាថ៌កំបាំងរបស់ខ្លួនដល់អ្នកដទៃ ប្រាប់ដល់មិត្តតែប៉ុណ្ណោះ ។

បទថា **គុយ្ហមស្ស បរិគុយ្ហតិ** (ជួយបិទបាំងនូវអាថ៌កំបាំងរបស់មិត្ត) មានសេចក្តីថា មិត្តរមស់ខ្លួរមទុក្ខ រមែងរក្សានូវអាថ៌កំបាំង ដែលមិត្តបាននិយាយប្រាប់មិនឲ្យមនុស្សដទៃដឹង ។

បទថា **អាបទាសុ ន វិជហាតិ** (មិនបោះបង់គ្នាក្នុងគ្រាមានវិបត្តិ) មានសេចក្តីថា កាលបើភ័យកើតឡើង មិត្តរមស់ខ្លួរមទុក្ខ រមែងមិនបោះបង់គ្នាចោលឡើយ ។

បទថា **ជីវិតំបិស្ស អត្ថាយ** (សូម្បីជីវិតក៏ហ៊ានលះបង់ដើម្បីប្រយោជន៍មិត្ត) មានសេចក្តីថា សូម្បីតែជីវិតក៏មិត្តរមស់ខ្លួរមទុក្ខ ហ៊ានលះបង់ដើម្បីប្រយោជន៍ដល់មិត្ត

បានដែរ ។ មិត្តរួមសុខរួមទុក្ខនោះ ធ្វើការងាររបស់មិត្ត ឲ្យទាល់តែបានសម្រេច ដោយមិនគិតដល់ជីវិតរបស់ខ្លួនឡើយ។

## មិត្តប្រាប់ប្រយោជន៍ ៤ យ៉ាង

## បិដក

ចតូហិ ខោ គហបតិបុត្ត ឋានេហិ អត្ថក្ខាយី មិត្តោ សុហទោ វេទិតព្វោ បាបា និវារេតិ កល្យាណេ និវេសេតិ អស្សុតំ សាវេតិ សគ្គស្ស មគ្គំ អាចិក្ខតិ ម្នាលគហបតិបុត្ត មិត្តប្រាប់ប្រយោជន៍ ជាមិត្តមានសន្តានល្អ អ្នកត្រូវដឹងដោយស្ថាន ៤ យ៉ាងគឺ ហាមមិត្តឲ្យឃ្លាតចាកអំពើអាក្រក់ ១ ដឹកនាំឲ្យមិត្ត តម្កល់នៅតែក្នុងអំពើល្អ ១ ឲ្យបានឮពាក្យដែលមិនធ្លាប់បានឮ ១ ប្រាប់ផ្លូវឋានសួគ៌ ១ ។

ឥមេហិ ខោ គហបតិបុត្ត ចតូហិ ឋានេហិ អត្ថក្ខាយី មិត្តោ សុហទោ វេទិតព្វោ ម្នាលគហបតិបុត្ត មិត្តប្រាប់ប្រយោជន៍ ជាមិត្តមានសន្តានល្អ អ្នកត្រូវដឹងដោយស្ថាន ៤ យ៉ាងនេះឯង ។

# អដ្ឋកថា

បទថា **បាបា និវារេតិ** (ហាមមិត្តឲ្យឃ្លាតចាកអំពើអាក្រក់) មានសេចក្ដីថា មិត្តប្រាប់ប្រយោជន៍ រមែងហាមថា កាលបើខ្ញុំឃើញហើយ អ្នកមិនគួរធ្វើយ៉ាងនេះទេ អ្នកចូរកុំធ្វើនូវវេរាទាំង ៥ និងអកុសលកម្មបថ ១០ ឡើយ ។

បទថា **កល្យាណេ និវេសេតិ** (ដឹកនាំមិត្តឲ្យតម្កល់នៅតែក្នុងអំពើល្អ) មានសេចក្ដីថា មិត្តប្រាប់ប្រយោជន៍ រមែងឲ្យតាំងនៅក្នុងសេចក្ដីល្អយ៉ាងនេះថា អ្នកចូរធ្វើនូវអំពើល្អ ចូរតាំងនៅក្នុងព្រះសរណគមន៍ ៣ ក្នុងសីល ៥ ក្នុងកុសលកម្មបថ ១០ ចូរឲ្យទាន ធ្វើបុណ្យ ស្ដាប់នូវព្រះធម៌ដូច្នេះ ។

បទថា **អស្សុតំ សាវេតិ** (ឲ្យបានឮពាក្យដែលមិនធ្លាប់បានឮ) គឺឲ្យស្ដាប់នូវពាក្យដែលមានន័យជ្រាលជ្រៅនាំឲ្យមានប្រាជ្ញា ដែលមិនធ្លាប់បានឮ ។

បទថា **សគ្គស្ស មគ្គំ** (ប្រាប់ផ្លូវឋានសួគ៌) មានសេចក្ដីថា មិត្តប្រាប់ប្រយោជន៍ រមែងប្រាប់ផ្លូវឋានសួគ៌

យ៉ាងនេះថា ជនទាំងឡាយធ្វើកម្មនេះ រមែងកើតក្នុងឋានសួគ៌ ។

## មិត្តមានសេចក្ដីឈឺឆ្អាល ៤ យ៉ាង
## បិដក

ចតូហិ ខោ គហបតិបុត្ត ឋានេហិ អនុកម្បកោ មិត្តោ សុហទោ វេទិតព្វោ អភវេនស្ស ន នន្ទតិ ភវេនស្ស នន្ទតិ អវណ្ណំ ភណមានំ និវារេតិ វណ្ណំ ភណមានំ បសំសតិ ម្នាលគហបតិបុត្ត មិត្តមានសេចក្ដីឈឺឆ្អាល ជាមិត្តមានសន្ដានល្អ អ្នកត្រូវដឹងដោយស្ថាន ៤ យ៉ាងគឺ ជួយព្រួយចិត្តពីព្រោះមិត្តបានសេចក្ដីវិនាស ១ ជួយត្រេកអរព្រោះមិត្តបានសេចក្ដីចម្រើន ១ ទទឹងទាស់នឹងមនុស្សដែលពោលទោសមិត្ត ១ សរសើរតែមនុស្សដែលពណ៌នាគុណមិត្ត ១ ។

ឥមេហិ ខោ គហបតិបុត្ត ចតូហិ ឋានេហិ អនុកម្បកោ មិត្តោ សុហទោ វេទិតព្វោតិ ម្នាលគហបតិបុត្ត មិត្តមានសេចក្ដីឈឺឆ្អាល ជាមិត្តមានសន្ដានល្អ អ្នកត្រូវដឹងដោយស្ថាន ៤ យ៉ាងនេះឯង ។

# អដ្ឋកថា

*បទថា **អកវេទស្ស ន នន្ទតិ** (ជួយព្រួយចិត្ត ចំពោះមិត្តមានសេចក្ដីវិនាស) មានសេចក្ដីថា មិត្តមានសេចក្ដីឈឺផ្សាល កាលបានឃើញ ឬបានឮថា សេចក្ដីវិនាសនៃបុត្តកិរិយា ឬជនជាបរិវារ ព្រោះហេតុតែការបាត់បង់ គឺសេចក្ដីមិនចម្រើនរបស់មិត្តយ៉ាងនោះ រមែងមិនពេញចិត្ត គឺមិនសប្បាយចិត្តឡើយ ។*

*បទថា **ភវេទស្ស** (ដោយបានសេចក្ដីចម្រើន) មានសេចក្ដីថា មិត្តមានសេចក្ដីឈឺផ្សាល បានឃើញបានឮអំពីសេចក្ដីចម្រើននៃស្រូវសន្ទូងជាដើម ឬការបាននូវភាពជាធំ ព្រោះសេចក្ដីចម្រើនរបស់មិត្តមានសភាពបែបនោះ រមែងសប្បាយរីករាយ ។*

*បទថា **អវណ្ណំ ភណមានំ និវារេតិ** (ទទឹងទាស់នឹងមនុស្សដែលពោលទោសមិត្ត) មានសេចក្ដីថា កាលបើមានមនុស្សនិយាយថា អ្នកនុ៎ះមានរូបអាក្រក់មិនគួរជ្រះថ្លា មានជាតិថោកទាប ឬជាអ្នកទ្រុស្ដសីល ដូច្នេះ ។ មិត្តមាន*

សេចក្តីឈឺឆ្អាល រមែងហាមអ្នកដទៃដែលពោលតិះដៀល មិត្តរបស់ខ្លួនដោយពាក្យទាំងឡាយជាដើមថា សូមអ្នកកុំនិយាយយ៉ាងនេះ មិត្តរបស់ខ្ញុំមានរូបល្អគួរឲ្យជ្រះថ្លា មានជាតិល្អ និងដល់ព្រមដោយសីល ។

បទថា **វណ្ណំ កណមានំ បសំសតិ** (សរសើរតែមនុស្សដែលពណ៌នាគុណមិត្ត) មានសេចក្តីថា កាលបើមានអ្នកនិយាយថា មនុស្សឈ្មោះនោះមានរូបល្អគួរឲ្យជ្រះថ្លា មានជាតិល្អ ដល់ព្រមដោយសីល មិត្តមានសេចក្តីឈឺឆ្អាល រមែងសរសើរមនុស្សដទៃ ដែលពោលសរសើរមិត្តរបស់ខ្លួនថា អ្នកនិយាយយ៉ាងនេះ ល្អហើយ ត្រឹមត្រូវហើយ អ្នកនោះ ពិតជាមានរូបល្អ គួរឲ្យជ្រះថ្លា មានជាតិល្អ និងដល់ព្រមដោយសីលមែន ។

# និគមគាថា

# បិដក

ឥទមវោច ភគវា ឥទំ វត្វាន សុគតោ អថាបរំ ឯតទវោច សត្ថា ព្រះមានព្រះភាគទ្រង់បានសម្តែងសេចក្តីនេះ លុះព្រះសុគតជាសាស្តាត្រាស់សេចក្តីនេះហើយ ទើបទ្រង់សម្តែងនូវពាក្យជាគាថាព័ន្ធតទៅទៀតថា :

ឧបការោ ច យោ មិត្តោ
សុខទុក្ខោ ច យោ សខា
អត្ថក្ខាយី ច យោ មិត្តោ
យោ ច មិត្តានុកម្បកោ ។
ឯតេបិ មិត្តេ ចត្តារោ
ឥតិ វិញ្ញាយ បណ្ឌិតោ
សក្កច្ចំ បយិរូបាសេយ្យ
មាតា បុត្តំវ ឱរសំ ។

មិត្តដែលមានឧបការៈ សម្លាញ់ដែលរួមសុខរួមទុក្ខ មិត្តដែលប្រាប់ប្រយោជន៍ មិត្ត

ដែលមានសេចក្ដីឈ្លាសវៃ បណ្ឌិតស្គាល់ជាក់នូវបុគ្គលទាំង ៤ ពួកនុ៎ះថា ជាមិត្តមែនទែន ហើយគប្បីចូលទៅអង្គុយជិតស្និទ្ធស្នាល ដូចជាមាតានឹងបុត្តដែលកើតពីទ្រូង ។

បណ្ឌិតោ សីលសម្បន្នោ
ជលំ អគ្គីវ ភាសតិ
ភោគេ សំហរមានស្ស
ភមរស្សេវ ឥរីយតោ ។

អ្នកប្រាជ្ញបរិបូណ៌ដោយសីល តែងរុងរឿង ដូចជាភ្លើងដែលភ្លឺដូច្នោះឯង កាលបុគ្គលសន្សំទ្រព្យ រមែងធ្វើទ្រព្យឲ្យជាគំនរដូចជាឃ្មុំដូច្នោះឯង ។

ភោគា សន្និចយំ យន្តិ
វម្មិកោវុបចីយតិ
ឯវំ ភោគេ សមាហរិត្វា
អលមត្តោ កុលេ គិហី ។

ចតុធា វិភជេ ភោគេ
សវេ មិត្តានិ គន្ថតិ
ឯកេន ភោគេ ភុញ្ជេយ្យ
ទ្វីហិ កម្មំ បយោជយេ
ចតុត្ថញ្ច និធាបេយ្យ
អាបទាសុ ភវិស្សតីតិ ។

ភោគៈទាំងឡាយ តែងដល់នូវការពូនជាគំនរ ដូចជាដំបូកដែលកណ្តៀរកពូនដូច្នោះឯង ។ គ្រហស្ថក្នុងត្រកូល បានសន្សំភោគៈទាំងឡាយយ៉ាងនេះហើយ ទើបអាច (តាំងខ្លួន) កុលបុត្រដែលចែកភោគៈ ទាំងឡាយជា ៤ ចំណែក គឺបរិភោគភោគៈទាំងឡាយ ១ ចំណែក ប្រកបការងារពីរចំណែក ទាំងតម្កល់ទុកនូវចំណែកទី ៤ ដោយក្រែងមានអន្តរាយទាំងឡាយ (ទៅខាងមុខ) កុលបុត្រនោះទើបឈ្មោះថា ចងបាច់មិត្តទាំងឡាយបាន ។

# អដ្ឋកថា

*បទថា **ផលំ អគ្គីវ ភាសតិ** (បណ្ឌិតបរិបូណ៌ដោយសីល តែងរុងរឿងដូចជាភ្លើងដែលភ្លឺដូច្នោះដែរ) មានសេចក្ដីថា រមែងរុងរឿងដូចជាភ្លើងដែលភ្លឺនៅលើកំពូលភ្នំក្នុងវេលាយប់ ។*

*បទថា **ភោគេ សំហរមានស្ស** (កាលបុគ្គលសន្សំទ្រព្យ) មានសេចក្ដីថា កាលបុគ្គលមិនបៀតបៀនខ្លួនឯងខ្លះ អ្នកដទៃខ្លះ សន្សំភោគៈដោយធម៌ ដោយស្មើ គឺធ្វើឲ្យជាគំនរ ។*

*បទថា **ភមរស្សេវ ឥរីយតោ** (ដូចជាឃ្មុំធ្វើសម្បុក) មានសេចក្ដីថា ធ្វើភោគៈឲ្យជាគំនរធំដោយលំដាប់ ដូចជាឃ្មុំដែលមិនបំផ្លាញពណ៌និងក្លិនរបស់ផ្កាឈើ នាំយកកេសរដោយចុងចំពុះខ្លះ ដោយស្លាបទាំងពីរខ្លះ ហើយធ្វើសម្បុកតាំងពីគ្មានអ្វីសោះរហូតក្លាយជាផ្ទិតដ៏ធំ ដោយលំដាប់ ។*

*បទថា **ភោគា សន្និចយំ យន្តិ** (ភោគៈទាំងឡាយតែងដល់នូវការកពូនជាគំនរ) មានសេចក្ដីថា ភោគៈ*

ទាំងឡាយរបស់បុគ្គលនោះ រមែងដល់នូវការកពូនជាគំនរ យ៉ាងណា គឺ ដូចជាដំបូកដែលកណ្តៀរកពូនឡើងដោយលំដាប់ ។ ព្រោះហេតុនោះ ទើបលោកពោលថា ដូចជាដំបូកដែលកណ្តៀរកពូនឡើង អធិប្បាយថា ភោគៈទាំងឡាយរមែងដល់នូវការកពូនជាគំនរ ដូចជាដំបូកដែលកណ្តៀរកពូនឡើង ដូច្នោះ ។

បទថា **សមាហរិត្វា** ប្រែថា ប្រមូលរួបរួមហើយ ។

បទថា **អលមត្តោ** (អ្នកមានអាង) មានសេចក្តីថា គ្រហស្ថអ្នកមានសភាពសមគួរ ឬជាអ្នកអាច ឬថាជាអ្នកប្រាជ្ញាដើម្បីគ្រប់គ្រងផ្ទះ ។ ឥឡូវនេះ កាលដែលព្រះមានព្រះភាគជាម្ចាស់ ទ្រង់ប្រទាននូវឱវាទដល់អ្នកតាំងនៅក្នុងការគ្រប់គ្រងផ្ទះ ទើបត្រាស់នូវព្រះតម្រាស់ជាដើមថា **ចតុធា វិភជេ ភោគេ** (អ្នកគ្រប់គ្រងផ្ទះគប្បីបែងចែកភោគៈជា ៤ ចំណែក ដូច្នេះ ។

ក្នុងបទទាំងឡាយនោះ បទថា **សវេ មិត្តានិ គន្ថតិ** (បុគ្គលនោះឯងរមែងចងមិត្តបាន) មានសេចក្តីថា បុគ្គលជាអ្នកគ្រប់គ្រងផ្ទះនោះ កាលបែងចែកភោគៈយ៉ាងនេះ

ឈ្មោះថា រមែងចងមិត្តទុកបាន គឺចងរឹតនូវមិត្តភាពមិនឲ្យបែកចេញពីគ្នា ។ បុគ្គលអ្នកមានភោគៈរមែងអាចរក្សានូវមិត្តបាន ពួកជនដទៃមិនអាចរក្សាបានឡើយ ។

បទថា **ឯកេន ភោគេ ភុញ្ជេយ្យ** ប្រែថា គប្បីបរិភោគភោគៈទាំងឡាយ ១ ចំណែក ។

បទថា **ទ្វីហិ កម្មំ បយោជយេ** (ប្រកបការងារ ២ ចំណែក) មានសេចក្តីថា គប្បីប្រកបការងារទាំងឡាយមានកសិកម្ម និងពាណិជ្ជកម្មជាដើម ដោយទ្រព្យ ២ ចំណែក ។

បទថា **ចតុត្ថញ្ច និធាបេយ្យ** (តម្កល់ទុក) គឺគប្បីតម្កល់ទុកនូវទ្រព្យចំណែកទី ៤ ។

បទថា **អាបទាសុ ភវិស្សតិ** (ក្រែងមានអន្តរាយទាំងឡាយ) មានសេចក្តីថា ព្រោះការងារនោះ មិនមែនចេះតែសម្រេចបានដោយល្អរហូតទេ ជួនកាលអន្តរាយក៏កើតឡើងដោយអំណាចរាជភ័យជាដើម ។ ដូច្នេះ ភោគៈគប្បីមាន ក្នុងកាលអន្តរាយទាំងឡាយកើតឡើងយ៉ាងនេះ

ព្រោះហេតុដូច្នោះ ទើបព្រះមានព្រះភាគត្រាស់ថា បុគ្គលអ្នកគ្រប់គ្រងផ្ទះគប្បីតម្កល់ទុកនូវទ្រព្យ ១ ចំណែក ដូច្នេះ ។

ក្នុងចំណែកទាំងឡាយ ៤ នេះ គប្បីតម្កល់ទុកនូវចំណែកណាមួយសម្រាប់បំពេញកុសលផង គឺក្នុងចំណែកដែលលោកពោលក្នុងបទថា **ភោគេ កុញ្ជេយ្យ**, គួរកាន់យកអំពីចំណែកនោះ បរិច្ចាគទានដល់ភិក្ខុទាំងឡាយខ្លះ ដល់មនុស្សកំព្រា និងអ្នកដើរផ្លូវជាដើមខ្លះ គួរឲ្យរង្វាន់ដល់ជាងតម្បាញ និងជាងកាត់សក់ជាដើមខ្លះ ។

ដោយយកថាមគ្គត្រឹមប៉ុណ្ណេះ ដែលព្រះមានព្រះភាគទ្រង់ប្រទាននូវឱវាទដើម្បីឲ្យវៀរចាកធម៌ដែលគួរវៀរ និងដើម្បីសេពនូវធម៌ដែលគួរសេពថា ម្នាលគហបតិបុត្តអរិយសាវកលះបង់នូវអកុសលដោយហេតុទាំងឡាយ ៤ វៀរចាកនូវផ្លូវនៃសេចក្តីវិនាសភោគៈ ដោយហេតុទាំងឡាយ ៦ សេពគប់មិត្ត ១៦ ពួកស្ថិតនៅក្នុងការគ្រប់គ្រងផ្ទះ ធ្វើការចិញ្ចឹមករិយា រមែងចិញ្ចឹមជីវិតប្រកបដោយធម៌ នឹងរមែងរុងរឿងដូចជាគំនរភ្លើង ក្នុងរវាងទេវតានិងមនុស្សទាំងឡាយឥឡូវនេះ ដើម្បីនឹងសម្តែងអំពីទិស ៦ ដែលគួរគោរព ទើប

ត្រាស់នូវព្រះតម្រាស់ជាដើមថា ម្នាលគហបតិបុត្ត អរិយ-សាវកបិទបាំងទិសទាំង ៦ ដូចម្តេច ។

# ទិស ៦

## បិដក

កថញ្ច គហបតិបុត្ត អរិយស្សាវកោ ឆទិសាបដិច្ឆាទី ហោតិ ម្នាលគហបតិបុត្ត អរិយសាវកបិទបាំងទិសទាំង ៦ ដូចម្តេច ។

ឆ ឥមា គហបតិបុត្ត ទិសា វេទិតព្វា បុរត្ថិមា ទិសា មាតាបិតរោ វេទិតព្វា ទក្ខិណា ទិសា អាចរិយា វេទិតព្វា បច្ឆិមា ទិសា បុត្តទារា វេទិតព្វា ឧត្តរា ទិសា មិត្តាមច្ចា វេទិតព្វា ហេដ្ឋា ទិសា ទាសកម្មករា វេទិតព្វា ឧបរិមា ទិសា សមណព្រាហ្មណា វេទិតព្វា ម្នាលគហបតិបុត្ត អ្នកត្រូវដឹងទិសទាំង ៦ ដូច្នេះគឺ មាតាបិតា អ្នកត្រូវដឹងថា ទិសខាងកើត ១ អាចារ្យ អ្នកត្រូវដឹងថា ទិសខាងត្បូង ១ កូននិងប្រពន្ធ អ្នកត្រូវដឹងថា ទិសខាងលិច ១ មិត្តអាមាត្យ អ្នកត្រូវដឹងថា ទិសខាងជើង ១ ទាសៈនិងកម្មករ

អ្នកត្រូវដឹងថា ទិសខាងក្រោម ១ សមណព្រាហ្មណ៍អ្នកត្រូវដឹងថា ទិសខាងលើ ១ ។

## អដ្ឋកថា

ក្នុងបទទាំងឡាយនោះ បទថា **ឆទិសាបដិច្ឆាទី** (អរិយសាវកបិទបាំងទិសទាំង ៦) មានសេចក្តីថា ព្រះមានព្រះភាគទ្រង់ស្ថិតនៅក្នុងទីដែលមិនមានភ័យអំពីទិសទាំង ៦ ជាដែនក្សេមចាកភ័យ ទើបត្រាស់ថា អរិយសាវកជាអ្នកបិទបាំងទិសទាំង ៦ ដូច្នេះ ។

ក្នុងបទទាំងឡាយជាដើមថា **បុរត្ថិមា ទិសា មាតាបិតរោ វេទិតព្វា** (មាតាបិតា អ្នកត្រូវដឹងថា ជាទិសខាងកើត) គឺគប្បីជ្រាបថា មាតាបិតាជាទិសខាងកើត ព្រោះជាអ្នកមានឧបការៈមុន ។ គ្រូអាចារ្យ ជាទិសខាងត្បូង ព្រោះជាអ្នកគួរដល់ទក្ខិណា ។ កូននិងប្រពន្ធ ជាទិសខាងលិច ដោយអំណាចជាប់តាមមកពីខាងក្រោយ ។ មិត្ត-អាមាត្យ ជាទិសខាងជើង ព្រោះកុលបុត្តនោះ អាស្រ័យនឹងមិត្តអាមាត្យ ទើបឆ្លងផុតទុក្ខពិសេសនោះ ៗ បាន ។ ទាសៈ

និងកម្មករ ជាទិសខាងក្រោម ដោយអំណាចការតាំងនៅទៀបជើង ។ សមណព្រាហ្មណ៍ ជាទិសខាងលើ ព្រោះការៈជាអ្នកតាំងនៅខាងលើដោយគុណធម៌ទាំងឡាយ ។

# មាតាបិតាជាទិសខាងកើត

## បិដក

បញ្ចហិ ខោ គហបតិបុត្ត ឋានេហិ បុត្តេន បុរត្ថិមា ទិសា មាតាបិតរោ បច្ចុបដ្ឋាតព្វា ភតោ នេសំ ភរិស្សាមិ កិច្ចំ នេសំ ករិស្សាមិ កុលវំសំ ឋបេស្សាមិ ទាយជ្ជំ បដិបជ្ជាមិ អថវា បន បេតានំ កាលកតានំ ទក្ខិណំ អនុប្បទស្សាមីតិ ម្នាលគហបតិបុត្ត មាតាបិតាជាទិសខាងកើត កូនត្រូវទំនុកបម្រុងដោយស្ថានទាំងឡាយ ៥ យ៉ាងគឺ កូនត្រូវតាំងចិត្តថា អាត្មាអញ មាតាបិតាបានចិញ្ចឹមរក្សាមកហើយ នឹងចិញ្ចឹមមាតាបិតាវិញ ១ នឹងជួយធ្វើការងាររបស់មាតាបិតា ១ ទាំងតម្កល់វង្សត្រកូល ១ ប្រតិបត្តិឲ្យជាអ្នកសមគួរទទួលទ្រព្យមត៌កបាន ១ មួយទៀតឧទ្ទិសទក្ខិណាទានដល់ មាតាបិតាដែលធ្វើកាលកិរិយាទៅកាន់បរលោកហើយ ១ ។

# អដ្ឋកថា

បទថា **ភតោ នេសំ ភរិស្សាមិ** (អាត្មាអញមាតាបិតាបានចិញ្ចឹមរក្សាមកហើយ នឹងចិញ្ចឹមមាតាបិតាវិញ) មានសេចក្តីថា អាត្មាអញដែលមាតាបិតា បំបៅដោះញ៉ាំងដៃនិងជើងឲ្យចម្រើន ជូតទឹកសំបោរឲ្យ ភ្ជូតទឹកឲ្យស្លៀកពាក់ឲ្យ ប្រដាប់តាក់តែងខ្លួនឲ្យ និងចិញ្ចឹមថ្នាក់ថ្នម .... អាត្មាអញនឹងចិញ្ចឹមមាតាបិតាទាំងនោះ ដែលចាស់ជរាដោយការលាងជើង ភ្ជូតទឹក ជូនបបរនិងបាយ ជាដើម ។

បទថា **កិច្ចំ នេសំ ករិស្សាមិ** (នឹងជួយធ្វើការងាររបស់មាតាបិតា) មានសេចក្តីថា អាត្មាអញនឹងលះបង់ការងាររបស់ខ្លួនដែលត្រូវធ្វើ ដូចជាការងារក្នុងរាជដំណាក់ជាដើម ដើម្បីជួយដល់ការងារមាតាបិតា ។

បទថា **កុលវំសំ ឋបេស្សាមិ** (ទាំងតម្កល់វង្សត្រកូល) មានសេចក្តីថា បុត្តមិនត្រូវធ្វើឲ្យមត៌ករបស់មាតាបិតា មានមាសប្រាក់និងដីស្រែជាដើមវិនាសបាត់បង់ទៅទេ។ សូម្បីការថែរក្សាទុក ក៏ឈ្មោះថា តម្កល់វង្សត្រកូលដែរ ។

ម្យ៉ាងទៀត បុត្តអ្នកធ្វើឲ្យមាតាបិតា ដែលវិនាសចាកវង្សត្រកូលដែលមិនប្រកបដោយធម៌ ឲ្យមាតាបិតាតាំងនៅក្នុងវង្សត្រកូលប្រកបដោយធម៌វិញ មិនចូលទៅកាត់ផ្តាច់នូវសេលាកកត្តជាដើម ដែលមកដល់ហើយ ដោយវង្សត្រកូលឲ្យប្រព្រឹត្តទៅ ក៏ឈ្មោះថា តម្កល់វង្សត្រកូល ។ លោកសំដៅយកសេចក្តីនេះ ទើបពោលថា អញនឹងតម្កល់វង្សត្រកូល ដូច្នេះ ។

បទថា **ទាយជ្ជំ បដិបជ្ជាមិ** (ប្រតិបត្តិឲ្យជាអ្នកសមគួរទទួលទ្រព្យមត៌កបាន) មានសេចក្តីថា មាតាបិតាទៅកាន់តុលាកា ធ្វើកូនដែលជាអ្នកមិនប្រតិបត្តិនៅក្នុងឱវាទរបស់ខ្លួន អ្នកដែលប្រតិបត្តិខុស មិនឲ្យមានឈ្មោះថាជាកូន កូនទាំងនោះ ក៏មិនសមគួរជាអ្នកទទួលមត៌កឡើយ ។ ប៉ុន្តែមាតាបិតា រមែងញ៉ាំងកូនដែលប្រតិបត្តិនៅក្នុងឱវាទ ឲ្យជាម្ចាស់ទ្រព្យ ដែលមាននៅក្នុងត្រកូល ។ លោកពោលថា អញនឹងប្រតិបត្តិ ឲ្យជាអ្នកសមគួរទទួលទ្រព្យមត៌កបាន ដោយបំណងថា អញនឹងប្រតិបត្តិយ៉ាងដូច្នេះ ។

បទថា ទក្ខិណំ អនុប្បទស្សាមិ (ឧទ្ទិសទក្ខិណាទាន ដល់មាតាបិតា ដែលធ្វើកាលកិរិយាទៅកាន់បរលោកហើយ) មានសេចក្តីថា អញនឹងធ្វើទានផ្សាយចំណែកបុណ្យឲ្យដល់ លោកទាំងនោះ រួបផ្តើមឧទ្ទិសទានដល់មាតាបិតា ចាប់តាំង ពីថ្ងៃទីបីទៅ ។

(មាតាបិតាសង្គ្រោះកូនដោយស្ថាន ៥ យ៉ាង)

## បិដក

ឥមេហិ ខោ គហបតិបុត្ត បញ្ចហិ ឋានេហិ បុត្តេន បុរត្ថិមា ទិសា មាតាបិតរោ បច្ចុបដ្ឋិតា បញ្ចហិ ខោ ឋានេហិ បុត្តំ អនុកម្បន្តិ បាបា និវារេន្តិ កល្យាណេ និវេសេន្តិ សិប្បំ សិក្ខាបេន្តិ បដិរូបេន ទារេន សញ្ញោជេន្តិ សមយេ ទាយជ្ជំ និយ្យាទេន្តិ ម្នាលគហបតិបុត្ត មាតាបិតាជាទិសខាងកើត ដែលកូនទំនុកបម្រុង ដោយស្ថានទាំងឡាយ ៥ យ៉ាងនេះ ឯងហើយ រមែងអនុគ្រោះកូន ដោយស្ថានទាំងឡាយ ៥ យ៉ាងវិញដូច្នេះគឺ ហាមឃាត់កូនចាកអំពើអាក្រក់ ១ ឲ្យកូន តម្កល់នៅតែក្នុងអំពើល្អ ១ ឲ្យកូនរៀនសូត្រសិល្បសាស្ត្រ

១ ដណ្ដឹងកិរិយាស្វាមីសមគួរឲ្យ ១ ចែកទ្រព្យឲ្យកូនក្នុងសម័យគួរ ១ ។

ឥមេហិ ខោ គហបតិបុត្ត បញ្ចហិ ឋានេហិ បុត្តេន បុរត្ថិមា ទិសា មាតាបិតរោ បច្ចុបដ្ឋិតា ឥមេហិ បញ្ចហិ ឋានេហិ បុត្តំ អនុកម្បន្តិ ឯវមស្ស ឯសា បុរត្ថិមា ទិសា បដិច្ឆន្នា ហោតិ ខេមា អប្បដិភយា ម្នាលគហបតិបុត្ត មាតាបិតាជាទិសខាងកើត ដែលកូនទំនុកបម្រុងដោយស្ថាន ៥ យ៉ាងនេះឯងហើយ រមែងអនុគ្រោះកូនដោយស្ថាន ៥ យ៉ាងនេះ ទិសខាងកើតនោះ ដែលកូនបានបិទបាំងហើយ ជាទិសមានសេចក្ដីក្សេម ឥតមានភយន្ដរាយយ៉ាងនេះ ។

# អដ្ឋកថា

បទថា បាបា និវារេន្តិ (ហាមឃាត់កូនចាកអំពើអាក្រក់) មានសេចក្ដីថា មាតាបិតាពោលអំពីទោសដែលប្រព្រឹត្តទៅក្នុងបច្ចុប្បន្ន និងភពខាងមុខរបស់បាណាតិបាតជាដើម ហើយហាមថា នែកូន! ចូរអ្នកកុំធ្វើនូវអំពើបែបនេះ

បែបនេះឡើយ ដូច្នេះតិះដៀលកូនដែលបានធ្វើហើយ ។

បទថា **កល្យាណេ និវេសេន្តិ** (ឲ្យតម្កល់នៅតែក្នុងអំពើល្អ) មានសេចក្តីថា មាតាបិតា សូម្បីត្រូវឲ្យទ្រព្យសម្បត្តិ ដូចលោកអនាថបិណ្ឌិកសេដ្ឋី ដើម្បីឲ្យកូនតាំងនៅក្នុងការសមាទានសីលជាដើម ។

បទថា **សិប្បំ សិក្ខាបេន្តិ** (ឲ្យរៀនសិល្បសាស្ត្រ) មានសេចក្តីថា មាតាបិតាបានដឹងថា បុត្តតាំងនៅក្នុងឱវាទរបស់ខ្លួនហើយ ញ៉ាំងកូនឲ្យសិក្សាសិល្បសាស្ត្រ មានការសិក្សាគណិតសាស្ត្រឲ្យដល់ថ្នាក់ខ្ពស់ជាដើម តាមវង្ស-ត្រកូល ។

បទថា **បដិរូបេន** (ដណ្តឹង ភរិយា ស្វាមីសមគួរឲ្យ) គឺសមគួរដោយត្រកូល សីល និងរូបជាដើម ។

បទថា **សមយេ ទាយជ្ជំ និយ្យាទេន្តិ** (ចែកទ្រព្យឲ្យកូនក្នុងសម័យគួរ) មានសេចក្តីថា ចែកទ្រព្យឲ្យកូនក្នុងសម័យដែលសមគួរ ។ ក្នុងបទនោះ សម័យមាន ២ យ៉ាងគឺ និច្ចសម័យ ១ កាលសម័យ ១ ។

មាតាបិតាឲ្យដោយពាក្យថា ចូរកូនប្រញាប់ប្រញាល់កាន់យកនូវរបស់ដែលគួរកាន់យក ចូររាយនូវការចំណាយរបស់អ្នក ចូរធ្វើនូវកុសល ដោយការចំណាយនេះ ដូច្នេះឈ្មោះថា ឲ្យក្នុងនិច្ចសម័យ គឺឲ្យជានិច្ច ។

មាតាបិតា រមែងឲ្យក្នុងសម័យកាត់ក្នុងសក់រៀបមង្គលការជាដើម ឈ្មោះថា ឲ្យក្នុងកាលសម័យ ។

ម្យ៉ាងទៀត មាតាបិតាកាលឲ្យដល់បុត្តដែលឈឺដេកលើគ្រែទៀបនឹងស្លាប់ដោយពាក្យថា ចូរកូនធ្វើកុសលដោយទ្រព្យនេះ ក៏ឈ្មោះថា ឲ្យក្នុងកាលសម័យដែរ ។

បទថា **បដិច្ឆន្នា ហោតិ** (ទិសខាងកើតនោះ ដែលកូនបានបិទបាំងហើយ) មានសេចក្ដីថា ទិសខាងកើតដែលកូនបិទបាំងហើយ ភ័យដែលកើតអំពីទិសខាងកើត រមែងមិនកើតឡើងឡើយ ។ ប្រសិនបើកូនទាំងឡាយជាអ្នកប្រតិបត្តិខុស ឯមាតាបិតាជាអ្នកប្រតិបត្តិល្អដោយការចិញ្ចឹមថែរក្សាជាដើម តាំងតែពីកូននៅតូច កូននោះជាអ្នកមិនសមគួរចំពោះមាតាបិតា ព្រោះហេតុនោះ ភ័យនោះរមែងមានមិនខាន ។ កូនទាំងឡាយ ជាអ្នកប្រតិបត្តិល្អ មាតាបិតា

ជាអ្នកប្រតិបត្តិខុស មាតាបិតា ក៏មិនសមគួរដល់បុត្ត ទាំងឡាយ ដូច្នោះ ភ័យនេះគប្បីមកដល់ ។ កាលបើទាំងសងខាងប្រតិបត្តិខុស ភ័យក៏រមែងមានទាំងសងខាង កាលបើប្រតិបត្តិត្រូវទាំងសងខាង ភ័យរមែងមិនមានទាំងអស់ ។ ដោយហេតុនោះទើបលោកពោលថា ទិសខាងកើត ដែលកូនបិទបាំងឲ្យក្សេមក្សាន្តហើយ រមែងមិនឲ្យមានភ័យ ដូច្នេះ ។ កាលព្រះមានព្រះភាគបានសម្ដែងយ៉ាងនេះហើយ ទ្រង់ត្រាស់នឹងសិង្គាលកៈថា ម្នាលគហបតិបុត្ត បិតារបស់អ្នកមិនបានឲ្យអ្នកថ្វាយបង្គំទិសខាងកើត ដែលជនក្នុងលោកសន្មតិគ្នាទេ ប៉ុន្តែបិតារបស់អ្នកបានសំដៅយក មាតាបិតាថាជាទិសខាងកើត ហើយឲ្យអ្នកថ្វាយបង្គំ បិតារបស់អ្នកពោលអំពីទិសខាងកើត គឺយ៉ាងនេះឯង មិនមែនយ៉ាងដទៃឡើយ ។

## គ្រូអាចារ្យជាទិសខាងត្បូង

## បិដក

បញ្ចហិ ខោ គហបតិបុត្ត ឋានេហិ អន្តេវាសិនា ទក្ខិណា ទិសា អាចរិយា បច្ចុបដ្ឋាតព្វា ឧដ្ឋានេន ឧបដ្ឋានេន

សុស្សូសាយ បារិចរិយាយ សក្កច្ចំ សិប្បំ បដិគ្គហណេន ម្នាលគហបតិបុត្ត អាចារ្យជាទិសខាងត្បូង សិស្សត្រូវប្រតិបត្តិដោយស្ថាន ៥ យ៉ាងគឺ ដោយការក្រោកឡើងទទួល ១ ដោយការគាល់បម្រើ ១ ដោយការជឿស្តាប់ឱវាទ ១ ដោយការបម្រើតូច ៗ (មានឲ្យទឹកលុបមុខនិងឈើស្ទន់ជាដើម) ១ ដោយការរៀនសិល្បសាស្ត្រដោយគោរព ១ ។

## អដ្ឋកថា

បទថា **ឧដ្ឋានេន** (ដោយការក្រោកឡើងទទួល) គឺដោយក្រោកឡើងចាកទីអង្គុយ ។ ពិតណាស់ សិស្សកាលឃើញគ្រូអាចារ្យមកអំពីចម្ងាយ ត្រូវក្រោកចាកទីអង្គុយធ្វើការស្វាគមន៍ ទទួលរបស់អំពីដៃ ក្រាលនូវអាសនៈឲ្យគ្រូអាចារ្យអង្គុយហើយ គប្បីធ្វើការបក់ផ្លិត លាងជើង គក់ប្រេបាច់ជាដើមនោះ លោកពោលសំដៅយកបទថា ដោយការក្រោកឡើងទទួល ដូច្នេះ ។

បទថា **ឧបដ្ឋានេន** (ដោយការគាល់បម្រើ) មានសេចក្តីថា ដោយការចូលទៅគាល់បម្រើ ៣ ដងក្នុងមួយថ្ងៃ តែជានិច្ចកាល ក៏គួរទៅក្នុងកាលរៀនសិល្បសាស្ត្រ ។

បទថា **សុស្សូសាយ** (ដោយការជឿស្តាប់ឱវាទ) មានសេចក្តីថា កាលបើសិស្សមិនជឿស្តាប់ រមែងមិនបានចាក់ផ្ចុះនូវគុណវិសេសឡើយ ។

បទថា **បារិចរិយាយ** (ដោយការប្រតិបត្តិតូច ៗ ) គឺដោយការបម្រើតូច ៗ តិច ៗ មិនហួសពីសមត្ថភាព ។ ជាការពិតណាស់ សិស្សគួរក្រោកឡើងអំពីព្រឹកព្រលឹម ឲ្យទឹកខ្ពុរមាត់ ឈើសំអាតធ្មេញ (ច្រាសដុះធ្មេញ) ស្ងួម្បីពេលអាហារក៏កាន់ទឹកសម្រាប់ផឹកយកទៅឲ្យ ហើយខ្ទះខ្ទែងបម្រើកាលបើរួចស្រេចហើយ ថ្វាយបង្គំត្រឡប់ទៅវិញ គួរបោកគក់សំពត់ដែលប្រឡាក់សៅហ្មង គួរតម្កល់ទឹកសម្រាប់ងូតក្នុងវេលាល្ងាច គួរចូលទៅបម្រើក្នុងពេលដែលលោកមានអាពាធ ។ សូម្បីបព្វជិតក៏គួរធ្វើអន្តេវាសិកវត្តគ្រប់យ៉ាងដែរ ។ នេះលោកសំដៅយកបទថា **ដោយការប្រតិបត្តិតូច ៗ** ។

បទថា សក្កច្ចំ សិប្បំ បដិគ្គហណេន (ដោយការរៀនសិល្បសាស្ត្រដោយគោរព) មានសេចក្តីថា ការរៀនបន្តិចបន្តួចហើយទន្ទេញច្រើនដង ។ សូម្បីតែបទមួយ ក៏ត្រូវតែរៀនឲ្យដឹងច្បាស់ ឈ្មោះថា រៀនដោយសេចក្តីគោរព ។

(គ្រូអាចារ្យសង្គ្រោះសិស្សដោយស្ថាន ៥ យ៉ាង)

## បិដក

ឥមេហិ ខោ គហបតិបុត្ត បញ្ចហិ ឋានេហិ អន្តេវាសិនា ទក្ខិណា ទិសា អាចរិយា បច្ចុបដ្ឋិតា បញ្ចហិ ឋានេហិ អន្តេវាសឹ អនុកម្បន្តិ សុវិនីតំ វិនេន្តិ សុគ្គហិតំ គាហាបេន្តិ សព្វសិប្បេសុ តំ សមក្ខាយិនោ ភវន្តិ មិត្តាមច្ចេសុ បដិវេទេន្តិ ទិសាសុ បរិត្តាណំ ករោន្តិ ម្នាលគហបតិបុត្ត អាចារ្យជាទិសខាងត្បូង ដែលសិស្សប្រតិបត្តិដោយស្ថាន ៥ យ៉ាងនេះឯងហើយ រមែងអនុគ្រោះសិស្សដោយស្ថាន ៥ យ៉ាងវិញគឺ ដឹកនាំល្អ ១ ឲ្យរៀនល្អ ១ ប្រៀនប្រដៅសិស្សឲ្យចេះត្រឹមត្រូវ ក្នុងសិល្បសាស្ត្រសព្វគ្រប់ ១ តែងលើកតម្កើងក្នុងទីប្រជុំមិត្តអាមាត្យ ១ ធ្វើសេចក្តីការពារក្នុងទិសទាំងឡាយ ១ ។

ឥមេហិ ខោ គហបតិបុត្ត បញ្ចហិ ឋានេហិ អន្តេវាសិនា ទក្ខិណា ទិសា អាចរិយា បច្ចុបដ្ឋិតា ឥមេហិ បញ្ចហិ ឋានេហិ អន្តេវាសី អនុកម្បន្តិ ឯវមស្ស ឯសា ទក្ខិណា ទិសា បដិច្ឆន្នា ហោតិ ខេមា អប្បដិភយា ម្នាល គហបតិបុត្ត ពួកអាចារ្យជាទិសខាងត្បូង ដែលសិស្ស ប្រតិបត្តិដោយស្ថាន ៥ យ៉ាងនេះឯងហើយ រមែងអនុគ្រោះ សិស្សដោយស្ថាន ៥ យ៉ាងនេះ ទិសខាងត្បូងនោះ ដែល សិស្សបានបិទបាំងហើយ ជាទិសមានសេចក្តីក្សេមឥតមាន កយន្តរាយយ៉ាងនេះ ។

## អដ្ឋកថា

បទថា *សុវិនីតំ វិនេន្តិ* (ដឹកនាំល្អ) មានសេចក្តីថា គ្រូអាចារ្យទាំងឡាយ រមែងឲ្យសិស្សសិក្សា គឺណែនាំ មារយាទយ៉ាងនេះថា អ្នកគួរអង្គុយយ៉ាងនេះ គួរឈរ យ៉ាងនេះ គួរទំពាស៊ីយ៉ាងនេះ គួរបរិភោគយ៉ាងនេះ គួរវៀរមិត្តអាក្រក់ គួរសេពគប់មិត្តល្អ ដូច្នេះ ។

បទថា **សុគ្គហិតំ គាហាបេន្តិ** (ឲ្យរៀនល្អ) មានសេចក្តីថា គ្រូអាចារ្យទាំងឡាយ ជម្រះ (ពន្យល់) អត្ថនិងព្យញ្ជនៈ ព្រមទាំងចន្ទុលបង្ហាញនូវប្រយោគហើយ ញ៉ាំងសិស្សឲ្យរៀនដោយអាការដែលសិស្សអាចរៀនបានល្អ ។

បទថា **មិត្តាមច្ចេសុ បដិវេទេន្តិ** (តែងលើកតម្កើងក្នុងទីប្រជុំមិត្តអាមាត្យ) មានសេចក្តីថា គ្រូអាចារ្យទាំងឡាយពោលអំពីសេចក្តីល្អរបស់សិស្សយ៉ាងនេះថា សិស្សរបស់ខ្ញុំនេះ ឆ្លាតណាស់ ជាពហុស្សូតប្រហាក់ប្រហែលនឹងខ្ញុំដែរ សូមពួកលោកជឿជាក់សិស្សនេះចុះ ហើយក៏បង្ហាញសិស្សឲ្យប្រាកដក្នុងទីប្រជុំជនទាំងឡាយ ។

បទថា **ទិសាសុ បរិត្តាណំ ករោន្តិ** (ធ្វើសេចក្តីការពារក្នុងទិសទាំងឡាយ) មានសេចក្តីថា គ្រូអាចារ្យរមែងធ្វើការការពារសិស្សក្នុងទីទាំងពួង ដោយឲ្យសិក្សាសិល្ប-សាស្ត្រ ។ ព្រោះថា លាភសក្ការៈរមែងកើតមានដល់អ្នករៀនសិល្បសាស្ត្រ ក្នុងទីដែលទៅសម្តែងសិល្បសាស្ត្រ លាភសក្ការៈនោះឯងឈ្មោះថា គ្រូអាចារ្យបានធ្វើហើយ ។ សូម្បីកាលមហាជន ពោលសរសើរអំពីគុណរបស់សិស្ស

នោះ រមែងពោលដល់គុណរបស់គ្រូអាចារ្យមុនថា សិស្ស របស់លោកនេះ ជាសិស្សដែលធ្លាប់លាងជើងគ្រូអាចារ្យ ដូច្នេះ ។ លាភដែលកើតឡើងដល់សិស្សនោះ សូម្បីមាន ប្រមាណដល់ព្រហ្មលោក ក៏ជារបស់គ្រូអាចារ្យនោះឯង ។ម្យ៉ាងទៀត ចោរទាំងឡាយក្នុងព្រៃ រមែងមើលមិនឃើញ អមនុស្សក្តី ពស់ជាដើមក្តី រមែងមិនបៀតបៀនសិស្សណា ដែលចង់បានវិជ្ជាដើរព្រៃ សូម្បីគ្រូអាចារ្យទាំងឡាយញ៉ាំង សិស្សឲ្យរៀន ក៏ឈ្មោះថា រមែងធ្វើនូវសេចក្តីការពារក្នុង ទិសទាំងឡាយ ។ សូម្បីគ្រូអាចារ្យទាំងឡាយលើកសរសើរ សិស្សយ៉ាងនេះថា សិស្សរបស់ខ្ញុំនៅក្នុងទិសនេះ វិជ្ជា សិល្បសាស្ត្ររបស់សិស្សនេះ ក៏មិនខុសអំពីសិល្បសាស្ត្រ របស់ខ្ញុំដែរ អ្នកចូរទៅសួរសិស្សនោះចុះ ដល់មនុស្សដែល កើតសេចក្តីសង្ស័យអំពីទិសដែលសិស្សនោះទៅ ហើយមក រកខ្លួន ក៏ឈ្មោះថា រមែងធ្វើការការពារ ព្រោះលាភសក្ការៈ ដែលកើតឡើងដល់សិស្សក្នុងទីនោះ អធិប្បាយថា រមែងធ្វើ ឲ្យជាទីពឹង ។ បទដែលនៅសល់ក្នុងរឿងនេះ គប្បីប្រកប ដោយន័យមុននោះឯង ។

# កិរិយាជាទិសខាងលិច

## បិដក

បញ្ចហិ ខោ គហបតិបុត្ត ឋានេហិ សាមិកេន បច្ឆិមា ទិសា ភរិយា បច្ចុបដ្ឋាតព្វា សម្មាននាយ អវិមាននាយ អនតិចរិយាយ ឥស្សរិយវោស្សគ្គេន អលង្ការានុប្បទានេន ម្នាលគហបតិបុត្ត កិរិយាជាទិសខាងលិច ស្វាមីត្រូវទំនុកបម្រុងដោយស្ថានទាំងឡាយ ៥ យ៉ាង គឺ ដោយការរាប់អានជាកិរិយាពេញទី ១ ដោយមិនមើលងាយ ១ ដោយមិនប្រព្រឹត្តក្បត់ចិត្ត ១ ដោយប្រគល់ឲ្យជាធំ (ក្នុងការងារផ្ទះ) ១ ដោយការឲ្យគ្រឿងតែងខ្លួន ១ ។

## អដ្ឋកថា

គប្បីជ្រាបនូវសេចក្តីក្នុងវារៈទិសទី ៣ ។

បទថា **សម្មាននាយ** (ដោយលើកសរសើរ) គឺ ដោយការរាប់អានថាជាកិរិយាពេញទី ។

បទថា **អវិមាននទាយ** (ដោយមិនមើលងាយ) មានសេចក្តីថា ដោយមិននិយាយមើលងាយមើលថោក មិនវាយដំប្រចំធាក់ដូចជាទាសៈនិងកម្មករជាដើម ដូច្នោះ ។

បទថា **អនតិចរិយាយ** (ដោយមិនប្រព្រឹត្តក្បត់ចិត្ត) មានសេចក្តីថា ស្វាមីមិនប្រព្រឹត្តកន្លងនូវកិរិយារបស់ខ្លួនឯង ហើយទៅបម្រើផ្គាប់ផ្គុនស្រីដទៃ ឈ្មោះថា **ដោយមិនប្រព្រឹត្តក្បត់ចិត្ត** ។

បទថា **ឥស្សរិយវោស្សគ្គេន** (ដោយប្រគល់ឲ្យជាធំ) មានសេចក្តីថា ជាការពិតណាស់ ស្ត្រីទាំងឡាយសូម្បីបាននូវអាភរណៈដូចជាគ្រឿងប្រដាប់មហាលតា តែបើមិនបានចាត់ចែងអាហាររមែងក្រោធខឹង កាលស្វាមីប្រគល់ឲ្យនូវវែកដាក់ក្នុងដៃហើយនិយាយថា សូមម៉ែវាចាត់ចែងតាមសេចក្តីគាប់ចិត្តរបស់ម៉ែវាឯងចុះ ដូច្នេះហើយប្រគល់ផ្ទះបាយឲ្យ ឈ្មោះថា ប្រគល់ឲ្យភាពជាធំទាំងអស់ អធិប្បាយថា ដោយការធ្វើយ៉ាងនោះ ។

បទថា អលង្ការានុប្បទានេន (ដោយការឲ្យគ្រឿងតែងខ្លួន) មានសេចក្តីថា ដោយការឲ្យគ្រឿងប្រដាប់តាមសមគួរដល់សម្បត្តិរបស់ខ្លួន ។

(ភរិយាសង្គ្រោះស្វាមីដោយស្ថាន ៥ យ៉ាង)

## បិដក

ឥមេហិ ខោ គហបតិបុត្ត បញ្ចហិ ឋានេហិ សាមិកេន បច្ឆិមា ទិសា ភរិយា បច្ចុបដ្ឋិតា បញ្ចហិ ឋានេហិ សាមិកំ អនុកម្បន្តិ សុសំវិហិតកម្មន្តា ច ហោតិ សុសង្គហិតបរិជនា ច អនតិចារិនី ច សម្ភតញ្ច អនុរក្ខតិ ទក្ខា ច ហោតិ អនលសា សព្វកិច្ចេសុ ម្នាលគហបតិបុត្ត ភរិយាជាទិសខាងលិច ដែលស្វាមីទំនុកបម្រុងដោយស្ថានទាំងឡាយ ៥ យ៉ាងនេះឯងហើយ រមែងអនុគ្រោះស្វាមីដោយស្ថានទាំងឡាយ ៥ យ៉ាងវិញ គឺ ចាត់ចែងការងារដោយល្អ ១ សង្គ្រោះជនជាញាតិទាំងពីរខាងដោយល្អ ១ មិនប្រព្រឹត្តក្បត់ចិត្ត ១ ថែទាំទ្រព្យដែលស្វាមីរកបានមក ១ ឈ្លាសមិនខ្ជិលច្រអូសក្នុងកិច្ចការសព្វគ្រប់ ១ ។

ឥមេហិ ខោ គហបតិបុត្ត បញ្ចហិ ឋានេហិ សាមិកេន បច្ឆិមា ទិសា ភរិយា បច្ចុបដ្ឋិតា ឥមេហិ បញ្ចហិ ឋានេហិ សាមិកំ អនុកម្បន្តិ ឯវមស្ស ឯសា បច្ឆិមា ទិសា បដិច្ឆន្នា ហោតិ ខេមា អប្បដិភយា ម្នាលគហបតិបុត្ត ភរិយា ជាទិសខាងលិច ដែលស្វាមីទំនុកបម្រុងដោយស្ថាន ៥ យ៉ាងនេះឯងហើយ រមែងអនុគ្រោះស្វាមីដោយស្ថាន ៥ យ៉ាងនេះ ទិសខាងលិចនោះ ដែលស្វាមីបិទបាំងហើយ ជាទិសមានសេចក្តីក្សេម ឥតមានភយន្តរាយយ៉ាងនេះ ។

## អដ្ឋកថា

បទថា *សុសំវិហិតកម្មន្តា* (ចាត់ចែងការងារដោយល្អ) មានសេចក្តីថា មិនប្រព្រឹត្តកន្លងវេលាព្រឹក ក្រោកឡើង ចម្អិនបបរនិងបាយជាដើម ហើយចាត់ចែងការងារឲ្យល្អ ការធ្វើសេចក្តីល្អដល់ស្វាមីនោះ ៗ ។

បទថា *សុសង្គហិតបរិជនា* (សង្គ្រោះជនជាញាតិទាំងពីរខាងដោយល្អ) មានសេចក្តីថា សង្គ្រោះបរិជនដោយការរាប់អាន និងដោយការផ្តល់ដំណឹងសុខទុក្ខជាដើម ។

ជនជាញាតិរបស់ស្វាមី និងជនជាញាតិរបស់ខ្លួន ឈ្មោះថា **បរិជន** ក្នុងទីនេះ ។

បទថា **អនតិចារិនី** (មិនប្រព្រឹត្តក្បត់ចិត្ត) មានសេចក្ដីថា មិនប្រព្រឹត្តក្បត់ចិត្តស្វាមី ហើយប្រាថ្នាបុរសដទៃសូម្បីដោយផ្លូវចិត្ត ។

បទថា **សម្ភតំ** (ថែទាំទ្រព្យដែលស្វាមីរកបានមក) មានសេចក្ដីថា ទ្រព្យដែលស្វាមីធ្វើកសិកម្ម និងពាណិជ្ជកម្មជាដើម ហើយនាំមករក្សាទុកឲ្យបានល្អ ។

បទថា **ទក្ខា ច ហោតិ** (ជាមនុស្សឈ្លាស) មានសេចក្ដីថា ជាមនុស្សឆ្លាតវាងវៃហ្មត់ចត់ក្នុងការចាត់ចែងបបរនិងភត្តជាដើម ។

បទថា **អនលសា** (មិនខ្ជិលច្រអូស) មានសេចក្ដីថា ជាអ្នកមិនទម្រន់ ។ កិរិយាមិនមែនដូចជាពួកស្រីដទៃ ដែលខ្ជិលច្រអូស អង្គុយសំកុកក្នុងទីដែលខ្លួនអង្គុយហើយ ឈរទ្រឹងនៅក្នុងទីដែលខ្លួនឈរហើយទេ រមែងញុំាងកិច្ចការទាំងពួងឲ្យសម្រេចដោយចិត្តទូលំទូលាយស្វាហាប់ ។ គប្បីប្រកបបទដទៃដែលនៅសល់ក្នុងរឿងនេះ ដោយន័យដែលពោលហើយនោះឯង ។

# មិត្តអាមាត្យជាទិសខាងជើង

## បិដក

*បញ្ចហិ ខោ គហបតិបុត្ត ឋានេហិ កុលបុត្តេន ឧត្តរា ទិសា មិត្តាមច្ចា បច្ចុបដ្ឋាតព្វា ទានេន បិយវជ្ជេន អត្ថចរិយាយ សមានត្តតាយ អវិសំវាទនតាយ ម្នាល គហបតិបុត្ត មិត្តអាមាត្យជាទិសខាងជើង កុលបុត្តត្រូវប្រតិបត្តិដោយស្ថានទាំងឡាយ ៥ យ៉ាងគឺ ដោយការឲ្យរបស់ ១ ដោយការនិយាយតែពាក្យគាប់ចិត្ត ១ ដោយការប្រព្រឹត្តិឲ្យជាប្រយោជន៍ ១ ដោយការប្រព្រឹត្តិខ្លួនស្មើ ១ ដោយការមិនកុហកបញ្ឆោត ១ ។*

## អដ្ឋកថា

*គប្បីជ្រាបសេចក្តីក្នុងវារៈទិសទី ៤ ។*

*បទថា **អវិសំវាទនតាយ** (ដោយការមិនកុហកបញ្ឆោត) មានសេចក្តីថា ដោយមិនក្លែងពោលពាក្យឲ្យឃ្លាត*

ចាកការពិតដល់អ្នកដែលប្រកាន់យកហើយ ។ មិនក្រែង ពោលឲ្យឃ្លាតចាកសេចក្តីពិត ហើយឲ្យយ៉ាងនេះថា សូម្បីរបស់នេះក៏មាននៅក្នុងផ្ទះរបស់ពួកយើង និងរបស់នេះក៏មានដែរ លោកចូរទទួលយកទៅចុះ ។

*(មិត្តអាមាត្យអនុគ្រោះតបវិញដោយស្ថាន ៥ យ៉ាង)*

## បិដក

ឥមេហិ ខោ គហបតិបុត្ត បញ្ចហិ ឋានេហិ កុលបុត្តេន ឧត្តរា ទិសា មិត្តាមច្ចា បច្ចុបដ្ឋិតា បញ្ចហិ ឋានេហិ កុលបុត្តំ អនុកម្បន្តិ បមត្តំ រក្ខន្តិ បមត្តស្ស សាបតេយ្យំ រក្ខន្តិ ភីតស្ស សរណំ ហោន្តិ អាបទាសុ ន វិជហន្តិ អបរបជំបិស្ស បដិបូជេន្តិ ម្នាលគហបតិបុត្ត មិត្តអាមាត្យ ជាទិសខាងជើង ដែលកុលបុត្តប្រតិបត្តិដោយស្ថាន ៥ យ៉ាងនេះឯងហើយ រមែងអនុគ្រោះកុលបុត្តដោយស្ថាន ៥ យ៉ាង គឺ រក្សាមិត្តដែលធ្វេសប្រហែស ១ ជួយថែទាំទ្រព្យសម្បត្តិរបស់មិត្ត ដែលធ្វេសប្រហែស ១ ជាទីពឹងរបស់មិត្តដែលមានភ័យ ១ មិនបោះបង់គ្នាក្នុងគ្រា

វិបត្តិ ១ រាប់អានរហូតដល់ផៅពង្សរបស់មិត្ត ១ ។

ឥមេហិ ខោ គហបតិបុត្ត បញ្ចហិ ឋានេហិ កុលបុត្តេន ឧត្តរា ទិសា មិត្តាមច្ចា បច្ចុបដ្ឋិតា ឥមេហិ បញ្ចហិ ឋានេហិ កុលបុត្តំ អនុកម្បន្តិ ឯវមស្ស ឯសា ឧត្តរា ទិសា បដិច្ឆន្នា ហោតិ ខេមា អប្បដិភយា ម្នាលគហបតិបុត្ត មិត្តអាមាត្យជាទិសខាងជើង ដែលកុលបុត្តប្រតិបត្តិដោយស្ថាន ៥ យ៉ាងនេះឯងហើយ រមែងអនុគ្រោះកុលបុត្តដោយស្ថាន ៥ យ៉ាងនេះ ទិសខាងជើងនុ៎ះ ដែលកុលបុត្តបានបិទបាំងហើយ ជាទិសមានសេចក្តីក្សេម ឥតមានភយន្តរាយយ៉ាងនេះ ។

## អដ្ឋកថា

បទថា **អបរបជំបិស្ស បដិបូជេន្តិ** (រាប់អានរហូតដល់ផៅពង្សរបស់មិត្ត) មានសេចក្តីថា បុត្តធីតារបស់មិត្តឈ្មោះថា ប្រជា ហើយបុត្តធីតារបស់បុត្តធីតានៃមិត្តនោះជាចៅ និងជាចៅទួត ឈ្មោះថា ប្រជាដទៃទៀត ។ (ពួជនទាំងនោះ) រមែងបូជា រមែងត្រេកអរ រមែងរាប់រក

កុលបុត្តវិញដោយធ្វើនូវមង្គលជាដើម ។ បទដែលនៅសល់ក្នុងរឿងនេះ គប្បីប្រកបចូលដោយន័យមុននោះឯង ។

# ទាសៈនិងកម្មករជាទិសខាងក្រោម

## បិដក

បញ្ចហិ ខោ គហបតិបុត្ត ឋានេហិ អយ្យិរកេន ហេដ្ឋិមា ទិសា ទាសកម្មករា បច្ចុបដ្ឋាតព្វា យថាពលំ កម្មន្តសំវិធានេន ភត្តវេត្តនានុប្បទានេន គិលានុបដ្ឋានេន អច្ឆរិយានំ រសានំ សំវិភាគេន សមយេ វោស្សគ្គេន ម្នាលគហបតិបុត្ត ទាសៈនិងកម្មករជាទិសខាងក្រោម ចៅហ្វាយនាយត្រូវទំនុកបម្រុងដោយស្ថាន ៥ យ៉ាងគឺ ដោយការចាត់ចែងការងារសមគួរតាមកម្លាំង ១ ដោយការឲ្យនូវភត្តាហារនិងថ្លៃឈ្នួល ១ ដោយការព្យាបាលក្នុងវេលាឈឺថ្កាត់ ១ ដោយការចែករំលែក នូវរបស់មានរសត្រកាលចំឡែក ១ ដោយការឲ្យឈប់សម្រាកក្នុងសម័យគួរ ១ ។

# អដ្ឋកថា

បទថា **យថាពលំ កម្មន្តំ សំវិធានេន** (ដោយការចាត់ចែងការងារសមគួរតាមកម្លាំង) មានសេចក្តីថា ដោយមិនឲ្យមនុស្សចាស់ធ្វើការងារ ដែលសមនឹងក្មេង ឬមិនឲ្យមនុស្សក្មេងធ្វើការងារ ដែលសមនឹងមនុស្សចាស់ មិនឲ្យបុរសធ្វើការងារដែលសមនឹងស្ត្រី ឬមិនឲ្យស្ត្រីធ្វើនូវការងារដែលសមនឹងបុរស ហើយចាត់ចែងការងារទៅតាមកម្លាំងរបស់មនុស្សនោះ ៗ ។

បទថា **ភត្តវេត្តនានុប្បទានេន** (ដោយការឲ្យនូវភត្តាហារនិងថ្លៃឈ្នួល) មានសេចក្តីថា ដោយការកំណត់នូវសេចក្តីសមគួររបស់មនុស្សនោះ ៗ ថា អ្នកនេះជាអ្នកមានកូនតូច អ្នកនេះជាអ្នកនៅរួមគ្នា ដូច្នេះហើយក៏ឲ្យអាហារនិងថ្លៃឈ្នួលដើម្បីចាយវាយ ។

បទថា **គិលានុបដ្ឋានេន** (ដោយការព្យាបាលក្នុងវេលាឈឺថ្កាត់) មានសេចក្តីថា ដោយមិនឲ្យធ្វើការងារក្នុងវេលាដែលមានជម្ងឺ ហើយឲ្យថ្នាំព្យាបាលរោគជាដើម និង

មើលថែរក្សា ។

បទថា **អច្ឆរិយានំ រសានំ សំវិភាគេន** (ដោយការចែករំលែកនូវរបស់មានរសត្រកាលចំឡែក) មានសេចក្តីថា ពេលដែលបានរបស់មានរសឆ្ងាញ់ចំឡែក ៗ ហើយមិនបរិភោគតែម្នាក់ឯងទាំងអស់ទេ តែងចែកឲ្យទាសៈនិងកម្មករទាំងនោះ ។

បទថា **សមយេ វោស្សគ្គេន** (ដោយការឲ្យឈប់សម្រាកក្នុងសម័យគួរ) មានសេចក្តីថា ដោយឲ្យឈប់សម្រាកក្នុងនិច្ចសម័យ និងកាលសម័យ ។

ទាសៈនិងកម្មករធ្វើការងារ ពេញមួយថ្ងៃរមែងនឿយហត់ ព្រោះហេតុដូច្នោះ ការដឹងនូវពេលវេលា ហើយឲ្យឈប់សម្រាកសមល្មម ដែលមិនធ្វើឲ្យទាសៈនិងកម្មករមានការនឿយហត់ពេក ឈ្មោះថា ឲ្យឈប់សម្រាកក្នុងនិច្ចសម័យ ។

ការឲ្យគ្រឿងតុបតែងខ្លួន របស់ទំពា របស់បរិភោគជាដើម ក្នុងថ្ងៃមានមហោស្រព នក្ខត្តប្ញក្ស និងលេងកីឡាជាដើមហើយ ក៏ឲ្យឈប់សម្រាក ឈ្មោះថា ឲ្យឈប់

សម្រាកក្នុងកាលសម័យ ។

(ទាសៈនិងកម្មករអនុគ្រោះតបចៅហ្វាយនាយដោយស្ថាន ៥ យ៉ាង)

## បិដក

ឥមេហិ ខោ គហបតិបុត្ត បញ្ចហិ ឋានេហិ អយិរកេន ហេដ្ឋិមា ទិសា ទាសកម្មករា បច្ចុបដ្ឋិតា បញ្ចហិ ឋានេហិ អយិរកំ អនុកម្បន្តិ បុព្វុដ្ឋាយិនោ ច ហោន្តិ បច្ឆានិបាតិនោ ច ទិន្នាទាយិនោ ច សុកតកម្មករា ច កិត្តិវណ្ណហរា ច ម្នាលគហបតិបុត្ត ទាសៈនិងកម្មករជាទិសខាងក្រោមដែលចៅហ្វាយនាយ ទំនុកបម្រុងដោយស្ថាន ៥ នេះឯងហើយ រមែងអនុគ្រោះចៅហ្វាយនាយដោយស្ថាន ៥ យ៉ាងគឺ ក្រោកឡើងធ្វើការងារមុនចៅហ្វាយនាយ ១ ឈប់ធ្វើការងារក្រោយចៅហ្វាយនាយ ១ កាន់យកតែរបស់ដែលចៅហ្វាយនាយឲ្យ ១ ធ្វើការងាររបស់ចៅហ្វាយនាយដោយយកចិត្តទុកដាក់ ១ នាំកិត្តិគុណរបស់ចៅហ្វាយនាយទៅថ្លែងក្នុងទីនោះ ៗ ១ ។

*ឥមេហិ ខោ គហបតិបុត្ត បញ្ចហិ ឋានេហិ អយិរកេន ហេដ្ឋិមា ទិសា ទាសកម្មករា បច្ចុបដ្ឋិតា ឥមេហិ បញ្ចហិ ឋានេហិ អយិរកំ អនុកម្បន្តិ ឯវមស្ស ឯសា ហេដ្ឋិមា ទិសា បដិច្ឆន្នា ហោតិ ខេមា អប្បដិភយា ម្នាល គហបតិបុត្ត ទាសៈនិងកម្មករជាទិសខាងក្រោម ដែលចៅហ្វាយនាយទំនុកបម្រុងដោយស្ថាន ៥ យ៉ាងនេះឯង ហើយ រមែងអនុគ្រោះចៅហ្វាយនាយដោយស្ថាន ៥ យ៉ាងនេះ ទិសខាងក្រោមនុ៎ះ ដែលចៅហ្វាយនាយបានបិទបាំងហើយ ជាទិសមានសេចក្តីក្សេម ឥតមានកយន្តរាយ យ៉ាងនេះ ។*

## អដ្ឋកថា

*បទថា **ទិន្នាទាយិនោ** (កាន់យកតែរបស់ដែលចៅហ្វាយនាយឲ្យ) មានសេចក្តីថា មិនកាន់យកនូវអ្វី ៗ ដូចជាចោរទេ គឺកាន់យកតែរបស់ដែលចៅហ្វាយនាយឲ្យប៉ុណ្ណោះ ។*

បទថា **សុកតកម្មករា** (ធ្វើការងារដោយយកចិត្តទុកដាក់) មានសេចក្តីថា មិនសម្ងំទោសថា រឿងអីដែលយើងត្រូវធ្វើការងារឲ្យគេ យើងមិនឃើញថាបានអ្វីទាល់តែសោះ ហើយមានចិត្តសប្បាយរីករាយធ្វើការងារដោយយកចិត្តទុកដាក់ ។

បទថា **កិត្តិវណ្ណហារា** (នាំកិត្តិគុណរបស់ចៅហ្វាយនាយទៅថ្លែង) មានសេចក្តីថា កាលបើដល់ពេលសន្ទនាគ្នានៅក្នុងកណ្តាលបរិស័ទ នាំកិត្តិគុណរបស់ចៅហ្វាយនាយទៅសរសើរថា មិនមានអ្នកណាដូចជាចៅហ្វាយនាយរបស់យើងទេ យើងដូចមិនដឹងថាខ្លួនឯងជាទាសៈ ដូចជាមិនដឹងថាគាត់ជាចៅហ្វាយនាយផង គាត់អនុគ្រោះពួកយើងដល់ថ្នាក់នេះហ្ន៎! ។ បទដែលនៅសល់ក្នុងរឿងនេះ គប្បីប្រកបចូលដោយន័យមុននោះឯង ។

# សមណព្រាហ្មណ៍ជាទិសខាងលើ

## បិដក

*បញ្ចហិ ខោ គហបតិបុត្ត ឋានេហិ កុលបុត្តេន ឧបរិមា ទិសា សមណព្រាហ្មណា បច្ចុបដ្ឋាតព្វា មេត្តេន កាយកម្មេន មេត្តេន វចីកម្មេន មេត្តេន មនោកម្មេន អនាវដទ្វារតាយ អាមិសានុប្បទានេន ម្នាលគហបតិបុត្ត សមណព្រាហ្មណ៍ជាទិសខាងលើ កុលបុត្តត្រូវផ្គត់ផ្គង់ដោយស្ថាន ៥ យ៉ាងគឺ ដោយកាយកម្មប្រកបដោយមេត្តា ១ ដោយវចីកម្មប្រកបដោយមេត្តា ១ ដោយមនោកម្មប្រកបដោយមេត្តា ១ ជាអ្នកមិនបិទទ្វារផ្ទះ ១ ដោយកិរិយាឲ្យអាមិសទាន ១ ។*

## អដ្ឋកថា

*លោកពោលអំពីមេត្តាកាយកម្មជាដើម ដែលកុលបុត្តចូលទៅតាំងនូវមេត្តាចិត្តហើយធ្វើ ក្នុងបទទាំងឡាយជាដើមថា ដោយកាយកម្មប្រកបដោយមេត្តាដូច្នេះ ។*

ក្នុងបទទាំងឡាយនោះ ការទៅវត្តដោយគិតថា អញ្ជើញនិមន្តភិក្ខុទាំងឡាយ កាន់យកនូវធម្មក្រកសម្រាប់ត្រងទឹក និងធ្វើកិច្ចទាំងឡាយ មានការគក់ប្រឫបាច់ខ្នងនិងជើងជាដើម ឈ្មោះថា កាយកម្មប្រកបដោយមេត្តា ***(មេត្តេន កាយ-កម្មេន)*** ។

កាលបានឃើញភិក្ខុទាំងឡាយ ចូលទៅបិណ្ឌបាតហើយ ក៏ពោលប្រកាសនូវពាក្យជាដើមថា ពួកអ្នកចូរថ្វាយបបរ ចូរថ្វាយបាយដោយសេចក្តីគោរពដូច្នេះ ។ ការឲ្យសាធុការហើយស្តាប់ធម៌ និងធ្វើនូវបដិសណ្ឋារៈជាដើមដោយសេចក្តីគោរព ឈ្មោះថា វចីកម្មប្រកបដោយមេត្តា ***(មេត្តេន វចីកម្មេន)*** ។

ការគិតយ៉ាងនេះថា ព្រះថេរៈដែលចូលទៅកាន់ត្រកូលរបស់ពួកយើង សូមឲ្យជាអ្នកមិនមានពៀរ សូមឲ្យជាអ្នកមិនមានការបៀតបៀនចុះ ឈ្មោះថា មនោកម្មប្រកបដោយមេត្តា ***(មេត្តេន មនោកម្មេន)*** ។

បទថា **អនាវដទ្វារតាយ** ប្រែថា ជាអ្នកមិនបិទទ្វារផ្ទះ ។ ក្នុងបទនោះ អធិប្បាយថា សូម្បីកុលបុត្តបើកទ្វារផ្ទះ

ទាំងអស់ តែមិនឲ្យទាន មិនក្រោកទទួលអ្នកមានសីល ទាំងឡាយ ក៏ឈ្មោះថា ជាអ្នកបិទទ្វារផ្ទះដែរ ។ ប៉ុន្តែ សូម្បីកុលបុត្តបិទទ្វារផ្ទះ តែឲ្យទាន ក្រោកទទួលអ្នកមាន សីលទាំងនោះ ក៏ឈ្មោះថា ជាអ្នកបើកទ្វារផ្ទះដែរ ។ កាល អ្នកមានសីលមកដល់ទ្វារផ្ទះ មិនគួរនិយាយចំពោះរបស់ ដែលមានថាមិនមានទេ ហើយក៏ថ្វាយ យ៉ាងនេះឈ្មោះថា ជាអ្នកមិនបិទទ្វារផ្ទះ ។

បទថា **អាមិសានុប្បទានេន** (ដោយកិរិយាឲ្យ អាមិសទាន) អធិប្បាយថា របស់ដែលគួរបរិភោគមុន ភត្តាហារ ឈ្មោះថា អាមិស ព្រោះហេតុនោះ ដោយការ ថ្វាយបបរនិងភត្តដល់អ្នកមានសីលទាំងឡាយ ដូច្នេះ ។

(សមណព្រាហ្មណ៍អនុគ្រោះកុលបុត្តដោយស្ថាន ៦ យ៉ាង)

## បិដក

ឥមេហិ ខោ គហបតិបុត្ត បញ្ចហិ ឋានេហិ កុលបុត្តេន ឧបរិមា ទិសា សមណព្រាហ្មណា បច្ចុបដ្ឋិតា ឆហិ ឋានេហិ កុលបុត្តំ អនុកម្បន្តិ បាបា និវារេន្តិ

កល្យាណោ និវេសេន្តិ កល្យាណេន មនសា អនុកម្បន្តិ អស្សុតំ សាវេន្តិ សុតំ បរិយោទបេន្តិ សគ្គស្ស មគ្គំ អាចិក្ខន្តិ ម្នាលគហបតិបុត្ត សមណព្រាហ្មណ៍ ជាទិសខាងលើ ដែលកុលបុត្តទំនុកបម្រុងដោយស្ថាន ៥ យ៉ាងនេះឯងហើយ រមែងអនុគ្រោះកុលបុត្តដោយស្ថាន ៦ គឺ ហាមឃាត់កុលបុត្តចាកអំពើអាក្រក់ ១ ឲ្យតាំងនៅតែក្នុងអំពើល្អ ១ អនុគ្រោះដោយចិត្តដ៏ល្អ ១ ឲ្យបានស្តាប់ពាក្យដែលមិនធ្លាប់ស្តាប់ ១ បំភ្លឺសេចក្តីដែលធ្លាប់ស្តាប់ហើយ ១ ប្រាប់ផ្លូវសួគ៌ ១ ។

ឥមេហិ ខោ គហបតិបុត្ត បញ្ចហិ ឋានេហិ កុលបុត្តេន ឧបរិមា ទិសា សមណព្រាហ្មណា បច្ចុបដ្ឋិតា ឥមេហិ ឆហិ ឋានេហិ កុលបុត្តំ អនុកម្បន្តិ ឯវមស្ស ឯសា ឧបរិមា ទិសា បដិច្ឆន្នា ហោតិ ខេមា អប្បដិភយាតិ ម្នាលគហបតិបុត្ត សមណព្រាហ្មណ៍ជាទិសខាងលើ ដែលកុលបុត្តផ្គត់ផ្គង់ដោយស្ថាន ៥ យ៉ាងនេះឯងហើយ រមែងអនុគ្រោះកុលបុត្តដោយស្ថាន ៦ នេះ ទិសខាងលើនុ៎ះដែលកុលបុត្តបានបិទបាំងហើយ ជាទិសមានសេចក្តីក្សេមឥតមានភ័យអន្តរាយយ៉ាងនេះ ។

# អដ្ឋកថា

បទថា កល្យាណេន មនសា អនុកម្បន្តិ (អនុគ្រោះដោយចិត្តដ៏ល្អ) មានសេចក្តីថា ដោយផ្សាយនូវមេត្តាចិត្តប្រកបដោយប្រយោជន៍យ៉ាងនេះថា សូមឲ្យសត្វទាំងឡាយទាំងពួងជាអ្នកមានសេចក្តីសុខ មិនមានពៀរ មិនមានរោគ មិនមានការបៀតបៀនគ្នាចុះ ។ មួយវិញទៀត ការដែលសមណព្រាហ្មណ៍ នាំយកនូវមិត្តជាសព្រហ្មចារី អ្នកមានសីលដទៃ ឲ្យចូលទៅកាន់ផ្ទះរបស់ឧបដ្ឋាកទាំងឡាយ ក៏ឈ្មោះថា អនុគ្រោះដោយចិត្តដ៏ល្អដែរ ។

បទថា **សុតំ បរិយោទបេន្តិ** (បំភ្លឺសេចក្តីដែលធ្លាប់ស្តាប់ហើយ) មានសេចក្តីថា មានរឿងណាដែលកុលបុត្តទាំងនោះបានស្តាប់ហើយតាមប្រក្រតី សមណព្រាហ្មណ៍ទាំងឡាយ ក៏ពន្យល់នូវសេចក្តីនៃរឿងនោះ ហើយកម្ចាត់បង់នូវសេចក្តីសង្ស័យ ឬឲ្យប្រតិបត្តិតាមដោយត្រឹមត្រូវ ។ បទដែលនៅសល់ក្នុងរឿងនេះ គប្បីប្រកបចូលដោយន័យមុននោះឯង ។

# និគមគាថា

## បិដក

ឥទមវោច ភគវា ឥទំ វត្វាន សុគតោ អថាបរំ ឯតទវោច សត្ថា ព្រះមានព្រះភាគបានសម្ដែងសេចក្ដីនេះ ព្រះសុគតជាសាស្ដា លុះសម្ដែងសេចក្ដីនេះហើយ ទ្រង់ត្រាស់ពាក្យជាគាថាព័ន្ធតទៅទៀតថា :

មាតាបិតា ទិសា បុព្វា
អាចរិយា ទក្ខិណា ទិសា
បុត្តទារា ទិសា បច្ឆា
មិត្តាមច្ចា ច ឧត្តរា
ទាសកម្មករា ហេដ្ឋា
ឧទ្ធំ សមណព្រាហ្មណា
ឯតា ទិសា នមស្សេយ្យ
អលមត្តោ កុលេ គិហី ។

មាតាបិតា ជាទិសខាងកើត អាចារ្យជាទិសខាងត្បូង កូនប្រពន្ធជាទិសខាងលិច មិត្ត

អាមាត្យជាទិសខាងជើង ទាសៈនិងកម្មករជាទិសខាងក្រោម សមណព្រាហ្មណ៍ជាទិសខាងលើ គ្រហស្ថក្នុងត្រកូល ដែលអាចគ្រប់គ្រងផ្ទះ គប្បីនមស្ការទិសទាំងឡាយនុ៎ះ ។

បណ្ឌិតោ សីលសម្បន្នោ
សណ្ហោ ច បដិភាណវា
និវាតវុត្តិ អត្ថទ្ធោ
តាទិសោ លភតេ យសំ
ឧដ្ឋានកោ អនលសោ
អាបទាសុ ន វេធតិ
អច្ឆិទ្ទវុត្តិ មេធាវី
តាទិសោ លភតេ យសំ ។

បណ្ឌិតបរិបូណ៌ដោយសីល មានវាចាដ៏ពីរោះ មានប្រាជ្ញាវៃ មានកិរិយាប្រព្រឹត្តិឱនលំទោនជាប្រក្រតី មិនរឹងត្អឹង បុគ្គលមានសភាពដូច្នោះរមែងបានយស បុគ្គលមានព្យាយាមរវៀសរវៃ មិនខ្ជិលច្រអូស រមែងមិនញាប់ញ័រក្នុង

អន្តរាយទាំងឡាយ បុគ្គលមានកិរិយាប្រព្រឹត្តិ ឥតចន្លោះ មានប្រាជ្ញាវាងវៃ បុគ្គលមានសភាពដូច្នោះ រមែងបានយស ។

សង្គាហកោ មិត្តករោ
វទញ្ញូ វីតមច្ឆរោ
នេតា វិនេតា អនុនេតា
តាទិសោ លភតេ យសំ ។

បុគ្គលមានសេចក្ដីសង្គ្រោះ ជាអ្នកចងមិត្ត ជាអ្នកដឹងដំណើរពាក្យ ជាអ្នកប្រាសចាកសេចក្ដីកំណាញ់ ជាអ្នកដឹកនាំពន្យល់ការណ៍ផ្សេង ៗ ជាអ្នកណែនាំរឿយ ៗ បុគ្គលមានសភាពដូច្នោះ រមែងបានយស ។

ទានញ្ច បិយវជ្ជញ្ច
អត្ថចរិយា ច យា ឥធ
សមានតា ច ធម្មេសុ
តត្ថ តត្ថ យថារហំ ។

ទាន ១ ពាក្យពីរោះ ១ សេចក្ដីប្រព្រឹត្តិជាប្រយោជន៍ក្នុងលោកនេះ ១ ភាវៈជាអ្នកមានចិត្តស្មើក្នុងធម៌ទាំងឡាយ និងក្នុងបុគ្គលនោះៗ តាមសមគួរ ១ ។

ឯតេ ខោ សង្គហា លោកេ
រថស្សាណីវ យាយតោ
ឯតេ ច សង្គហា នាស្សុ
ន មាតា បុត្តការណា
លភេថ មានំ បូជំ វា
បិតា វា បុត្តការណា ។

សង្គហធម៌ទាំងនេះ (មានក្នុងលោក ទើបលោកប្រព្រឹត្តទៅបាន) ដូចជារថមានប្រែកទប់ទើបប្រព្រឹត្តទៅបានដូច្នោះឯង បើសង្គហធម៌ទាំងនេះមិនមានហើយ មាតាក្ដី បិតាក្ដី ក៏មិនបាននូវសេចក្ដីរាប់អាននិងការបូជា អំពីកិច្ចដែលកូនត្រូវធ្វើ ។

យស្មា ច សង្គហា ឯតេ
សមបេក្ខន្តិ បណ្ឌិតា
តស្មា មហត្តំ បប្បោន្តិ
បាសំសា ច ភវន្តិ តេតិ ។

ព្រោះហេតុតែអ្នកប្រាជ្ញទាំងឡាយ សម្លឹងឃើញសង្គហធម៌ទាំងនោះដោយប្រពៃ ហេតុនោះ បានជាលោកដល់នូវភាវៈជាធំផង គួរគេសរសើរផង ។

## អដ្ឋកថា

បទថា **អលមត្ថោ** (គ្រហស្ថក្នុងត្រកូលដែលអាច) មានសេចក្តីថា គ្រហស្ថដែលអាចធ្វើការចិញ្ចឹមបុត្តកិរិយា ហើយនឹងអាចគ្រប់គ្រងផ្ទះ ។

បទថា **បណ្ឌិតោ** (បណ្ឌិត) គឺជាអ្នកមានប្រាជ្ញាវៃក្នុងស្ថានជាទីសំពះនូវទិសទាំងឡាយ ។

បទថា **សណ្ហោ** (មានវាចាដ៏ពីរោះ) គឺជាអ្នកល្អិតល្អន់ដោយការយល់ឃើញនូវសេចក្តីដ៏សុខុម ឬដោយការពោលនូវវាចាទន់ភ្លន់ ។

បទថា **បដិភាណវា** (មានប្រាជ្ញាវៃ) គឺជាអ្នកមានប្រាជ្ញាវៃក្នុងស្ថានជាទីសំពះនូវទិសទាំងឡាយ ។

បទថា **និវាតវុត្តិ** (ប្រព្រឹត្តឱនលំទោន) គឺប្រព្រឹត្តបន្ទាបបន្ថោកខ្លួន ។

បទថា **អត្ថទ្ធោ** (មិនរឹងត្អឹង) គឺ វៀរចាកនូវសភាពរឹងរូស ។

បទថា **ឧដ្ឋានកោ** (មានព្យាយាម) គឺ ដល់ព្រមដោយសេចក្ដីប្រឹងប្រែងព្យាយាម ។

បទថា **អនលសោ** (មិនខ្ជិលច្រអូស) មានសេចក្ដីថា ជាអ្នកប្រាសចាកសេចក្ដីខ្ជិលច្រអូស ។

បទថា **អច្ឆិទ្ទវុត្តិ** (មានកិរិយាប្រព្រឹត្តិឥតចន្លោះ) គឺមានកិរិយាប្រព្រឹត្តិឥតចន្លោះ ដោយអំណាចនៃការធ្វើជាប់តគ្នា ។

បទថា **មេធាវី** (មានប្រាជ្ញា) គឺ ប្រកបដោយបញ្ញាដែលធ្វើឲ្យកើតឋានៈ ។

បទថា **សង្គាហកោ** (ជាអ្នកសង្គ្រោះ) គឺធ្វើការសង្គ្រោះដោយសង្គហវត្ថុ ៤ ។

បទថា **មិត្តករោ** (ជាអ្នកចងមិត្ត) គឺ ជាអ្នកស្វែងរកមិត្ត ។

បទថា **វទញ្ញូ** (ជាអ្នកដឹងដំណើរពាក្យ) គឺ ដឹងនូវពាក្យដែលបុព្វការីបានពោល ។ អធិប្បាយថា ក្នុងវេលាដែលទៅផ្ទះសម្លាញ់ ក៏រលឹកឃើញពាក្យដែលបុព្វការីធ្លាប់ប្រាប់ថា ពួកអ្នកចូរឲ្យសំពត់ជូតក្បាល ចូរឲ្យសំពត់សាដកដល់សម្លាញ់របស់យើង ចូរឲ្យអាហារ និងឲ្យថ្លៃឈ្នួលដល់មនុស្សទាំងឡាយ (កូនឈ្នួល) លុះពេលដែលមិត្តមកកាន់ផ្ទះរបស់ខ្លួន ក៏ធ្វើមានប្រមាណប៉ុណ្ណោះ ឬក្រៃលែងជាងនោះ ។ម្យ៉ាងទៀត ដឹងនូវពាក្យពោលរបស់មិត្តនោះ ជាពាក្យដែលពួគេនិយាយត ៗ គ្នាមកថា មិត្តនោះនឹងមកកាន់ផ្ទះរបស់អញដោយបំណងថា នឹងកាន់យកនូវរបស់នេះ ប៉ុន្តែមិនអាចដើម្បីកាន់យកបាន ព្រោះតែសេចក្ដីអៀនខ្មាស ដូច្នេះហើយគេមកដោយប្រយោជន៍ណា គប្បីញ៉ាំងប្រយោជន៍នោះឲ្យបានសម្រេច ឈ្មោះថា ដឹងនូវដំណើរពាក្យ ។ សូម្បីត្រួតពិនិត្យមើល

ហើយទើបឲ្យនូវរបស់ដែលមិត្តខ្វះខាត ក៏ឈ្មោះថា ជាអ្នកដឹងនូវដំណើរពាក្យដែរ ។

បទថា **នេតា** (ជាអ្នកណែនាំ) កាលនឹងពន្យល់នូវសេចក្តីនោះ ៗ ជាអ្នកណែនាំដោយបញ្ញា ។

ពន្យល់ហេតុច្រើនយ៉ាង ឈ្មោះថា ជាអ្នកណែនាំហេតុផល **(វិនេតា)** ។

ណែនាំជារឿយ ៗ ឈ្មោះថា តាមណែនាំ **(អនុនេតា)** ។

បទថា **តត្ថ តត្ថ** (នោះ ៗ) មានសេចក្តីថា ក្នុងបុគ្គលនោះ ៗ ។

បទថា **រថស្សាណីវ យាយតោ** (ដូចជារថមានប្រែកទប់ទើបប្រព្រឹត្តទៅបាន) មានសេចក្តីថា កាលបើការសង្គ្រោះនេះនៅមានក្នុងលោក ទើបលោកប្រព្រឹត្តទៅបាន កាលបើមិនមាន លោកក៏ប្រព្រឹត្តទៅមិនបាន ដូចជារថដែលមានប្រែកទប់រមែងបរទៅបាន កាលបើមិនមានប្រែកទប់ រថក៏បរទៅមិនបានដូច្នោះឯង ។ ព្រោះហេតុដូច្នោះ ទើបលោកពោលថាការមានសង្គហធម៌ក្នុងលោក ដូចជារថដែលមាន

ប្រែកទប់រមែងប្រព្រឹត្តទៅបានដូច្នោះ ។

បទថា **ន មាតា បុត្តការណា** (មាតាក្តី បិតាក្តី ក៏មិនបាននូវសេចក្តីរាប់អាន និងការបូជាអំពីកិច្ចដែលកូនត្រូវធ្វើ) មានសេចក្តីថា ប្រសិនបើមាតាបិតាមិនបានធ្វើនូវសេចក្តីសង្គ្រោះទាំងនេះដល់បុត្តទេ មាតាបិតាក៏នឹងមិនបាននូវការរាប់អាន ឬការបូជាព្រោះហេតុនៃបុត្តដែរ ។

បទថា **សង្គហា ឯតេ** ជាបឋមាវិភត្តិ ចុះក្នុងអត្ថទុតិយាវិភត្តិ ។ ឬបាឋៈថា **សង្គហេ ឯតេ** ។

បទថា **សមបេក្ខន្តិ** កាត់បទជា **សម្មា+បេក្ខន្តិ** ។

បទថា **បាសំសា ច ភវន្តិ** ប្រែថា គួរបានទទួលនូវការសរសើរ ។

# ការដល់នូវសរណគមន៍

# បិដក

ឯវំ វុត្តេ សិង្គាលកោ គហបតិបុត្តោ ភគវន្តំ ឯតទវោច អភិក្កន្តំ ភន្តេ អភិក្កន្តំ ភន្តេ សេយ្យថាបិ ភន្តេ និក្កុជ្ជិតំ វា ឧក្កុជ្ជេយ្យ បដិច្ឆន្នំ វា វិវរេយ្យ មូឡ្ហស្ស វា មគ្គំ

*អាចិក្ខេយ្យ អន្ធការេ វា តេលប្បជ្ជោតំ ធារេយ្យ ចក្ខុមន្តោ រូបានិ ទក្ខន្តីតិ ឯវមេវំ ភគវតា អនេកបរិយាយេន ធម្មោ បកាសិតោ ឯសាហំ ភន្តេ ភគវន្តំ សរណំ គច្ឆាមិ ធម្មញ្ច ភិក្ខុសង្ឃញ្ច ឧបាសកំ មំ ភគវា ធារេតុ អជ្ជតគ្គេ បាណុបេតំ សរណង្គតន្តិ* កាលបើព្រះមានព្រះភាគទ្រង់ត្រាស់យ៉ាងនេះហើយ សិង្គាលកគហបតិបុត្តបានក្រាបបង្គំទូលព្រះមានព្រះភាគយ៉ាងនេះថា បពិត្រព្រះអង្គដ៏ចម្រើន ពីរោះណាស់ បពិត្រព្រះអង្គដ៏ចម្រើន ពីរោះណាស់ បពិត្រព្រះអង្គដ៏ចម្រើន ធម៌ដែលព្រះអង្គសម្តែងហើយដោយអនេកបរិយាយយ៉ាងនេះ (ភ្លឺច្បាស់ណាស់) ដូចជាមនុស្សផ្ងាររបស់ដែលគេផ្កាប់ ឬដូចគេបើកបង្ហាញរបស់ដែលបិទបាំង ឬក៏ដូចគេប្រាប់ផ្លូវដល់អ្នកវង្វេងទិស ពុំនោះសោតដូចជាគេទ្រោលប្រទីបក្នុងទីងងឹត ដោយគិតថា មនុស្សអ្នកមានចក្ខុទាំងឡាយ រមែងឃើញនូវរូបទាំងឡាយ ខ្ញុំព្រះអង្គនោះសូមដល់នូវព្រះមានព្រះភាគផង ព្រះធម៌ផង ព្រះសង្ឃផង ថាជាសរណៈ ចាប់ដើមតាំងពីថ្ងៃនេះទៅ សូមព្រះមានព្រះភាគ ទ្រង់ជ្រាបនូវខ្ញុំព្រះអង្គថា ជាឧបាសកដល់នូវ

សរណៈស្មើដោយជីវិតចាប់ដើមតាំងពីថ្ងៃនេះតរៀងទៅ ។

## អដ្ឋកថា

ដោយប្រការដូច្នេះឯង ទើបព្រះមានព្រះភាគទ្រង់ត្រាស់ថា ម្នាលគហបតិបុត្ត អ្នកចូរថ្វាយបង្គំទិសដែលបិតារបស់អ្នកពោលសំដៅ ហើយទ្រង់សម្តែងអំពីទិសទាំង ៦ នេះថា ប្រសិនបើអ្នកធ្វើតាមពាក្យបិតា អ្នកចូរថ្វាយបង្គំទិសទាំងនេះចុះ ។ ទ្រង់តាំងពាក្យសួរដល់សិង្គាលកៈ ញុំាងទេសនាឲ្យដល់ទីបំផុតហើយ ស្តេចក៏ចូលទៅកាន់ក្រុងរាជគ្រឹះដើម្បីបិណ្ឌបាត ។

ចំណែកសិង្គាលកៈ ក៏បានតាំងនៅក្នុងសរណៈទាំងឡាយ ហើយបរិច្ចាគទ្រព្យប្រមាណ ៤០ កោដិបូជាក្នុងព្រះពុទ្ធសាសនា ធ្វើកម្មជាកុសល ជាអ្នកមានស្ថានសួគ៌ជាទីទៅក្នុងខាងមុខ ។

ក៏ក្នុងព្រះសូត្រនេះ ឈ្មោះថា កម្មដែលគ្រហស្ថគួរធ្វើឯណានីមួយ ជាកម្មដែលព្រះមានព្រះភាគមិនបានត្រាស់ទុករមែងមិនមាន ។

ព្រះសូត្រនេះ ឈ្មោះថា **គិហិវិន័យ** ព្រោះហេតុដូច្នោះ កាលបើស្តាប់ព្រះសូត្រនេះហើយប្រតិបត្តិតាមដូចអ្វីដែលព្រះអង្គបានបង្រៀនទុក សេចក្តីចម្រើនរមែងកើតមានដូចសេចក្តីប្រាថ្នា សេចក្តីវិនាសមិនមានឡើយ ។



# អវសានកថា

*គម្រោងច្បាប់ក្បួនវិន័យ ដែលព្រះជិនស្រីទ្រង់សម្ដែង*
*ដាស់តឿនមនុស្សលោកអ្នកវង្វេង ឱ្យស្វែងរកទិសពិតប្រាកដ ។*
*ខ្ញុំបានដកស្រង់មករៀបរៀង ហើយផ្ទៀងសេចក្ដីដោយហ្មត់ចត់*
*ប៉ុន្តែបើជួនជាមានភ្លាត់ សូមលោកអ្នកអត់នូវទោសពៃរ៍ ។*
*សូមបុណ្យកុសលដ៏ឧត្ដម កើតពីការខំទាំងយប់ថ្ងៃ*
*ជូនដល់ញោមញាតិទាំងប្រុសស្រី សូមមានសិរីគ្រប់ប្រការ ។*
*ខ្ញុំសូមបានទាន់ពេលស័ក្ដិសម ប្រជុំព្រះធាតុព្រះសាស្ដា*
*គម្រប់ប្រាំពាន់ព្រះវស្សា ក្រាបថ្វាយវន្ទាព្រះបាទថ្លៃ ។*
*សូមបានស្ដាប់ធម៌ដ៏អស្ចារ្យ ដែលពួកទេវតាពោលប្រពៃ*
*ពេលសមោធានព្រះធាតុថ្លៃ សូមមាននិស្ស័យឃើញនិព្វាន ។*

*ដោយភិក្ខុវជិរប្បញ្ញោ* ***សាន~សុជា***



# កំណាព្យផ្សេង ៗ

## ដំណើរធម្មយាត្រាទៅស្រីលង្កា

ស្រុកស្រីលង្កាសម្បូរបុណ្យ ទឹកដីអរហន្តលោកគង់នៅ
ព្រះពុទ្ធក៏ទ្រង់ធ្លាប់យាងទៅ ក្នុងខ្លួនសង្កាត់ជ្រោះជ្រៅត្រជាក់ចិត្ត។
តែទីដែលគួរឲ្យជ្រះថ្លា គឺព្រះសាស្តាស្តេចអាណិត
បន្សល់ព្រះធាតុថ្លៃពិត ៗ ឲ្យពុទ្ធបរិស័ទទាំងប្រុសស្រី។
បានថ្វាយបង្គំធាតុពីរនោះឡើ ក្នុងសុវណ្ណមាលិកចេតិយ
បង្កើតសទ្ធាទាំងយប់ថ្ងៃ ដោយឧបនិស្ស័យផងពីមុន។
កាលឃើញព្រះស្រីពោធិព្រឹក្ស ដាក់ចិត្តឲ្យនឹកព្រះមានបុណ្យ
ទ្រង់មានករុណាបញ្ញាគុណ វិសុទ្ធិគុណប្រៀបពុំបាន។
ពេលថ្វាយបង្គំព្រះទលាដ ឧណ្ហីសធាតុដ៏ថ្កើងថ្កាន
ហាក់ដូចអណ្តែតផុតពីស្ថាន ព្រោះមិននឹកស្មានបានមកដល់។
ទាំងអក្ខកធាតុថ្លៃបវរ ព្រះកេសធាតុក៏ក្របានយល់

អ្នកជួបពិតជាបុណ្យឲ្យផល  ដែលមហាកុសលកើតព្រោះហេតុ។

ពុទ្ធស្ថានពិសេសមានមួយទៀត  គឺព្រះទន្តធាតុល្អត្រដែត

គង់ក្នុងកោដ្ឋមាសខ្ពស់មួយម៉ែត្រ  វន្ទាមិនផ្អែតទេម្ចាស់ថ្លៃ។

ដំបូលប្រក់មាសល្អអស្ចារ្យ  ពិតានមានផ្កាម្កៃប្រាំបី

ធ្វើពីមាសសុទ្ធរុងរឿងក្រៃ  រចនាដោយដៃជាងប្រណីត។

ជាទីសក្ការៈបូជា  តម្កល់ទន្តាព្រះទ្រង់ឫទ្ធិ

ចង្កូមស្តាំក្រោមល្អពេកពិត  ភ្លឺផ្លេកវិចិត្រដូចផ្កាយព្រឹក ។

ទីដែលបរិស័ទចាំរហូត  ភ្នំសុមនកូដល្អពន្លឹក

ខ្ពស់មែនតែនៅចាញ់ចិត្តនឹក  រលឹកដល់ស្នាមព្រះបាទថ្លៃ ។

មនុស្សម្នាជាច្រើនទាំងក្មេងចាស់  តស៊ូខ្លាំងណាស់ប្រឹងយប់ថ្ងៃ

អ្នកខ្លះវារឡើងពាក់ស្រោមដៃ  គិតថាទោះក្ស័យក៏មិនស្តាយ។

ចំណែកជនជាតិស្រីលង្កា  ស្រែកនមស្ការពីចម្ងាយ

ជាមួយពួកយើងយ៉ាងសប្បាយ ថាគេមកថ្វាយបង្គំព្រះ។

បរិស័ទខ្មែរយើងពឹងឈើច្រត់  ប្រសិនបើអត់មុខជាស្ទះ

មិនងាយឡើងទេព្រះគុណម្ចាស់ ព្រោះភ្នំខ្ពស់ណាស់កប់វេហាស៍ៗ
ពេលឡើងទៅដល់ចិត្តល្អស្អាត វន្ទាព្រះបាទដោយជ្រះថ្លា
ក្រាបថ្វាយបង្គំដល់សិរសា លើស្នាមបាទាព្រះពុទ្ធថ្លៃៗ
យប់នោះត្រជាក់ធ្លាក់សន្សើម រងាញ័រព្រឺមអាសូរក្រៃ
ដល់ជនគ្មានទីស្នាក់អាស្រ័យ សម្រាកផ្ទាល់ដីឥតអ្វីបាំងៗ
ពួកយើងជ្រៀតណែនក្នុងបន្ទប់ គង់គេងលក់ស៊ប់ព្រោះនឿយខ្លាំង
ណាមួយឡើងភ្នំអស់កម្លាំង ចាំតែភ្លឺស្រាងនឹងអាលងើបៗ
ទៅថ្វាយបង្គំព្រះបាទា ពេលនមស្ការចិត្តរំភើប
ត្រេកអរសប្បាយហាក់ដូចទើប ងើបពីស្ថានក្រោមមកសួគ៌ាៗ
ពេលនោះអរុណចាំងរស្មី បច្ចូសសម័យយើងនាំគ្នា
ឈរចាំគោរពសូត្រវន្ទា បែរទៅបូព៌ាទិសថ្ងៃរះៗ
តមកជនជាតិស្រីលង្កា ប្រទក្សិណបូជាដៃសំពះ
គោរពលើកទូលចង្ហាន់ព្រះ ថ្វាយចំពោះម្ចាស់ដ៏មានគុណៗ
តាំងពីព្រះអង្គចូលនិព្វាន បរិស័ទថ្វាយទានជាប់និរន្តរ៍

ស្មើពុទ្ធសករាជជាងពីរពាន់ គិតទាំងក្រោយមុនរាល់ ៗ ថ្ងៃ។

ចុងក្រោយឪនកាយថ្វាយបង្គំ លាទីឧត្តមបាទាថ្លៃ

រូបកាយឆ្ងាយពិតចិត្តអាល័យ មិនដឹងមានថ្ងៃណាជួបទៀត។

ម្ចាស់អើយទោះបីឃើញតែស្នាម ចិត្តនឹកជិតជាមមិនរវាត

សូមជួបត្រៃរតន៍គ្រប់ ៗ ជាតិ កុំបីឃ្លៀងឃ្លាតខុសប្រាថ្នា។

ពេលចុះពីភ្នំក៏ដូចឡើង ឈឺចុកដៃជើងសព្វកាយា

ប៉ុន្តែកម្លាំងចិត្តជ្រះថ្លា សប្បាយអស្ចារ្យភ្លេចឈឺចាប់។

យើងលាកូឡុមបូចេញឆ្ងាយហើយ រាត្រីចុងក្រោយហាក់ផ្តាំប្រាប់

ឲ្យនឹកលង្កាមហាកំណាប់ នឹកយប់ចុះអ័ព្ទពេលឡើងភ្នំ។

ពីថ្ងៃនេះទៅទោះនៅឆ្ងាយ វាចាចិត្តកាយខំបន្ទុំ

ព្យាយាមស្តាប់ធម៌ហើយអប់រំ ធ្វើទានសីលផ្សំប្រូបជាព្រះ។

ដោយឧបាសិកា **ខិម លក្ខណា**



# នឹកស្រុកព្រះណាស់ !

នឹកស្រុកព្រះណាស់ម្ចាស់ថ្លៃអើយ   នឹកមិនភ្លេចឡើយក្រោយពីបាន
ទៅថ្វាយបង្គំទីថ្កើងថ្កាន   សំវេជនីយដ្ឋានបួនកន្លែង។
ទាំងពេលបើកភ្នែកទាំងពេលធ្មេច   នឹកឃើញជានិច្ចតែម្នាក់ឯង
នឹកអស់សព្វឋានព្រះអង្គតែង   និមន្តខ្វាត់ខ្វែងគង់ប្រើប្រាស់។
នឹកខ្លាំងជាងគេពុទ្ធគយា   ដែលព្រះភគវាធ្លាប់បានត្រាស់
មហាពោធិ៍ភស្តុតាងបញ្ជាក់ច្បាស់ ឲ្យនឹកខ្លាំងណាស់រៀងរាល់ថ្ងៃ។
រួចទើបនឹកដល់ឈាបនដ្ឋាន   និងទីនិព្វានព្រះចមថ្លៃ
ស្តេចយាងទៅពេលបច្ចូសសម័យ សុក្រពេញបូណ៌មីខែពិសាខ។
រួចហើយចិត្តនឹកទៅកន្លែង   ព្រះអង្គសម្តែងព្រះធម្មចក្ក
កំណើតព្រះធម៌ព្រះសង្ឃជាក់   ប្រោសអង្គសាវកបញ្ចវគ្គីយ៍។
ឯទីប្រសូតិក៏អស្ចារ្យ   ឥន្ទព្រហ្មទេវតាមនុស្សមូលមីរ
ចាំថ្វាយបង្គំព្រះមុនី   ទាំងមហាប្រឹថពីក៏រញ្ជួយ។
ត្រេកអរទទួលព្រះមានបុណ្យ   ប្រោសសត្វគ្រប់ជាន់បាត់ទុក្ខព្រួយ

ក្នុងលោកមានតែព្រះអង្គមួយ ជាទីពឹងជួយលុះអមតៈ។

រួចបានអនុមោទនានឹកដល់ មហាបុណ្យកុសលព្រះកស្សបៈ
ទូលពុទ្ធបាទថ្ងៃលើសិរ្ស គោរពស្មោះស្ម័គ្រឥតគណនា។
រួចនឹកដល់គុណព្រះអរិយសង្ឃ លោកបានចងក្រងសង្គាយនា
ព្រះធម៌វិន័យថ្លៃមហិមា ឲ្យយើងរាល់គ្នាប្រតិបត្តិតាម។
ខំកាត់ពីឆ្ងាយថ្វាយបង្គំ តែស្ងាត់ជ្រងំឃើញតែស្នាម
សល់តែទីព្រៃវត្តអារាម ចិត្តរឹតជិតជាមនឹកព្រះពុទ្ធ។
អ្នកខ្លះទ្រាំបាននៅធម្មតា អ្នកខ្លះសោកាយំរន្ធត់
ស្តាយមិនបានជួបព្រះសុគត ព្រះទ័យបរិសុទ្ធស្អាតផូរផង់។
តែទោះមិនទាន់បានជួបក្តី ក៏ពុទ្ធវិន័យនៅគ្រប់ជង់
បើព្យាយាមរៀនដោយផ្ចិតផ្ចង់ អរិយមគ្គនាំត្រង់ទៅជួបព្រះ។

ដោយឧបាសិកា **ខិម លក្ខណា**



# ព្រៃគោសិង្គសាលវ័ន

# រុងរឿងដោយសារភិក្ខុណា ?

ពេលមួយក្នុងព្រៃគោសិង្គៈ　　មានព្រះកស្សបៈព្រះអនុរុទ្ធ
ព្រះមោគ្គល្លានព្រះសារីបុត្ត　　ជាសាវកពុទ្ធឆ្លាតប្រពៃ ។
ទាំងព្រះអានន្ទពុទ្ធុបដ្ឋាក　　ថែមព្រះរេវតៈព្រះនាមល្បី
កំពូលថេរៈមានគុណក្រៃ　　នាំគ្នាឃ្លាតខ្ទីថ្វាយបង្គំ ។
ព្រះមានព្រះភាគក្រាបទូលថា　　ពួកខ្ញុំព្រះករុណាបានប្រជុំ
ព្យាករបដិភាណតាមសមរម្យ　　រៀងខ្លួនដោយពុំហ៊ានមុសា ។
ខ្ញុំសារីបុត្តសួរអានន្ទ　　ថាព្រៃសាលវ័នគួរជ្រះថ្លា
ដើមឈើទាំងឡាយក៏មានផ្កា　　ចម្រុះល្អស្រស់រីកស្គុសស្គាយ ។
ក្រអូបឈ្ងុយឈ្ងប់សព្វកន្លែង　　គួរនាដូចក្លិនទិព្វផ្សព្វផ្សាយ
រាត្រីសោតក៏គួររីករាយ　　ពពកឃ្លាតឆ្ងាយមេឃស្រឡះ ។
គ្មានទឹកសន្សើមគ្មានផ្សែងអ័ព្ទ　　គ្មានរាហូចាប់ដីហុយប៉ះ
អានន្ទឬអ្នកឆ្លើយប្រកាស　　ព្រៃគោរុងរឿងដោយភិក្ខុណា ។
ព្រះអានន្ទតបក្នុងសាសនានេះ　　ភិក្ខុចាំចេះពុទ្ធវចនា
ទ្រទ្រង់សន្សំព្រះដីកា　　ធម៌ទាំងឡាយណាមានលំអ ។

បទដើមកណ្តាលនិងបទចុង គ្រប់ព្យញ្ជនៈក្នុងវេយ្យាករណ៍
ប្រកាសនូវព្រហ្មចរិយៈដ៏ បរិសុទ្ធ-បរិបូណ៌ទាំងអស់ ។
ធម៌ទាំងឡាយណាមានភាពដូច្នេះ ភិក្ខុនោះចេះគ្មានចន្លោះ
ជំនាញរត់មាត់ស្ទាត់ឥតខ្ចោះ ស្ម័គ្រស្មោះពិចារណាដោយចិត្ត ។
ភិក្ខុនោះតែងសម្តែងធម៌ ដល់បរិស័ទល្អបួនពួកពិត
ដោយបទនិងព្យញ្ជនៈល្អិត ជាបរិមណ្ឌលជាប់តគ្នា ។
ដើម្បីជួយដាស់គាស់រំលើង នូវអនុស័យគ្រប់វេលា
ព្រៃគោរុងរឿងបានដោយសារ ភិក្ខុនេះណាសារីបុត្ត ។
រូបខ្ញុំព្រះអង្គសួរបន្ត រេវតៈឆ្លើយតគ្មានតក់ស្លុត
ម្នាលអាវុសោសារីបុត្ត ភិក្ខុនៅក្នុងពុទ្ធសាសនា ។
ត្រេកអររីករាយពួនសម្ងំ រឿយ ៗ អប់រំនូវបញ្ញា
ស្ងប់ស្ងាត់ចិត្តដោយវិបស្សនា ចម្រើនសុញ្ញាគារធម៌ ។
ព្យាយាមប្រព្រឹត្តក្នុងសន្តាន មិនប្រាសចាកឈានថ្ងៃបវរ
ព្រៃគោសាលវ័នមានលំអ រុងរឿងដោយសារភិក្ខុនោះ ។
រូបខ្ញុំព្រះអង្គសួរអនុរុទ្ធ ប្រាជ្ញាស្រួចមុតឆ្លើយពីរោះ
ក្នុងពុទ្ធសាសនាដ៏ខ្ពង់ខ្ពស់ ភិក្ខុមើលឃើញនូវលោកធាតុ ។
មួយពាន់ដោយភ្នែកបរិសុទ្ធថ្លា ដូចទិព្វចក្ខុប្រសើរស្អាត

កន្ទង់ហួសក្អែកមនុស្សគ្រប់ជាតិ ប្រៀបដូចបុរសនៅខាងលើ ។
ក្រឡេកឃើញមណ្ឌលនៃខ្ទង់កង់ មួយពាន់ច្បាស់ត្រង់គ្រប់អន្ទើ
មើលពីប្រាសាទដ៏ប្រសើរ ព្រែះរុងរឿងបានដោយសារ ។
ភិក្ខុនោះឯងមានលំអ ខ្ញុំព្រះអង្គបន្តសាកច្ឆា
សួរមហាកស្សបៈដ៏ថ្លៃថ្លា លោកក៏ឆ្លើយថាសាសនាព្រះ ។
ពុទ្ធអង្គមានសង្ស័យអ្នកនៅព្រៃ សរសើរគុណនៃអ្នកបានលះ
មិនជាប់ជំពាក់ញាតិទ្រព្យផ្ទះ ចិត្តផុតស្រឡះអស់សៅហ្មង ។
ភិក្ខុនោះឯងតែងប្រព្រឹត្ត បិណ្ឌបាតឆ្ងាយជិតទាំងទ្រទ្រង់
សំពត់បង្សុកូលខ្លួនឯងផង សរសើរកន្ទង់លោកផងគ្នា ។
ភិក្ខុទ្រទ្រង់ត្រឹមតែបី នូវចីវរត្រៃដែលត្រូវការ
ជាអ្នកមិនមានក្តីប្រាថ្នា សន្តោសខ្វាំងក្លាដោយសុទ្ធចិត្ត ។
ជាអ្នកស្ងប់ស្ងាត់មិនប្រឡូក ប្រឡុំផ្សំប្រូកនឹងញាតិមិត្រ
ប្រុងប្រៀបព្យាយាមខ្លួនឯងពិត សំអាតផ្លូវចិត្តពុំមានខ្វិល ។
ជាអ្នកបរិបូណ៌ដោយបញ្ញា ច្រើនទាំងសមាធិនិងសីល
បរិបូណ៌វិមុត្តិឥតវល់វិល រួចផុតមន្ទិលចូលដល់ថ្នាក់ ។
ជាអ្នកបរិបូណ៌បរិសុទ្ធ ព្រមដោយវិមុត្តិញាណទស្សនៈ
បានសរសើរគុណដោយស្មោះស្ម័គ្រ លោកអ្នកទ្រទ្រង់គុណដូចគ្នា ។

ព្រៃគោរុងរឿងភ្លឺត្រចះ ដូចមេឃស្រឡះមានចន្ទ្រា
ក៏ដោយភិក្ខុរូបនេះណា សារីបុត្តមេត្តាជ្រាបសេចក្តី ។
តមកដល់វេនមហាមោគ្គល្លាន ព្យាករបដិភាណដោយប្រពៃ
លោកមានអាយុបាននិយាយ ថាម្នាលសារីបុត្តថ្លៃថ្លា ។
ភិក្ខុពីររូបឈ្លាសមុតមាំ សម្តែងអភិធម្មកថា
សាកសួរហើយដោះស្រាយប្រស្នា ដល់គ្នានឹងគ្នាឥតសៅហ្មង ។
កថារបស់ភិក្ខុនោះ ប្រព្រឹត្តទៅស្មោះដោយធម៌ផង
មិនបានរុករានគ្នាលោកផង សុខស្ងប់កន្លងធម្មសប្បាយ ។
ម្នាលអាវុសោសារីបុត្ត ព្រៃគោល្អផុតនឹងបរិយាយ
រុងរឿងដោយភិក្ខុទាំងឡាយ សាកសួរដោះស្រាយប្រស្នាធម៌ ។
រួចព្រះមោគ្គល្លានក្រាបបង្គំ ទូលម្ចាស់ឧត្តម(១)ជាបន្ត
ថាយើងរាល់គ្នាបានព្យាករ បដិភាណសមល្អដល់ខ្លួនហើយ ។
ឥឡូវសូមសួរសារីបុត្ត ចុងគេបំផុតមេត្តាឆ្លើយ
ព្រះសារីបុត្តមិនកន្តើយ ឆ្លើយប្រាប់ពួកយើងយ៉ាងនេះថា ។
ម្នាលអាវុសោមោគ្គល្លាន ភិក្ខុដែលមានក្នុងសាសនា
ព្រះមានព្រះភាគដ៏ថ្លៃថ្លា បញ្ញាផ្តាច់ការទៅលើចិត្ត ។

---

(១) គឺព្រះសម្មាសម្ពុទ្ធ ។

ឲ្យធ្វើតែក្នុងអំណាចខ្លួន បេ្ដជ្ញាមាំមួនមិនប្រព្រឹត្ត
មិនលុះទៅតាមអំណាចចិត្ត រួចផុតចាកពិតកាមាសវៈ ។
បើភិក្ខុនោះប្រាថ្នាដើម្បី នៅអស់សម័យបុព្វណ្ហៈ
ឬនៅអស់មជ្ឈន្តិកៈ អស់សាយណ្ហៈក៏នៅបាន ។
សុខដោយវិហារសមាបត្តិ ប្រៀបដូចមហាមាត្យនិងក្សត្រក្សាន្ត
ទ្រទ្រង់សំពត់គូប៉ុន្មាន ក៏អាចនៅបានគ្រប់វេលា ។
ព្រៃគោសិង្គសាលវ័ន រុងរឿងសោភ័ណក៏ដោយសារ
ភិក្ខុដែលបានតាំងបេ្ដជ្ញា ប្រើបញ្ញាការទៅលើចិត្ត" ។
ពេលនោះសម្ដេចព្រះទ្រង់ញាណ សរសើរបដិភាណខ្ពស់ប្រណីត
ដែលគ្រប់សាវកទូលលំអិត ព្យាករត្រូវពិតគួរជ្រះថ្លា ។
រួចហើយព្រះសារីបុត្តផ្ទឹម ហត្ថក្រាបបង្គំព្រះសាស្ដា
សូមព្រះរាជទានប្រោសមេត្តា តើលោកអង្គណានិយាយត្រូវ ។
ស្ដេចទ្រង់ត្រាស់ថាសារីបុត្ត ទាំងអស់គ្នាសុទ្ធតែត្រឹមត្រូវ
អាចញុំាងព្រៃគោរុងរឿងទៅ តែអ្នកទាំងឡាយចូរចាំស្ដាប់ ។
ភិក្ខុនៅក្នុងសាសនានេះ ឆាន់ហើយត្រិះរិះស្រួតប្រញាប់
អង្គុយពែនភ្នែនតាមទម្លាប់ ធាប់ពត់កាយត្រង់ផ្ចង់ស្មារតី ។
ឲ្យត្រង់ទៅមុខដោយគិតថា បើចិត្តអាត្មានៅអាល័យ

នៅប្រកាន់ជាប់ទ្រព្យលោកីយ៍ មិនរួចពីភ័យគឺអាសវៈ ។
ទេនោះអញនឹងមិនទម្លាយ ក្អែនចេញឆាយ ៗ នាំឲ្យអាក់
ទីព្រៃសាលវ័នគោសិង្គៈ រុងរឿងដោយសារកិក្ខុនោះ ។
គ្រប់អង្គស្តាប់ចប់ពុទ្ធភាសិត ត្រេកអរពេញចិត្តដោយចំពោះ
ព្រះសូរសៀងថ្លៃសែនពីរោះ សម្តេចទ្រង់យសប្រោសប្រទាន ។

ដោយឧបាសិកា **ខ្មៅ លក្ខណា**



# អ្នកជួយពិនិត្យខ្លឹមសារនិងអក្ខរាវិរុទ្ធ

*ឧទ្ទេសាចារ្យ* **សុវណ្ណត្ថេរោ ខឹង នំពាំ**

*ភិក្ខុ* **កោសលប្បញ្ញោ ឡូច ពិសិដ្ឋ**

*ឧទ្ទេសាចារ្យ* **សីលសំវរោ ស៊ូ សាម្ភត**

*សាមណេរ* **ឧត្តិធរោ ជឹម បូរិន**

*សាមណេរ* **ធម្មកាមតា ខឹង ស៊ីង**

*ក្រុមភិក្ខុសាមណេរ* **វត្តភ្នំដើម**



# កម្មវិធីផ្សព្វផ្សាយព្រះធម៌
# សម្តែងដោយ ភិក្ខុវជិរប្បញ្ញោ សាន សុជា

| ខេត្ត~ក្រុង | ស្ថានីយវិទ្យុ | វេលាផ្សាយ |
|---|---|---|
| ខេត្តសៀមរាប | FM 102.50 MHz | ៥.00 am ⇨ ៥.៣0 am រាល់ព្រឹក |
| ខេត្តកំពង់ចាម | FM 92.50 MHz | ៥.00 am ⇨ ៥.៣0 am រាល់ព្រឹក |
| ខេត្តស្ទឹងត្រែង | FM 100.50 MHz | ៥.៣0 am ⇨ ៦.00 am រាល់ព្រឹក |
| ខេត្តកំពង់ធំ | FM 98.30 MHz | ៥.៣0 am ⇨ ៦.00 am រាល់ព្រឹក |
| ខេត្តព្រះវិហារ | FM 99.00 MHz | ៥.៤៥ am ⇨ ៦.១៥ am រាល់ព្រឹក |
| ខេត្តពោធិ៍សាត់ | FM 100.50 MHz | ៦.៣0 pm ⇨ ៧.00 pm រាល់ល្ងាច |
| ខេត្តតាកែវ | FM 92.50 MHz | ៦.៣0 pm ⇨ ៧.00 pm រាល់ល្ងាច |
| ក្រុងកំពង់សោម | FM 92.00 MHz | ៦.៣0 pm ⇨ ៧.00 pm រាល់ល្ងាច |
| ខេត្តកំពង់ចាម | FM 92.50 MHz | ៧.៣0 pm ⇨ ៨.00 pm រាល់ល្ងាច |
| ខេត្តកំពង់ធំ | FM 88.50 MHz | ៧.៣0 pm ⇨ ៨.00 pm រាល់ល្ងាច |
| ខេត្តពោធិ៍សាត់ | FM 98.50 MHz | ៧.00 pm ⇨ ៨.00 pm យប់ថ្ងៃសីល |
| ខេត្តស្វាយរៀង | FM 103.75 MHz | ៨.00 pm ⇨ ៨.៣0 pm រាល់យប់ |

ការសម្តែងនូវព្រះសទ្ធម្ម នាំមកនូវសេចក្តីសុខ

# អ្នកឧបត្ថម្ភប្រាក់ផ្សព្វផ្សាយព្រះធម៌តាមវិទ្យុ

# ក្នុងតារាងខាងលើ

១. *ខេត្តស្ទឹងត្រែង* FM 100.50 MHz

២. *ខេត្តព្រះវិហារ* FM 99.00 MHz

៣. *ខេត្តស្វាយរៀង* FM 103.75 MHz

*ទាំង ៣ ប៉ុស្តិ៍នេះ ឧបត្ថម្ភប្រាក់ផ្សព្វផ្សាយជាប្រចាំ ដោយពុទ្ធបរិស័ទ នៅទីក្រុងម៉ែលប៊ន ប្រទេសអូស្ត្រាលី និង ពុទ្ធបរិស័ទនៅប្រទេសញូស៊ីឡែន ។*

*ចំពោះការផ្សាយព្រះធម៌នៅតាមវិទ្យុ ៨ ប៉ុស្តិ៍ទៀត វិទ្យុខេត្តណា គឺពុទ្ធបរិស័ទនៅក្នុងខេត្តនោះ ជាអ្នកឧបត្ថម្ភ ជាប្រចាំ ។*



# សៀវភៅធម៌ដែលបានរៀបរៀង
# ដោយ ភិក្ខុវជិរប្បញ្ញោ សាន សុជា



**ព្រះធម៌គឺជាប្រទីបសម្រាប់បំភ្លឺជីវិតសត្វលោក**

# ឈ្មោះអ្នកឧបត្ថម្ភប្រាក់បោះពុម្ពសៀវភៅនេះ

១.ប្រាក់សល់ពីសៀវភៅ ព្រះធម្មបទ៣២គាថា........................ ៥.៩៧៦ USD
ឯកឧត្តម ស្បោង សារ៉ាត់ និងលោកជំទាវ ស៊ាន ឈុនហេង.... ៦០០ USD
ឧបាសិកា យុត តាំងអ៊ិន (ភ្នំពេញ)....................................... ៣០០ USD
ឧបាសិកា ឱម លក្ខណា ព្រមទាំងបុត្រ ................................ ២០០ USD
ឯកឧត្តម ទុយ គី និងលោកជំទាវ កង វុទ្ធា និងបុត្រ ........... ២០០ USD
ឧបាសិកា ម៉េង សំបូរ (អូស្ត្រាលី)....................................... ១៥០ USD
ឧបាសិកា ឈ ប៊ុនលី ព្រមទាំងបុត្រ (ព.ស.)............................. ១១០ USD
លោក ផុក ស៊ីថា និងឧ.សិ. ម៉ម ម៉ាឡា + បុត្រ (ព្រះសីហនុ)... ៥០ USD
ឧបាសិកា ស៊ូ មួយ និងបងប្អូន (កំពង់សោម) ..................... ៥០ USD
ថៃ ប៊ូលីន (កំពង់សោម) .................................................. ៥០ USD
ឧបាសិកា ស៊ូ ស៊ីម និងបងប្អូន (កំពង់សោម)................................ ៥០ USD
ឧបាសិកា ង៉ូវ ហុងឡាង ព្រមទាំងបុត្រ (ពោធិ៍សាត់) ............ ៤០ USD
ឧបាសិកា ង៉ូវ ហុងទៀង និង លឹម មករា (ពោធិ៍សាត់) ............. ២០ USD
ឧ.ស. ម៉ូវ ធីម និងឧ.សិ. ហ៊ាន ណៃយឹម + បុត្រ (កំពង់ចាម).. ២០ USD
ឧបាសិកា រី (អូស្ត្រាលី)...................................................... ២០ USD
លោក កិក សុវណ្ណ និងភរិយាព្រមទាំងបុត្រ (កំពង់សោម)...... ២០ USD
លោក ឡោ ម៉េងឡុង និងអ្នកស្រី ម៉ារី + បុត្រ (ភ្នំពេញ)........ ២០ USD
លោក លឹម ឆៃហេង អ្នកស្រី សែម សុវណ្ណី+បុត្រ (ស្ទោង).... ២០ USD
ឧ.ស. តុល ថៃ និង ឧ.សិ. ព្រំ យ៉ាត + បុត្រ (ភ្នំពេញ) ......... ២០ USD

ឧ.ស. ស្រី ឆេង និង ឧ.សិ. គង់ ផេង + បុត្រ (ស្ទោង) .......... ២០ USD

ឧ.សិ. ម៉ៅ គីមសឺន + បុត្រ (ស្ទោង) .................................. ២០ USD

លោកស្រី កុល ចិន្តា + បុត្រ (ព្រះសីហនុ)........................... ២០ USD

ឧបាសិកា ឈាង ណួយ + បុត្រ + ចៅ (ស្ទោង) .................... ២០ USD

ឧបាសិកា ស៊ាន ឆៃហន + បុត្រ (ស្ទោង) ........................... ១៥ USD

លោក យី ស៊ា អ្នកស្រី ងួន គីមលី (កំពង់សោម)................. ១៥ USD

ឧ.ស. ម៉ែ ឌុល ឧ.សិ. ហ៊ុង ស៊ុំ (កំពង់សោម)............................... ១៥ USD

លោក ថេង វិសិដ្ឋា អ្នកស្រី ប៉ូឡែន+បុត្រ (ស្ទោង) ........ ១០ USD + ១០.០០០៛

ឧបាសិកា ឈ ទូច ព្រមទាំងបុត្រ (ពោធិ៍សាត់) ........................ ១០ USD

លោក ហូ សុធី និងភរិយា (កំពង់សោម) .................................. ១០ USD

ឧបាសិកា ឈិន ប៊ិន ព្រមទាំងបុត្រ (ភ្នំពេញ) ........................... ១០ USD

ឧបាសក យង់ សៅហាក់ និងឧបាសិកា កាំង ឡេងហ៊ាង (ព.ស.).. ១០ USD

ឧបាសក ជិន ឈួយ និងឧបាសិកា ជីវ គយ + បុត្រ (ព.ស.). ១០ USD

ឧបាសិកា ថោង ឈាន ព្រមទាំងបុត្រ (ព.ស.)......................... ១០ USD

ឧបាសក ម៉ោល អាន និងឧបាសិកា ប៉ាល់ ឡាអ៊ី (ព.ស.)........... ១០ USD

ឧបាសិកា ឡោ វួចឡេង ព្រមទាំងកូនចៅ (ព.ស.).................... ១០ USD

ឧបាសិកា គួច មួយលី ព្រមទាំងបុត្រ (ព.ស.).......................... ១០ USD

ឧ.សិ. អែល គីមហាន ព្រមទាំងបុត្រ (ស្ទោង) .................... ១០ USD

លោក ឈៀង បុណ្ណា និងភរិយា + បុត្រ (ព្រះសីហនុ).......... ១០ USD

ឧបាសិកា លាវ ហួន + បុត្រ (ព្រះសីហនុ)......................... ១០ USD

ឧ.ស. ឡុង ផូ និងឧ.សិ. ហង់ ប៊ុនផល + បុត្រ (កំពង់ចាម)..... ១០ USD

ឧបាសិកា យ៉ឹម ស៊ីវហេង + បុត្រ (កំពង់ចាម)........................ ១០ USD

លោក អ៊ុង ប៊ុនចាយ និងឧ.សិ. ម៉ៅ ស្រីមុំ + បុត្រ (ស្មោង) .. ១០ USD

ឧ.សិ. កឹក ឆេងអាន + បុត្រ (ស្មោង) ................................. ១០ USD

លោក ហាប់ វ៉ែន និង ឧ.សិ សឹង សូនី + បុត្រ (ស្មោង)......... ១០ USD

ឧ.សិ. លាស់ គឹមហ៊ាន + បុត្រ (បាត់ដំបង) .......................... ១០ USD

ឧ.ស. ខ្លូត សាម៉ុឌី និង ឧ.សិ. ប៊ិន ម៉ា + បុត្រ (ស្មោង).......... ១០ USD

ទាយិកា ស្រី ប៉ូលីន + បុត្រ (ស្មោង) .................................. ១០ USD

ភិក្ខុ សីលវន្តោ ចាយ សំអែ (វត្តក្តីដើម)............................... ១០ USD

ទាយិកា ជា សុខា + បុត្រ (ស្មោង) ...................................... ១០ USD

ភិក្ខុ ស្រី ប៉ូថេង (អូស្ត្រាលី)................................................. ១០ USD

ឧបាសិកា ខេង កៅនី (អូស្ត្រាលី)......................................... ១០ USD

ឧបាសិកា ហុង ថាន់ (ស្មោង) ............................................. ១០ USD

ឧ.ស. ពៅ វិចិត្រ និងឧ.សិ. ឌុំ សុផល + បុត្រ (កំពង់ចាម)..... ១០ USD

ឧបាសក ចៅ កុសល និងភរិយាព្រមទាំងបុត្រ (ព.ស.)................ ៥ USD

ឧបាសិកា ជុំ រុន ព្រមទាំងបុត្រ (ព.ស.)...................................... ៥ USD

ឧបាសិកា ហុក ចន្ថា ព្រមទាំងបុត្រ (ព.ស.)............................. ៥ USD

ឧបាសិកា ចាន់ ឡាន ព្រមទាំងបុត្រ (ព.ស.).............................. ៥ USD

ឧបាសិកា ដួង គុយអេង និងក្រុមគ្រួសារ (ភ្នំពេញ) ................... ៥ USD

ឧបាសិកា តាំង អ៊ុម និងក្រុមគ្រួសារ (ភ្នំពេញ) ........................ ៥ USD

ឧបាសិកា អ៊ីវ យូណា (ពោធិ៍សាត់)............................................ ៥ USD

ឧបាសិកា គីម អំបូរី ព្រមទាំងបុត្រ (ពោធិ៍សាត់)........................ ៥ USD

លោក ខូយ ឌី និងអ្នកស្រី សុ ការមេ្យ ព្រមទាំងបុត្រ (ព.ស.)...... ៥ USD

ឧបាសិកា តាំង លុយ ព្រមទាំងបុត្រ (ពោធិ៍សាត់)....................... ៥ USD

លោក ស៊ិន សារុន និងឧបាសិកា ឈុន ស៊ីណាត (ពោធិ៍សាត់)..... ៥ USD

ឧបាសិកា ស៊ុំន ណារី ព្រមទាំងបុត្រ (ពោធិ៍សាត់).................. ៥ USD

ឧបាសិកា សៀ ឆេង ព្រមទាំងបុត្រ (ពោធិ៍សាត់)........................ ៥ USD

ម៉ា ខូវ ខាអ៊ីម ព្រមទាំងចៅ (ពោធិ៍សាត់)................................ ៥ USD

ឧបាសិកា មុំតូច និងស្វាមី (ពោធិ៍សាត់).................................... ៥ USD

ឧបិាសកា ប៉ែន ស៊ិនមាន (ពោធិ៍សាត់)....................................... ៥ USD

ឧបាសិកា គីម ស៊ិន ព្រមទាំងបុត្រ (ពោធិ៍សាត់)....................... ៥ USD

លោក សាន សារ៉េត និងភរិយា + បុត្រ (ព្រះសីហនុ)........... ៥ USD

ឧបាសិកា មាស រ៉ែន (ព្រះសីហនុ)......................................... ៥ USD

ឧបាសិកា ដួង ស៊ីនួន (ព្រះសីហនុ)...................................... ៥ USD

ឧបាសិកា លឹម គីមលី + បុត្រ (ព្រះសីហនុ)......................... ៥ USD

ឧបាសិកា គីម សុខុន + បុត្រ (កំពង់ចាម).............................. ៥ USD

ឧបាសិកា ឆាយ ស៊ា + បុត្រ (កំពង់ចាម)............................... ៥ USD

ឧបាសិកា គ្រុយ លាងជុន + បុត្រ (កំពង់ចាម)........................ ៥ USD

ឧ.ស. កៅ ប៉ុនណា និងឧ.សិ. ស៊ុយ ស៊ីណេត + បុត្រ (កំពង់ចាម).... ៥ USD

លោក អ៊ាម ងួនឆេង និងឧ.សិ. ឌុំ ជាលី + បុត្រ (កំពង់ចាម)..... ៥ USD

ឧបាសិកា ប៉ាង គឹមចេង + បុត្រ (កំពង់ចាម)............................ ៥ USD

ឧ.សិ. ស្រី ណារិន ព្រមទាំងបុត្រ (ស្មោង) .......................... ៥ USD

ឧ.សិ. ជិន រ៉ាន់ ព្រមទាំងបុត្រ (សៀមរាប)............................ ៥ USD

កុមារា បញ្ញារិទ្ធ និងកុមារា បញ្ញារត្ន (ស្មោង).......................... ៥ USD

សាមណេរ បរមបណ្ឌិតោ ណៃ សីហា (ក្ដីដើម)...................... ៥ USD

ឧបាសិកា គាំ កេង (ស្មោង) ............................................... ៥ USD

លោក ឡូ វណ្ណារ៉ា និង ទិត ណៃហួ + បុត្រ (ស្មោង) ........... ៥ USD

ឧ.ស. ព្រុំ ម៉េងជូ និង ឧ.សិ. ជឿន ផូ + បុត្រ (ស្មោង) .......... ៥ USD

លោក ឯក វណ្ណសិទ្ធ និង ឧ.សិ. ហូ គឹមហាន + បុត្រ (ស្មោង) . ២ USD

ឧ.ស. សួន យ៉េន និងឧ.សិ. ម៉ាង ផេន ............................... ២ USD

ឧបាសិកា ឃុន វាសនា (អូស្ត្រាលី)...................................... ១០០ AUD

ឧបាសក ឡៅ គិមង្ហួន ឧបាសិកា ឌួង លី + បុត្រ (អូស្ត្រាលី) ១០០ AUD

ឧបាសក ឃុន ប៊ី និងឧបាសិកា ចែត ម៉ៅ (អូស្ត្រាលី)............ ៥០ AUD

ឧបាសក ចៅ ស៊ាប និងគ្រួសារ (អូស្ត្រាលី).......................... ៥០ AUD

ឧបាសិកា ស៊ុំ គឹមហេង ព្រមទាំងកូនចៅ (អូស្ត្រាលី)............ ៥០ AUD

ឧបាសិកា លឿ រឿត ព្រមទាំងកូនចៅ (អូស្ត្រាលី)................ ៥០ AUD

ឧបាសិកា ផន ដារា ព្រមទាំងកូនចៅ (អូស្ត្រាលី).................... ៥០ AUD

ឧបាសិកា កាំង ជូ ព្រមទាំងកូនចៅ (អូស្ត្រាលី).................... ៥០ AUD

ឧបាសិកា លីវ ទូច ព្រមទាំងបុត្រធីតា (អូស្ត្រាលី).................. ៥០ AUD

ឧបាសក ឈិត ទ្រី និងឧបាសិកា បាន់ ណៃហៀង (អូស្ត្រាលី).. ៥០ AUD

ឧបាសិកា សេក ខុនសុខេន ព្រមទាំងបុត្រធីតា (អូស្ត្រាលី)....... ៥០ AUD

ឧបាសក យង់ គឹមសាន និងឧបាសិកា យង់ ម៉ាលី (អូស្ត្រាលី)... ៥០ AUD

ឧបាសិកា អ៊ូច សុផល្លី (អូស្ត្រាលី)..................................... ៣០ AUD

ឧបាសិកា ពេជ្រ សឿម និងស្វាមីព្រមទាំងបុត្រ (អូស្ត្រាលី)..... ២០ AUD

ឧបាសក គង់ ហ៊ាល ព្រមទាំងគ្រួសារ (អូស្ត្រាលី).................. ២០ AUD

ឧបាសិកា ម៉េង ប៊ុនធារី (អូស្ត្រាលី)....................................... ២០ AUD

ឧបាសិកា កៅ នី (អូស្ត្រាលី)................................................. ១០ AUD

ឧបាសិកា មិន ឆៃអ៊ន (អូស្ត្រាលី)......................................... ១០ AUD

ឧបាសក ថ្លង់ សុវណ្ណ ព្រមទាំងគ្រួសារ (អូស្ត្រាលី)................ ១០ AUD

ឧបាសិកា ស្រ៊ុម អេង (អូស្ត្រាលី)........................................ ១០ AUD

ឧបាសក សម ឆាយ (អូស្ត្រាលី)........................................... ១០ AUD

ឧបាសិកា (កូនលោកយាយសេង) (អូស្ត្រាលី)......................... ៥ AUD

ឧបាសិកា នួន គង់ (អូស្ត្រាលី)............................................. ៥ AUD

ប្រាក់សល់ពីការផ្សាយព្រះធម៌តាមវិទ្យុខេត្តតាកែវ ................. ១.០០០.០០០៛

លោកយាយ ណែង (ស្មោង)
លោកយាយ ស៊ឹង
លោកយាយ យ៉ុម (ស្មោង)
និងពុទ្ធបរិស័ទ ........................... ២០០.០០០៛

ឧបាសិកា អ៊ីង គឹមរស់ ព្រមទាំងបុត្រ (ភ្នំពេញ)........................ ១០០.០០០៛

ឧបាសិកា ទៀប ម៉ាក់ឃី ព្រមទាំងបុត្រ (ពោធិ៍សាត់).............. ១០០.០០០៛

លោក នួន ឡូន និងអ្នកស្រី ឡុង មុនីបញ្ញា (ភ្នំពេញ) ........... ១០០.០០០៛

ឧបាសិកា លឹម ចាន់នារី (តាកែវ)...................................... ១០០.០០០៛

លោក ផាន់ ណាគា + បុត្រ (ព្រះសីហនុ)......................... ១០០.០០០៛

ឧបាសិកា ស៊ូ មួយ (ព្រះសីហនុ)....................................... ១០០.០០០៛

ឧបាសិកា បេ ស៊ូង៉ោ + បុត្រ (ស្ទោង) ................................. ៨០.០០០៛

លោក ហួន ច័ន្ទបូរិទ្ធ អ្នកគ្រូ សូផៃ សូផានី (ពោធិ៍សាត់) ..... ៥០.០០០៛

ឧបាសិកា ឆេង អៀង ព្រមទាំងបុត្រ (ពោធិ៍សាត់).................... ៥០.០០០៛

លោក ប៊ុច អេងលី និងឧបាសិកា ជីង ស៊ូ ព្រមទាំងបុត្រ (ព.ស.).. ៥០.០០០៛

ពុទ្ធបរិស័ទ ឃុំ អនទ្បាក្រង (ស្ទោង) .................................... ៥០.០០០៛

ឧ.ស. អ៊ីវ ហ៊ុំ និងឧ.សិ. ព្រំ យុំ + បុត្រ (ស្ទោង) ............. ៥០.០០០៛

លោក លឹម ប៉ូសាយ និងឧ.សិ. ម៉ៅ ស៊ីមហេង (ស្ទោង)......... ៥០.០០០៛

លោកយាយ ហុង គាវ ព្រមទាំងបុត្រ (កំពង់សោម) ........ ៥០.០០០៛

ឧបាសិកា សុខ សៀក + បុត្រ (កំពង់សោម)................................ ៥០.០០០៛

ឧបាសិកា ឈូក យ៉ង់ + បុត្រ (កំពង់សោម)................................ ៤០.០០០៛

ឧបាសិកា ប្រាក់ សារី + បុត្រ (ព្រះសីហនុ)......................... ៤០.០០០៛

លោក ពេក បញ្ញា និងឧ.សិ. អុង ស៊ាងគ្រី + បុត្រ (ស្ទោង)...... ៤០.០០០៛

កុមារា ណាត ធ វ័ន្ត (ស្ទោង) ............................................. ៤០.០០០៛

ឧ.ស. ម៉ៅ រឿង និងឧ.សិ. លី សេងហ៊ន + បុត្រ (ស្ទោង)....... ៤០.០០០៛

ឧ.ស. លី ស៊ុនហ៊ាង និងឧ.សិ. ប៊ុក ធារី + បុត្រ (ស្ទោង)........ ៤០.០០០៛

ឧ.ស. កែ ឈុនទី និងឧ.សិ. ប៊ុក ស៊ីចាន់ + បុត្រ (ស្ទោង)...... ៤០.០០០៛

ឧបាសិកា ង៉ូវ យន់ + បុត្រ (ស្មោង)...................................... ៤០.០០០៛

ឧបាសិកា ឈ ស៊ូជង់ + បុត្រ + ចៅ (ស្មោង) ....................... ៤០.០០០៛

លោក តាំង ហ៊ត និង ឧ.សិ. ឈ ស៊ូណៃ + បុត្រ (ស្មោង)....... ៤០.០០០៛

លោក ឈ ប៉េងចេង និង ករិយា + បុត្រ (ស្មោង) ................ ៤០.០០០៛

លោក កុល សុខគុណកា និងករិយា + បុត្រ (អូស្រ្តាលី)......... ៤០.០០០៛

លោក ឡេង ឡាក់ និងអ្នកស្រី ស៊ុក ឡៃគី (កំពង់សោម). ៤០.០០០៛

ឧបាសិកា ជា កែវមុនី និងស្វាមីព្រមទាំងបុត្រ (ភ្នំពេញ) ........... ៣០.០០០៛

ឧបាសិកា ទឹម + ស៊ីវ៉ាន ព្រមទាំងបុត្រ (កំពង់សោម)........... ៣០.០០០៛

សាមណេរ ជឹម បូរិន (មណីរត្ន)........................................... ៣០.០០០៛

ឧបាសិកា សុខ ណៃ + បុត្រ (ព្រះសីហនុ)......................... ៣០.០០០៛

ឧ.ស. ចាន់ ម៉ារ៉ា និង ឧ.សិ. មុំ ហ៊ុម + បុត្រ (ស្មោង) ........ ៣០.០០០៛

ឧ.ស. កង កេត និង ឧ.សិ. សុខ វ៉េត + បុត្រ (ស្មោង).......... ៣០.០០០៛

លោក ហែល ស៊ុនគី និងឧ.សិ. សាំង សំអាត + បុត្រ (ភ្នំពេញ) .. ៣០.០០០៛

លោក ម៉ៅ គឹមហុង និងឧ.សិ. កឹ ឆេលន (ស្មោង) .............. ៣០.០០០៛

ទាយក ទាង តៅ និងទាយិកា គង់ សុឃឿន+បុត្រ (ស្មោង)....... ៣០.០០០៛

ភិក្ខុ ឈាង គុយឈិន ......................................................... ៣០.០០០៛

ឧបាសក ង៉ួន គឹមសួ និងឧបាសិកា ថៃ សារិន (ពោធិ៍សាត់).......... ២០.០០០៛

លោកតា ប៉ាវ គីម និងឧបាសិកា ឈាន សុន + បុត្រ (ព.ស.).. ២០.០០០៛

ឧបាសិកា ជា អ៊ូក ព្រមទាំងបុត្រ (ពោធិ៍សាត់).......................... ២០.០០០៛

ឧបាសិកា អេង ណៃហួយ ព្រមទាំងបុត្រ (ពោធិ៍សាត់)............. ២០.០០០៛

ឧបាសិកា ជុំ សឿន (ពោធិ៍សាត់)........................................ ២០.០០០៛

កញ្ញា ទិត បុល (ពោធិ៍សាត់)................................................ ២០.០០០៛

ឧបាសក ទិត ធុន និងឧបាសិកា ឌឿន (ពោធិ៍សាត់).................. ២០.០០០៛

ឧបាសិកា ស៊ីវ ឡេង ព្រមទាំងសាច់ញាតិ (កំពង់សោម) ... ២០.០០០៛

ស៊ាង ពូ និង យូ ហង ព្រមទាំងបុត្រ (កំពង់សោម) .......... ២០.០០០៛

ឧបាសក ហ៊ុយ សារ៉េត និងឧបាសិកា តិប ឡៃហ៊ួ (កំពង់សោម). ២០.០០០៛

ភិក្ខុ ឥន្ទបញ្ញោ អាក់ យឿន (មណីរត្ន)................................ ២០.០០០៛

ឧ.ស. កៅ ប៊ុនណា និងឧ.សិ. ស៊ុយ ស៊ីណេត (កំពង់ចាម)...... ២០.០០០៛

ម៉ម សិទ្ធី និង អ៊ូង ម៉ាទីណេ (កំពង់សោម)............................ ២០.០០០៛

ឧបាសិកា អ៊ុក ញ៉ែម + បុត្រ (ព្រះសីហនុ).......................... ២០.០០០៛

ឧបាសិកា យូ គីមឡា + បុត្រ (ព្រះសីហនុ).......................... ២០.០០០៛

ឧបាសិកា យូ ហួង + បុត្រ (កំពង់ចាម).................................. ២០.០០០៛

ឧបាសក លឹម សារ៉េត (ព្រះសីហនុ)................................... ២០.០០០៛

ឧបាសិកា សំ ជុន + បុត្រ (ស្មោង) ..................................... ២០.០០០៛

ឧ.ស. ជុំ គឿន និងឧ.សិ. កោគ រ៉ុន + បុត្រ (ស្មោង) ............. ២០.០០០៛

លោក គង់ ហ៊ីម និងអ្នកស្រី គាម ណាត + បុត្រ (ស្មោង)...... ២០.០០០៛

លោក អាំង ណាំ និងឧ.សិ. មួយ ហ្គេច + បុត្រ (ស្មោង)........ ២០.០០០៛

លោក អុក សែត និងឧ.សិ. ញឹក គីមរ៉ុង + បុត្រ (ស្មោង)........ ២០.០០០៛

ឧបាសិកា ខូវ ហ្គេចយាង + បុត្រ (ស្មោង) ............................ ២០.០០០៛

លោក ជូ វណ្ណរិត និងអ្នកស្រី ពេក សុភី + បុត្រ (ស្មោង)...... ២០.០០០៛

| | |
|---|---|
| ឧបាសិកា ចាន់ថា + បុត្រ (ស្មោង)........................................ | ២០.០០០៛ |
| ឧបាសក ស៊ិន វ៉ាន់ និងភរិយា + បុត្រ (ស្មោង)...................... | ២០.០០០៛ |
| ឧបាសិកា កែវ ផុនលី + បុត្រ (ស្មោង)................................. | ២០.០០០៛ |
| លោក ថេង ណាត និងឧ.សិ. កាំង រ៉ាវី + បុត្រ (ស្មោង)......... | ២០.០០០៛ |
| ឧបាសិកា គឹក លឿន + បុត្រ (ស្មោង) ................................. | ២០.០០០៛ |
| កុមារា អ៊ុង វិសាល (ស្មោង) ............................................... | ២០.០០០៛ |
| ឧ.ស. ប៉ោ ទ្រី និងឧ.សិ. ញឹក គឹមយន់ + បុត្រ (ស្មោង)........ | ២០.០០០៛ |
| លោក ហេង គ្រី និងឧ.សិ. លួង គឹមណៃ + បុត្រ (ស្មោង)....... | ២០.០០០៛ |
| ឧបាសក សន ប៊ុនធឿន (ស្មោង)........................................... | ២០.០០០៛ |
| ឧបាសិកា ឈ ស៊ីវខេង + បុត្រ (ស្មោង).............................. | ២០.០០០៛ |
| ឧ.ស. ប៊ុក ប៊ុនធឿន និងឧ.សិ. ប៊ិច ឈុន្នី + បុត្រ (ស្មោង).. | ២០.០០០៛ |
| ឧបាសិកា កង ស៊ីវវិន + បុត្រ (ស្មោង).............................. | ២០.០០០៛ |
| ឧបាសក យាម សុខា (ស្មោង)............................................. | ២០.០០០៛ |
| ឧបាសិកា កែ វិឡាប + ចៅ (ស្មោង).................................. | ២០.០០០៛ |
| ឧបាសិកា ព្រំ ណាន និងស្វាមី + បុត្រ (ស្មោង)..................... | ២០.០០០៛ |
| ឧបាសិកា លី ឈុនណេន+ បុត្រ (ស្មោង) ............................ | ២០.០០០៛ |
| ឧបាសិកា ជាន យ៉េង + បុត្រ (ស្មោង)................................. | ២០.០០០៛ |
| លោក ឡៅ តាំងប៉ក់ អ្នកស្រី លាង គឹមហ៊ី + បុត្រ ............. | ២០.០០០៛ |
| សាមណេរ បិតវេទោ ត្រាវ ស្មឿន (ក្ដីដើម) ......................... | ២០.០០០៛ |
| ឧបាសិកា ប៊ុក ចាន់ទី + បុត្រ + ចៅ (ស្មោង)...................... | ២០.០០០៛ |

ឧ.ស. អ៊ាន អាន់ និងឧ.សិ. អ៊ុន សុផា + បុត្រ (ស្ពានស្ពឺ)........ ២០.០០០៛

ឧបាសិកា ជីង មុយហ៊ី + បុត្រ (ស្ពានស្ពឺ)................................ ២០.០០០៛

ឧបាសិកា ញ៉ឹក ឆេងលន់ + បុត្រ (ស្ពានស្ពឺ)............................ ២០.០០០៛

ឧបាសិកា ទាវ គីមអាន + បុត្រ (ស្ពានស្ពឺ)............................... ២០.០០០៛

លោក អុង ហុកនា អ្នកស្រី សឿន ចរិយា + បុត្រ (ស្ពានស្ពឺ)... ២០.០០០៛

លោក ទី សំណាង និងភរិយា + បុត្រ (ភ្នំពេញ)................... ២០.០០០៛

លោក ទី សុគន្ធា (សៀមរាប).............................................. ២០.០០០៛

លោក ទី សំនៀង (សៀមរាប)............................................. ២០.០០០៛

អ្នកស្រី ទី សំអាត (ស្ពានស្ពឺ) ................................................ ២០.០០០៛

ឧបាសិកា ឈ ទាង + បុត្រ (ស្ពានស្ពឺ) .................................. ២០.០០០៛

ឧបាសិកា ឈ ស៊ូខេង និងស្វាមី + បុត្រ (ស្ពានស្ពឺ)................. ២០.០០០៛

ឧបាសក ឈ ស៊ូជាង និងភរិយា + បុត្រ (ភ្នំពេញ)................ ២០.០០០៛

លោក ឈ ស៊ូតិច និងភរិយា + បុត្រ (អាមេរិក)................... ២០.០០០៛

អ្នកស្រី តាំង ជីគីម + បុត្រ (ភ្នំពេញ)................................. ២០.០០០៛

ឧបាសិកា ឈ ថេង (ស្ពានស្ពឺ).............................................. ២០.០០០៛

លោក ណាំង ហ៊ាង និងភរិយា + បុត្រ (ស្ពានស្ពឺ)................... ២០.០០០៛

ឧបាសិកា តាំង សុខហ៊ុង + បុត្រ (ស្ពានស្ពឺ)............................ ២០.០០០៛

លោក តាំង កុកហៃ និងភរិយា + បុត្រ (ភ្នំពេញ).................. ២០.០០០៛

លោក តាំង កុកគង់ (ភ្នំពេញ)............................................... ២០.០០០៛

យុវជន តាំង ម៉េងឡុង (ស្ពានស្ពឺ).......................................... ២០.០០០៛

កុមារី តាំង យីលីង (ស្មោង)................................................ ២០.០០០៛

ភិក្ខុ ជុំ ធម្មនី (វត្តព្រះនាង).................................................. ២០.០០០៛

ឧ.ស. ឈាន ឈឺន និងឧ.សិ. អ៊ីម ឡូត + បុត្រ (ស្មោង) ... ២០.០០០៛

ឧ.ស. ប៉េង វិបុល និង ឈាន ឡៃហ៊ីម (ស្មោង) ................ ២០.០០០៛

លោក ជា សារ៉ាមុនី និងភរិយា + បុត្រ (ស្មោង) .................... ២០.០០០៛

ភិក្ខុ ជឿន ជេត (វត្តព្រះនាង).............................................. ១៥.០០០៛

ឧបាសិកា ឈឹម សិលា ព្រមទាំងបុត្រ (ពោធិ៍សាត់).................. ១៥.០០០៛

លោក ស៊ឹម គឹមសឿន និងភរិយា + បុត្រ ............................ ១១.៥០០៛

ឧបាសិកា អ៊ុក សាផន (ព្រះសីហនុ).................................... ១១.០០០៛

លោក រិន និងឧបាសិកា ទៀង អឿន ព្រមទាំងបុត្រ (ពោធិ៍សាត់).. ១០.០០០៛

ឧបាសិកា ជុំ ហេង ព្រមទាំងបុត្រ (ពោធិ៍សាត់)........................... ១០.០០០៛

ឧបាសិកា ទឹម មុត ព្រមទាំងបុត្រ (ពោធិ៍សាត់)........................... ១០.០០០៛

ឧបាសិកា ព្រុំ អូន ព្រមទាំងបុត្រ (ពោធិ៍សាត់)........................... ១០.០០០៛

ភិក្ខុ អ៊ូ កន (គង់វត្តព្រែកស្តី) (ពោធិ៍សាត់).................................. ១០.០០០៛

ឧបាសិកា នូ ស៊ីណាយ ព្រមទាំងបុត្រ (ពោធិ៍សាត់)..................... ១០.០០០៛

ឧបាសិកា តូ ផាន់នី (ពោធិ៍សាត់)............................................ ១០.០០០៛

ឧបាសក អ៊ិន ទុយ និងឧបាសិកា អូត សាមុត + បុត្រ (ព.ស.)... ១០.០០០៛

ឧបាសក អាត់ និងឧបាសិកា លី (ពោធិ៍សាត់)............................ ១០.០០០៛

លោក ចាំង ស៊ិ និងអ្នកស្រី ទេព គួន (ពោធិ៍សាត់)..................... ១០.០០០៛

ឧបាសិកា ឡេងធំ (ពោធិ៍សាត់)................................................... ១០.០០០៛

ឧបាសិកា ម៉ក់ យ៉ែម (ពោធិ៍សាត់)............................................ ១០.០០០៛

ឧបាសិកា កែ ដាក និង កែ គី (ពោធិ៍សាត់)................................ ១០.០០០៛

ឧបាសក ម៉ម ហ៊ាម និងឧបាសិកា ជុំ អៀម (ពោធិ៍សាត់)........... ១០.០០០៛

ឧបាសិកា ស៊ី មិនា (ពោធិ៍សាត់)............................................... ១០.០០០៛

លោក លឹម បៀង និង ឈាន គឹមឡូន + បុត្រ (ស្ទោង) ......... ១០.០០០៛

ឧបាសិកា ជឹង មួយ ហ៊ី + បុត្រ (ស្ទោង) ............................... ១០.០០០៛

ឧបាសិកា ទិត ថាច + បុត្រ (ស្ទោង) ..................................... ១០.០០០៛

ឧបាសិកា អ៊ុន សួ + បុត្រ (ស្ទោង) ........................................ ១០.០០០៛

ឧបាសិកា លឹម ណារី + បុត្រ (ស្ទោង) ................................. ១០.០០០៛

លោក ឆៃ ប៉ាយ និងភរិយា + បុត្រ (ស្ទោង) ...................... ១០.០០០៛

លោក ម៉ៅ ម៉េងហុង និងភរិយា + បុត្រ (ស្ទោង) ................ ១០.០០០៛

លោក ស ឌិន និងឧ.សិ. ខំ + បុត្រ (ស្ទោង) ...................... ១០.០០០៛

កុមារា ប៊ុន មន្នីករុណា (ស្ទោង) ......................................... ១០.០០០៛

កុល ដារិន (អូស្ត្រាលី)...................................................... ១០.០០០៛

កុមារា កុល ដេវិត (អូស្ត្រាលី)............................................ ១០.០០០៛

កុមារី ឈ ម៉ីអ័រ (ស្ទោង) ................................................... ១០.០០០៛

ឧបាសិកា នី សុខុន (ស្ទោង) ............................................ ១០.០០០៛

កុមារា ឈ ឈីងគ័រ (ស្ទោង).............................................. ១០.០០០៛

កុមារា ណាំ សុខឃាង (ស្ទោង) ........................................... ១០.០០០៛

កុមារី ណាំ ហុងអ៊ូ (ស្ទោង).................................................. ១០.០០០៛

យាយ ៗ នៅបទុម (ស្មោង) ............................................... ១០.០០០៛
ឧបាសិកា កែ វីឡែ + បុត្រ (ស្មោង).................................... ១០.០០០៛
សំ ហឿន (ស្មោង)........................................................... ១០.០០០៛
មាន សាម៉ុន (ស្មោង) ...................................................... ១០.០០០៛
ឧបាសក លី គឹមហួរ (ស្មោង)............................................ ១០.០០០៛
សាមណេរ សែម សេងលី (វត្តព្រះនាង)............................... ១០.០០០៛
សាមណេរ ម៉ែន ស៊ី លី (វត្តព្រះនាង).................................... ១០.០០០៛
សាមណេរ ម៉ន កឿត (វត្តព្រះនាង)..................................... ១០.០០០៛
ឧបាសិកា ជុន ចេង ........................................................ ១០.០០០៛
ឧ.ស. ជុប ប៉ា និងឧ.សិ. ប្រាក់ សេងឈន + បុត្រ (ស្មោង)... ១០.០០០៛
ឧបាសក អ៊ាប ហៃ + បុត្រ (ស្មោង).................................... ១០.០០០៛
ឧបាសិកា អ៊ុំម អេង + បុត្រ (ស្មោង).................................. ១០.០០០៛
ឧ.ស. តុប អ៊ាវ និងឧ.សិ. លឹម រ៉ាន់ + បុត្រ (ស្មោង)........... ១០.០០០៛
ឧបាសក សំ ហាន + បុត្រ + ចៅ (ស្មោង).......................... ១០.០០០៛
ឧបាសិកា ហែល សុមល + បុត្រ (ស្មោង)............................ ១០.០០០៛
លោក គង់ ហេង និងឧ.សិ. ញឹក ឆេងលាង + បុត្រ (ស្មោង)... ១០.០០០៛
ឧបាសិកា ឡេម + បុត្រ (ស្មោង)....................................... ១០.០០០៛
លោក យ៉ន ឃឿន និងភរិយា + បុត្រ (ស្មោង).................... ១០.០០០៛
ឧបាសិកា អ៊ឹង ហុងអាង + បុត្រ (ស្មោង)............................ ១០.០០០៛
លោក ស៊ឹង ខុង និងភរិយា + បុត្រ (ស្មោង)........................ ១០.០០០៛

| | |
|---|---|
| ឧបាសិកា មុំ និងស្វាមី + បុត្រ (ស្មោង)................................ | ១០.០០០៛ |
| ឧបាសិកា ឈាន ឈន និងស្វាមី + បុត្រ (ស្មោង)................ | ១០.០០០៛ |
| អ្នកស្រី អាំង ប៉ោយាង + បុត្រ (ស្មោង)................................ | ១០.០០០៛ |
| លោក ម៉ាង សុរិទ្ធ និងអ្នកស្រី សឿន សុវាសនា (ស្មោង)....... | ១០.០០០៛ |
| យុវជន សឿន សុផេង (ស្មោង)............................................. | ១០.០០០៛ |
| កញ្ញា ទាវ ចន្ទសុវណ្ណវត្ថ (ស្មោង).......................................... | ១០.០០០៛ |
| កុមារី នា កែវកញ្ចនា (ស្មោង)................................................ | ១០.០០០៛ |
| យុវជន លី លិញវិញ (ស្មោង).............................................. | ១០.០០០៛ |
| កុមារី លី ប៉ូវៀត (ស្មោង).................................................... | ១០.០០០៛ |
| ឧបាសិកា កឹក ឡុន + បុត្រ (ស្មោង)..................................... | ១០.០០០៛ |
| ឧបាសក កៅ (ឫស្សីជះ)........................................................ | ១០.០០០៛ |
| យាយ និន + កើត កែ (ស្មោង) .......................................... | ១០.០០០៛ |
| ឧបាសិកា គួច ហ្គេចអេង និងស្វាមី + បុត្រ (ស្មោង)............. | ១០.០០០៛ |
| ឧបាសិកា ប៉ៅ សែម + បុត្រ (ស្មោង).................................. | ១០.០០០៛ |
| យន របនា (ស្មោង)........................................................... | ១០.០០០៛ |
| ឧបាសិកា រ៉ូន + បុត្រ (ស្មោង)............................................ | ១០.០០០៛ |
| លោក សេង ឆេងពុយ និងភរិយា + បុត្រ (ស្មោង).............. | ១០.០០០៛ |
| លោក តេង វិមុល + ហេង មករា + បុត្រ (ស្មោង)............... | ១០.០០០៛ |
| និស្សិត ឆេង ហាក់ង៉ិង (ស្មោង)........................................... | ១០.០០០៛ |
| យុវសិស្ស ឆេង ហាក់ងង់ (ស្មោង)......................................... | ១០.០០០៛ |

យុវសិស្ស ឆេង ថុនស៊ាង (ស្មោង)........................................ ១០.០០០៛

យុវសិស្ស ឆេង សុខ សាន្ត (ស្មោង)..................................... ១០.០០០៛

កញ្ញា ហែល សុផាមី (ស្មោង)............................................ ១០.០០០៛

ឧបាសិកា សេង រិទ និងស្វាមី + បុត្រ (ស្មោង).................... ១០.០០០៛

ឧបាសិកា ជី មុយលីន + ចៅ (ស្មោង)................................. ១០.០០០៛

ឧបាសិកា ហន ផារី និងស្វាមី + បុត្រ (ស្មោង)..................... ១០.០០០៛

ឧ.ស. ឈិក ពាង និងឧ.សិ. ហ៊ុន ចាន់ + បុត្រ (ស្មោង)......... ១០.០០០៛

លោក ឡេង វ៉ាន់ឌី អ្នកស្រី អាំង ប៉ោកាង + បុត្រ (អន្លង់វែង)... ១០.០០០៛

លោក អាំង យូឡាយ អ្នកស្រី ឈ មុយលង់ + បុត្រ (កំពង់ក្ដី). ១០.០០០៛

លោក អាំង សាយសួ អ្នកស្រី លឹមប៊ូនាថ + បុត្រ (ស្មោង)..... ១០.០០០៛

លោក ឈ យូអេង អ្នកស្រី ប៉ោហួយ + បុត្រ (ប៉ោយប៉ែត)..... ១០.០០០៛

ឧបាសិកា បេ អាយគីម + បុត្រ (ស្មោង).............................. ១០.០០០៛

លោក ហ៊ឹត វណ្ណថន អ្នកស្រី ហេង ចាន់ទី + បុត្រ (ស្មោង)...... ១០.០០០៛

លោក ឆាយ សុផេង អ្នកស្រី ហេង ចាន់ណា+ បុត្រ (ស្មោង)... ១០.០០០៛

លោក គឹម វ៉ាស៊ី អ្នកស្រី លី ឈុនហ៊ីង+ បុត្រ (តាំងក្រសាំង)... ១០.០០០៛

លោក ទ្រី ហ៊ាន និងឧ.សិ. អ៊ាន យាន + បុត្រ (ស្មោង).......... ១០.០០០៛

ទាយក ហ៊ឹត ហ៊ុ ទាយិកា ស្រី ប៊ូនីន+ បុត្រ (ស្មោង).............. ១០.០០០៛

យុវនារី ថេង ដាលិស (ស្មោង)............................................ ១០.០០០៛

យុវនារី ថេង ថាមវង្ស (ស្មោង)........................................... ១០.០០០៛

កុមារា ថេង ហេងលាប (ស្មោង).......................................... ១០.០០០៛

